# សារព័ត៌មាន ខ្មែរប៉ុស្ដិ៍ ស.រ.អា KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

មាតិការរឿង Issue 154 May 24th -June 06th, 2014

Free

New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852


## កម្មវិធីប្រឡងបវរកញ្ញាអាស៊ីអាមេរិកាំងប្រចាំឆ្នាំ២០១៤

## 2014 PACIFIC MISS ASIAN AMERICAN PAGEANT COMMITTEE HONORS COMMUNITY LEADERS DURING OPENING PRESS CONFERENCE

**ដោយ : សុខា**

**ក្រុងបាសេដ្ឋារដ្ឋម៉ារីឡែនៈ** ចាប់ពីឆ្នាំ២០០៨ មកក្រុមអ្នកដឹកនាំក្នុងសហគមន៍មានអ្នកជំនួញ សកម្មជនសហគមន៍បញ្ញវ័ន្តអាស៊ីអាមេរិកាំងក្នុងស្ថាប័ននានាក្នុងសហរដ្ឋអាមេរិក ពិសេសក្នុងក្រុងបាសេដ្ឋានៃរដ្ឋម៉ារីឡែន

**តទៅទំព័រទី ០៤**




April 21, 2014 - Bethesda, Md. During the recent Opening Press Conference of the 2014 Pacific Miss Asian American Beauty Pageant, organized and hosted by Pacific Culture International (PCI), participants and

**(Continued to page 4)**

## លោកស្រី មូរ សុខហួរ នៅរ៉ូដអាយឡិន នឹងម៉ាសាឈូសែតសហរដ្ឋអាមេរិក

**រាយការណ៍ដោយៈ វណ្ណៈ ម៉ែន**

អតីតរដ្ឋមន្ត្រីក្រសួងកិច្ចការនារីកម្ពុជាធ្លាប់ជាមនុស្សជំរើសសម្រាប់រង្វាន់ណូបែលពីភពលោក នឹងបច្ចុប្បន្នជាសមាជិកសភាគណបក្សសង្គ្រោះជាតិ គឺលោកស្រី មូរ សុខហួរ បានត្រូវទទួលបដិសណ្ឋារកិច្ចដោយប្រជាពលរដ្ឋខ្មែរនៅប្រូវីដិន ប្រមាណ១០០នាក់នៃរដ្ឋរ៉ូដអាយឡិន និងប្រមាណជិត៤០០នាក់ទៀតនៅហ្វលរីវើរដ្ឋម៉ាសាឈូសែត ជាលើកដំបូងបង្អស់ កាលពីថ្ងៃទី២៤ឧសភា ២០១៤ កន្លងទៅនេះ។



លោកស្រី មូរ សុខហួរ ថ្លែងទៅពលរដ្ឋខ្មែរនៅរ៉ូដអាឡិន

នៅទីស្នាក់ការសមាគមនខ្មែរនាផ្លូវ Broad St ក្រុងប្រូវីដិន ក្នុងកម្មវិធីដែលមានលក្ខណៈស្វែងយល់ពីនយោបាយកម្ពុជា លោកស្រី មូរ សុកហួរ បានសំដែងការលើកដំកើងនារីក្នុងវិស័យនយោបាយប្រស្រ័យទាក់ទងគ្នាជាកម្មវិធីបងស្រីប្អូនស្រី ហើយក៏បានឆ្លើយនឹងសំនួរទាក់ទងទៅនឹងនយោបាយខ្មែរបច្ចុប្បន្នក្នុងនាមជាអ្នកប្រឡូកដណ្ដើមលទ្ធិប្រជាធិបតេយ្យជូនពលរដ្ឋខ្មែរដោយផ្ទាល់ដៃដែរ ។ នៅហ្វលរីវើនៅចម្ងាយប៉ុន្មាន ១ ម៉ោងពីប្រូវីដិនប្រជាពលរដ្ឋនៅជុំវិញតំបន់បានមកទទួលភ្ញៀវកិត្តិយសដដែលក្នុងពីធីជប់លៀងវេលាល្ងាចមួយទៀត ជូនលោកស្រី មូរ សុកហួរ រៀបចំដោយ ប៉ូ សុវណ្ណរិទ្ធ នៃមូលនិធីសប្បុរសខ្មែរ ។ គឺជាការរៀបចំប្រមូលថវិការផ្ញើរទៅជួយ

**តទៅទំព័រទី ០៦**

## បុណ្យរំឭកគុណវីរជន នៅឡូវែល

**ប្រែសម្រួលដោយ : សុខា**

**អត្ថបទដោយ : វីឆាដ ហ្វា**

បុណ្យរំឭកគុណដល់វីរជនជាថ្ងៃបុណ្យដ៏ធំទូទាំងសហរដ្ឋអាមេរិកដែលត្រូវបានធ្វើជារៀងរាល់ឆ្នាំចំថ្ងៃច័ន្ទក្នុងសប្ដាហ៍ចុងក្រោយនៃខែឧសភា។ វត្ថុបំណងនៃបុណ្យនេះ គឺដើម្បីរំឭកដល់គុណវីរជនចម្បាំងដែលបានពលីក្នុងសង្គ្រាម ហើយដែលបម្រើការងារក្នុងជួរទ័ព។ ពិធីបុណ្យនេះមានដើមកំណើតចេញមកពីពេលបន្ទាប់ពីសង្គ្រាមស៊ីវិលអាមេរិកបញ្ចប់ទៅប៉ុន្មានឆ្នាំ ខណៈដែលប្រជាជនក្នុងរដ្ឋនានាធ្វើការតុបតែងផ្នូរដល់

**តទៅទំព័រទី ០៥**

ទំព័រធ្វើដំណើរ

## ម៉ាយ៉ាមី នៃរដ្ឋ ផ្លរីដា ជាស្ថានសួគ៌នៃទេសចរណ៍





**ដោយៈ ពិន សំខុន**

●●●បន្ទាប់ពីធ្វើការយ៉ាងនឿយហត់អស់រយៈពេលបីខែនៅឡូវែលមក សុបិន ប៉ុណ្ណារ៉ូ និងខ្ញុំបាន **តទៅទំព័រទី ០៣**

# Connect with over 20,000 residents in Lowell!



Soben Pin, Managing Partner



KhmerPost USA - Your portal to the 2nd largest Cambodian-American population in the United States

Free Full Color Biweekly Bilingual Cambodian-American Newspaper available over 100 locations serving Greater Lowell, Lynn, Boston and beyond.

**Call 978-677-7163** for a free quote today!











KhmerPost USA | 45 Merrimack St., Suite 218A | Lowell, MA, 01852
Phone: 978.677.7163 | Fax : 978-677-7092
www.khmerpost.us | Info@khmerpost.us

តមកពីទំព័រទី ១

## ម៉ាយាមី នៃរដ្ឋ ផ្លរីដា ជាស្ថានសួគ៌...



ចាកចេញដំណើរពីឡូវែល នាថ្ងៃអាទិត្យ ១១ឧសភា២០១៤ វេលាម៉ោ៩កន្លះព្រឹកទៅកាន់ "ក្រុងម៉ាយាមី"នៃរដ្ឋ ផ្លរីដា ដែលនៅចម្ងាយប្រមាណ២ពាន់ម៉ាយខាងត្បូងក្រោមរដ្ឋម៉ាសាឈូសែត ដើម្បីស្វែងរកការសម្រាកដ៏ស្ងប់ស្ងាត់មួយ។ យន្តហោះប្រតិកម្ម"ដែលតា"ដែលយើងជិះបានហោះហើរ៣ម៉ោងទម្រាំមកដល់ចំណតយន្តហោះ"LEDdl"នៃរដ្ឋផ្លរីដា ដោយឆ្លងកាត់ប្តូរយន្តហោះម្តងនៅ "អាត់ឡិនតា" ហើយរថយន្តតាក់ស៊ីក្រុងក៏បានប្រើពេលប្រមាណកន្លះម៉ោងទៀត ទើបនាំយើងបានចូលមកដល់កាន់សណ្ឋាគារ "វែសស៊ីន ឌីផ្លូម៉ាត រីស្ហត"បាន។

សណ្ឋាគារដែលយើងស្មានថា ថ្នាក់មធ្យមនៅពេលកក់កន្លែងតែដល់មកឃើញមែនទែន ទើបដឹងថា ជាសណ្ឋាគារខ្នាត "ត្រូសារ ផ្កាយ៤" មានបន្ទប់ជាង១ពាន់មានសាលប្រជុំកន្លែងហាត់ប្រាណភោជនីយដ្ឋាន៤"ឡប៊ី"ទទួលភ្ញៀវធំទូលាយប្រកបដោយការតាំងលំអរភ្ញីផ្កានឹងសាឡុងទំនើបច្រើនឈុតមានតាំងដើមត្នោតធំៗច្រើនដើមអាងហែលទឹកចំណុះភ្ញៀវច្រើន២អមដោយគ្រែសំឱិលហាលថ្ងៃរាប់រយមានទាំងកន្លែងមើលកូនពេលម៉ែឪរវល់មានឆ្នេរសមុទ្រខ្សាច់សក្បុសកន្លែងវាយ "តេនីស" ទៀតផង។ ទិដ្ឋភាពដ៏គួរឱ្យភ្ញាក់ផ្អើលនេះជាផលចំណេញដ៏សំខាន់សម្រាប់ការសម្រាកកាយ និងអារម្មណ៍របស់យើងដែលមានអ្វីៗគ្រប់យ៉ាងមិនខ្វះអ្នកបំរើនៅគ្រប់ជ្រុងបើកភ្នែកឡើងឃើញតែលំអនៃការរៀបចំទទួលភ្ញៀវគួរឱ្យចាប់ចិត្តនឹងភាពស្អាតមានអនាម័យដ៏គ្មានមន្ទិលសង្ស័យ...។ ភាពដ៏ប្រសើរឥតខ្ចោះប៉ុណ្ណេះ ហើយមិនមានទាមទារឱ្យមានសម្លៀកបំពាក់ធំ ឬមធ្យមអ្វីទាំងអស់ម្លោះហើយមានមនុស្សស្រីប្រុសស្លៀកសំពត់អាវវែងឬខ្លីកំប៉ុតឡិតយ៉ាងព្រងព្រាត់។ ភាពសុខកាយសប្បាយចិត្តរបស់យើងនេះ ដែលកាលប៉ុន្មានឆ្នាំមុនគេហៅថា "សម្បូរបែប" មុននេះទៀតគេហៅថា "សក្តិភូមិ" បានក្លាយទៅជា"សេចក្តីត្រូវការចាំបាច់"សំរាប់ការសម្រាកសោតន្តិប្រយារម្មណ៍របស់មនុស្សលែងធ្វើឱ្យយើងសង្ស័យថា ក្រែងបានធ្វើអ្វីខុសទៀតហើយ.. គុណភាពនៃជីវិតប្រសើរ ទោះជាមានរយៈពេលខ្លី ឬវែងត្រូវតែចាប់យកដោយមិនរង់ចាំពេលក្រោយឡើយ ពីព្រោះតែសុខភាពផ្លូវចិត្តរបស់មនុស្សនោះឯង។ សុបិន បានដើរពិនិត្យជុំវិញសណ្ឋាគារឧទ្ទានមិនដាច់មាត់ថា ខ្ញុំមិនដែលមកនៅកន្លែងស្អាតដូចក្តីស្រម័យយ៉ាងនេះទេ... ស្របគ្នានឹងថ្ងៃមកដល់ជា"ទិវាមាតា"ផងនោះ ការជូនពរដល់គ្រប់ស្ត្រីជាមាតាបានក្លាយទៅជាពរជូនដល់រូបនាងផ្ទាល់តែម្នាក់ឯង គួរឱ្យរីតតែរីករាយសប្បាយចិត្តអស្ចារ្យទៀត។







ថ្ងៃដំបូងនឹងថ្ងៃទី២បន្ទាប់ពីមកដល់នេះខ្ញុំឥតបានចេញទៅណាទេ រវល់តែបញ្ចប់អត្ថបទកាសែតដោយសារគ្រោងថាធ្វើការងារកាសែតឱ្យហើយនៅពេលចេញដំណើរក៏ប៉ុន្តែនៅ២ថ្ងៃមុននោះកុំព្យូទ័រខូចនៅតែធ្វើមិនហើយៗដល់ទីកថា ធ្វើការជួសជុលរួច ហើយវានឹងចប់រឿងអាចបង្ហើយការណ៍បានតែកុំព្យូទ័រនៅតែប្រើមិនកើតដែលជាហេតុធ្វើឱ្យយឺតដំណើរការណ៍យ៉ាងដំណំ ខ្ញុំត្រូវតែខិតខំរកមធ្យោបាយប្រើកុំព្យូទ័រឱ្យទាល់តែបាន... ចុងបញ្ចប់ការងារកាសែតអាចបញ្ចប់បាននៅ២ថ្ងៃ១យប់ បន្ទាប់ពីមកដល់កន្លែងសម្រាកកាយ ហើយការយឺតយ៉ាវនេះក៏ប៉ះពាល់ដល់ការសម្រាកសូបិននឹងប៉ុណ្ណារូដូចគ្នាដោយត្រូវជួយដល់ការងារបន្ថែមរបស់កាសែតផងនឹងមើលប៉ុណ្ណារ៉ូតែម្នាក់ឯងផង ។ កាសែតក៏បានចេញយឺត២ថ្ងៃយ៉ាងលំបាកតែសប្បាយដោយអាចមកដល់ពេលបានសម្រាកខ្លះដែរនៅទីបញ្ចប់។

ក្រុង"ម៉ាយាមី"ជាក្រុងដែលសម្បូរណ៍សណ្ឋាគារខ្ពស់ៗកេរ្តិ៍ឈ្មោះល្បីៗរាប់រយនៅជាប់ៗគ្នាមានសម្បូរភោជនីយដ្ឋាន និងរង្គសាលធំៗនៅជាប់នឹង "កាស៊ីណូ" មិនខ្វះចន្លោះកន្លែងលក់ឥវ៉ាន់ប្រើប្រាស់ម្ហូបចំណីនឹងវត្ថុអនុស្សាវរីយថ្នាក់ខ្ពស់ៗស្ថិតជុំគ្នាជាមជ្ឈមណ្ឌលពាណិជ្ជកម្មផ្កាយ៥ជាពិសេសនៅទំបន់ខាងត្បូងទាំងមូលដែលលយចូលទៅក្នុងសមុទ្រទល់មុខប្រទេសគុយបាធ្វើឱ្យគេយល់ថា តំបន់ដ៏ទូលំទូលាយស្អាតអស្ចារ្យនេះ គឺជាតំបន់សិប្បនិមិត្តតំបន់ទេសចរណ៍ដ៏ធំ ធេងជាតំបន់ដែលមនុស្សមកមិនត្រឹមតែពីស.រ.អា.ទេ ដែលមកទិញសេចក្តីស្រម័យរបស់ខ្លួនឱ្យក្លាយជាការពិតនោះ សូម្បីតែពិភពលោកទាំងមូលក៏ស្គាល់ហើយឃោសនាឱ្យ "ម៉ាយាមី ដូចជាស្ថានសួគ៌នៅលើផែនដី"នេះដែរ ។

ម៉ាយាមី ដែលប្រកដជារស់បានដោយសារតែភ្ញៀវមកពីក្រៅតំបន់របស់ខ្លួនតែប៉ុណ្ណោះ តើមានអ្វីគួរឱ្យជឿថា មានចំណូលទ្បេងទាត់អាចរស់នៅបានទៅ? មាន!ភាពទៀតទាត់ប្រាកដជាមាន គឺ១-អាកាសធាតុក្តៅនៃ "ត្រូពីខល" និងឆ្នេរសមុទ្រខ្សាច់ព័ទ្ធជុំវិញ ២-ពលរដ្ឋអាមេរិកកាំងភាគច្រើនមានសមត្ថភាពគ្រប់គ្រាន់នឹងទិញ "ប្រណិតភាព"បាន ៣-ពីរភាគបីនៃសហរដ្ឋអាមេរិករស់នៅតំបន់ត្រជាក់ដ៏យូរមានធ្លាក់ព្រិល៦ខែក្នុងមួយឆ្នាំៗចេញទៅណាមិនបាន ៤-ក្រុមហ៊ុនយន្តហោះ នាវាទេស-ចរណ៍ (cruise) រួមទាំងកម្មវិធីសំខាន់ៗដូចជា"ឌីស្នេយឡិន"ឬ"ភាពយន្តហូលីវូដ" នាំគ្នាកន្ត្រាក់អារម្មណ៍មនុស្សតាមរយៈការផ្សព្វផ្សាយពាណិជ្ជកម្មក្នុងកាសែតវិទ្យុ ទូទស្សន៍នឹងឥឡូវប្រព័ន្ធផ្សព្វផ្សាយសង្គមឱ្យហូរហៀររាប់ម៉ឺនសែននាក់មកចាយវាយរាល់ថ្ងៃក្នុងតំបន់ជ្រោយសមុទ្រ "ម៉ាយាមី" ដ៏ល្បីល្បាញនេះ។



សណ្ឋាគារ"អ៊ីស៊ីន ឌីប្លូមាត រីស្ហត" ដែលយើងមកស្នាក់នៅនោះស្ថិតនៅចំកណ្តាលមណ្ឌលអភិវឌ្ឍន៍គ្មានឈប់ផ្អែកខាងឆ្នេរសមុទ្រ"អាត់លិនទិក"នាបន្ទប់ជាន់ទី១៥មានពន្លឺនឹងកំដៅថ្ងៃជះចូលតាំងពីព្រលឹមទល់ព្រលប់៕

**"នៅមានតទៅលេខក្រោយទៀត"**




## តមកពីទំព័រទី ១ កម្មវិធីប្រលងបវរកញ្ញាអាស៊ី.....

បានពួតដៃប្រមូលកម្លាំង និងការសហការជាមួយស្ថាប័ននានាជិត និងឆ្ងាយទាំងជាតិ និងអន្តរជាតិបង្កើតឱ្យមានជាគណៈកម្មការធ្វើការប្រកួតប្រជែងជ្រើសរើសបវរកញ្ញាអាស៊ីឡើង រហូតដល់ឆ្នាំ២០១៤នេះកម្មវិធីនេះ មានឈ្មោះថា ប្រកួតកញ្ញាឯកអាស៊ីអាមេរិកាំងប្រចាំប៉ាស៊ីហ្វិកដែលទទួលស្វាគមន៍នារីទាំងឡាយមានដើមកំណើតជាជាតិអាស៊ីមិនថាតែចិន កូរ៉េ ខ្មែរ ថៃ គឺអាចចូលប្រកួតបានទាំងអស់។ បញ្ជាក់បែបនេះ ព្រោះដើមឡើយកម្មវិធីនេះនៅឆ្នាំ២០០៨ដែលជាឆ្នាំចាប់ផ្តើមការប្រកួតបវរកញ្ញានេះផ្តោតទៅលើនារីស្រស់ស្អាតដែលមានដើមកំណើតជាជនជាតិចិន។ ២ឆ្នាំក្រោយមកកម្មវិធីនេះ ត្រូវបានផ្លាស់ជាកម្មវិធីប្រកួតសម្រស់ភាពឆ្លាតវៃបញ្ញា និងសមត្ថភាពដោយផ្តល់ឱកាសដល់យុវតីអាស៊ីអាមេរិកាំងទាំងឡាយចូលរួមការប្រកួតនេះ។

គួរបញ្ជាក់ផងដែរ ស្ថាបនិកកម្មវិធីនេះ មានកម្មវិធីនេះឡើងអ្នកនាងបានចាប់ផ្តើមធ្វើកិច្ចការនេះ នៅឆ្នាំ២០០៨ ហើយកំពុងបន្តរៀបចំជាហូរហែសម្រាប់ការប្រកួតឆ្នាំ២០១៤។

អ្នកនាងបានមានប្រសាសន៍ទាក់ទិននឹងកម្មវិធីប្រឡងបវរកញ្ញាឯកនេះថា នារីដែលបានដាក់ពាក្យប្រកួតមានរូបសម្រស់ស្អាតៗ និងមានសមត្ថភាពពិសេសៗដោយឡែកៗពីគ្នា។ ហើយការជ្រើសរើស គឺមានលក្ខណៈប្រកួតប្រជែងខ្លាំងបំផុត ព្រោះកម្មវិធីនេះ មិនត្រឹមតែចម្រាញ់យកសម្រស់តែពិនិត្យសព្វគ្រប់ជ្រុងជ្រោយទៅលើចំណេះដឹងសមត្ថភាពឈរជើងក្នុងទីសាធារណៈ ការឆ្លងកាត់ការសម្ភាសន៍បានល្អការឆ្លើយសំណួរបានល្អប្រវត្តិបម្រើសហគមន៍ និងសង្គមភាពជាអ្នកដឹកនាំជាដើម។

អ្នកនាង គ្រីស ហ្ស៊ូបានមានប្រសាសន៍បន្តទៀតថា ការប្រឡងនេះ រឿងឈ្នះ ឬចាញ់ក្នុងការប្រកួតមិនមែនជារឿងសំខាន់ឡើយ តែអ្វីដែលគួរចងចាំ គឺបទពិសោធន៍ល្អៗដែលនាងកញ្ញាបានទទួលពីការចូលរួមប្រកួត។ នាងកញ្ញាដែលជាបេក្ខជននឹងបានរៀនគ្រប់សព្វនៃស្ត្រីគំរូក្នុងសង្គមស៊ីវិល័យ ហើយទទួលបានចំណេះរាប់ចាប់ពីការតុបតែងទុកដាក់រៀបចំខ្លួនការប្រាស្រ័យទាក់ទងគ្នាការជឿទុកចិត្តលើខ្លួនឯង និងការផ្តល់មតិក្នុងទីសាធារណៈ។



ឈ្មោះថា គ្រីស ហ្ស៊ូ ចាន (Chris Zhu Jan)។ អ្នកនាង គឺជាអ្នកប្រឹក្សាផ្នែករូបរាងកាយ (Image Consultant)។ អាស្រ័យដោយចំណេះដឹងបទពិសោធន៍ និងការទទួលការផ្តល់យោបល់ពីមជ្ឈដ្ឋានជុំវិញដែលលើកទឹកចិត្តអ្នកនាងឱ្យបង្កើត


Chris Zhu Jan

តទៅទំព័រទី ១៧

Continued from page 01

## 2014 PACIFIC MISS ASIAN AMERICAN...

members of the media received pertinent information about upcoming pageant activities. The Pacific Miss Asian American Beauty Pageant is the largest, fairest and most influential beauty pageant on the East Coast. Since its inception, event organizers have been dedicated to promoting Asian cultural heritage, international cultural awareness and community pride. This event provides the platform for outstanding, young Asian American women to have the rare opportunity to display their artistic skills, intelligence, confidence, cultural pride and leadership in order to further advance themselves in American society.

This year's pageant will be held on Friday, October 3, 2014 at the Strathmore Music Center. Prior to that time, a host of other events will occur leading up to the pageant such as, the First-Round Competition and PCI Pageant EXPO, Fashion Show, the final 15 press conference, and more. For a complete list of pageant events and schedule, visit

Continued to page 17

# បោះឆ្នោតក្រុមប្រឹក្សា ស្រុក ខណ្ឌ ខេត្ត នឹងក្រុងនៅកម្ពុជា

?គឺជាការបោះឆ្នោតតែដោយសមាជិកក្រុមប្រឹក្សាឃុំ សង្កាត់ចំនួន ១១ ៤៥៩ នាក់ ដែលបានជាប់ឆ្នោតហើយ ឱ្យមកបោះឆ្នោតជ្រើសរើសក្រុមប្រឹក្សា ស្រុក ខណ្ឌ ខេត្ត នឹងក្រុងរបស់ខ្លួនតែប៉ុណ្ណោះ ។

កាលពីលេខមុនយើងបានលើកយកការបោះឆ្នោត ឃុំ សង្កាត់ មកធ្វើអត្ថាធិប្បាយនោះជាការភ័ណ្ឌច្រឡំមួយដែលយើងសូមលោកអ្នកអានអធ្យាស្រ័យ ពីព្រោះតែពេលនេះជាពេលបោះឆ្នោតស្រុក ខេត្ត ខណ្ឌ និងក្រុងទៅវិញទេ ហើយអ្នកដែលជាប់ជាសមាជិកក្រុមប្រឹក្សាឃុំ សង្កាត់ ពីឆ្នាំ២០១២មុន ទើបអាចមកបោះឆ្នោតជ្រើសតាំងក្រុមប្រឹក្សាថ្នាក់មូលដ្ឋានក៏រឹតមធ្យមរបស់គណបក្សនយោបាយនេះបាន ។

ការបោះឆ្នោតដ៏សំខានមួយនេះបានប្រព្រឹត្តទៅនៅថ្ងៃទី១៨ ឧសភា ២០១៤ ដោយអញ្ជើញសមាជិកក្រុមប្រឹក្សា ឃុំ និងសង្កាត់៥ គណបក្សមានគណបក្សប្រជាជនគណបក្សសង្គ្រោះជាតិគណបក្សហ៊្វុនស៊ិនប៉ិចគណបក្សសម្ព័ន្ធប្រជាធិបតេយ្យនិងគណបក្សសាធារណរដ្ឋ ប្រជាធិបតេយ្យឱ្យមកបោះឆ្នោត ។ គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សបានរួមកម្លាំងគ្នាជាគណបក្សតែមួយ គឺគណបក្សសង្គ្រោះជាតិ ។

ចំនួនមណ្ឌលដែលទៅបោះឆ្នោតមាន១៩៧មណ្ឌលនៅទូទាំងប្រទេស តំណាងឃុំសង្កាត់នាំគ្នាជ្រើសរើសក្រុមប្រឹក្សា ស្រុក ខណ្ឌ ខេត្ត ក្រុងរបស់ខ្លួនសម្រាប់ប្រទេសទាំងមូល ។

មានតែគណបក្សប្រជាជន និងគណបក្សសង្គ្រោះជាតិទេ ដែលកំពុងដណ្តើមអំណាចមូលដ្ឋានគ្នាយ៉ាងប្តូរផ្តាច់ ពីព្រោះជាមូលដ្ឋានដែលគណបក្សនិមួយៗយល់ថានេះ គឺជាជន្ទល់នៃអំណាចរដ្ឋ បើគណបក្សណាមួយដណ្តើមប្រជាពលរដ្ឋភាគច្រើនបាន ។ តែសម្រាប់ពេលនេះមិនទាន់អាចមានការប្រែប្រួលអ្វីធំដំទេ ដោយសារគេដឹងថា គណបក្សប្រជាជនមានសម្លេងឃុំសង្កាត់ដល់ទៅ៧៣ភាគរយ ដូច្នេះនឹងបោះឆ្នោតឱ្យខណ្ឌ ខេត្ត ក្រុង នៃគណបក្សខ្លួនឯងជាមិនខាន... យ៉ាងណាមិញខាងគណបក្សសង្គ្រោះជាតិមានសម្លេងឃុំសង្កាត់២៦ភាគរយ ក៏នឹងបោះឆ្នោតឱ្យខ្លួនឯងជាស្វ័យប្រវត្តដែរ ។







ជាក់ស្តែងគឺលទ្ធផលបណ្តោះអាសន្នប្រកាសថ្ងៃទី២៦ឧសភានេះ ឱ្យគណបក្សប្រជាជនមានអាសនៈឃុំសង្កាត់៨៣៧៩សម្លេង ទល់នឹងគណបក្សសង្គ្រោះជាតិមានតែ២៩៥៩សម្លេង ។ រីឯលទ្ធផលស្ថាពរគ.ជ.ប.នឹងប្រកាសនៅថ្ងៃទី៣០ចុងខែឧសភានេះ ។

ចំពោះលទ្ធផលនេះ លោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិបានប្រកាសថា អាចទទួលយកបានហើយ បើទោះជាលោកមានភស្តុតាងថាសមាជិកគណបក្សប្រជាជនបានជះលុយ ពី ៥០ ទៅ៥០០០ពាន់ដុល្លារមកទិញសម្លេងអ្នកបោះឆ្នោតឱ្យខ្លួនបានខ្លះក៏ដោយ ៕

**ខ្មែរផុស ស.រ.អា.**

---

តមកពីទំព័រទី ១ លោកស្រី មូរ សុខហួរ នៅរ៉ូដអាយឡិន...

ប្រជាពលរដ្ឋរងគ្រោះខ្វះទីជម្រកនៅកម្ពុជានឹងជួយដល់គណបក្សសង្គ្រោះជាតិតាមរយៈដំណើរទស្សនកិច្ចរបស់លោកស្រី មូរ សុកហួរ ។

ប្រវីដិន មានប្រជាពលរដ្ឋខ្មែរប្រមាន១ម៉ឺននាក់រស់នៅនឹង ហ្វ៊ីវើ ជាតំបន់ដែលមានប្រជាពលរដ្ឋខ្មែរតិចជាង៥ពាន់មិនដែលបានរៀបចំពិធីទទួលអ្នកនយោបាយខ្មែរពីមុនមកទេ អ្នកទាំងនោះច្រើនតែទៅចូលរួមជួបជុំនយោបាយនៅឡូវែល ឬនៅញូយ៉កជាដើម ។

នៅថ្ងៃព្រហស្បត៍ខាងមុខនៅលីនចម្ងាយ១ម៉ោងខាងជើង ហ្វ័រីវើ ជាតំបន់មួយទៀត នៃរដ្ឋម៉ាសាឈូសែតដែលសម្បូរខ្មែររស់នៅប្រមាណជាង១ម៉ឺននាក់ ទីនោះមានមន្ត្រីសាលាក្រុងជាប់ឆ្នោតម្នាក់ជាខ្មែរលោកស្រី មូរ សុកហួរ នឹងអញ្ជើញទៅជួបសហគមន៍ខ្មែរនៅទីនោះទៀត ។ លោកស្រីមានគម្រោងទៅមីនិសូតា នឹងទៅកាណាដាជាបន្តទៀត រហូតដល់ថ្ងៃទី៩ មិថុនា តើបត្រឡប់ទៅកម្ពុជាវិញ ៕



លោកស្រី មូរ សុខហួរ (រូបទី២ខាងស្តាំ) ថតជាមួយសហគមន៍ខ្មែរនៅរ៉ូដអាឡិន ម៉ាសាឈូសេត ផែនស៊ីវេនៀ

# ព័ត៌មានក្នុងពិភពលោក

## ពលរដ្ឋចិននៅវៀតណាមរងគ្រោះដោយនយោបាយរដ្ឋាភិបាលចិន

មន្ត្រីនគបាលខ្មែរនៅទល់ដែនអន្តរជាតិបាវិត ខេត្តស្វាយរៀង បាននិយាយថា មានជនជាតិចិនរាប់រយនាក់បានរត់ឆ្លងដែនពីវៀតណាមមកកម្ពុជា កាលពីថ្ងៃអាទិត្យទី១៨ឧសភាកន្លងទៅ ដើម្បីភៀសខ្លួនពីកុប្បកម្មរបស់សហគមន៍វៀតណាមដែលខឹងសម្បារនឹងនយោបាយរំលោភទឹកដីរបស់ចិនប៉េកាំង ។ ការបះបោរប្រឆាំងជនជាតិចិនដ៏គោកនេះធ្វើឡើងនៅហាទៀង នៃប្រទេសវៀតណាមតាមដំណឹងដំបូងថា កុប្បកម្មនោះបានផ្ទុះឡើងបណ្តាលឱ្យមានមនុស្ស





ស្លាប់២០នាក់នឹងរបួសប្រមាណ៩០នាក់ទៀត ដឹកយកទៅមន្ទីរពេទ្យ ។ មន្ត្រីវៀតណាមដែលមិនសប្បាយម្នាក់និយាយថា "ខ្ញុំខឹងណាស់ប្រទេសទាំងមូលក៏ខឹង ហើយទាំងអស់គ្នាមានសិទ្ធគ្រប់យ៉ាងសម្រាប់ខឹង..." តែអាជ្ញាធរចិនប៉េកាំងបានសុំឱ្យអាជ្ញាធរវៀតណាមចាត់វិធានការឱ្យបានតឹងតែងនឹងឱ្យបានឆាប់សម្រាប់កាពារពលរដ្ឋចិនដែលរស់នៅវៀតណាមមុននឹងចិនបញ្ជូនក្រុមសង្គ្រោះបន្ទាន់ទៅជួយតែពលរដ្ឋវៀតណាមនៅមានកង្វល់នឹងការចូលមកសង្គ្រោះបន្ទាន់របស់ចិននេះណាស់ ។

ថ្ងៃចន្ទនឹងថ្ងៃអង្គារ៍បន្ទាប់មកយោធាចិនបានបញ្ជូននាវាធំ៧ចំនួន៥គ្រឿងមកដឹកយកជនជាតិគេចំនួន៣៥០០នាក់ត្រឡប់ទៅស្រុកចិនវិញក្នុងក្របខណ្ឌនៃចលនាសង្គ្រោះបន្ទាន់នោះ។

យើងមិនទាន់ដឹងនៅឡើយទេ ថាកុប្បកម្ម យួនវាយសងសឹកចិននេះ វានឹងទៅដល់ណានៅឡើយទេក៏ប៉ុន្តែចិនបានយកប្រជុំកោះប៉ារ៉ាសែលនឹងតំបន់សមុទ្រផ្សេងទៀតអស់ច្រើនបាត់ទៅហើយ ។

ដែលល្អមើលនោះ យួនយំឡាំប៉ាតវ៉ាដោយបាត់បង់ដែនសមុទ្ររបស់ខ្លួនតែយួនធ្វើដូចគ្នានឹងចិនមកលើខ្មែរ ចំពោះកោះត្រល់កោះក្រចកសេះ ដែនសមុទ្រដែលឱ្យឈ្មោះថ្មីថា "ដែនសមុទ្រប្រវត្តិសាស្ត្រ" តើយួនមានយំដែរទេ?

## ខ្មែរភៀសខ្លួនទៅអូស្ត្រាលីកំពុងចារម្ភពីការបញ្ជូនខ្លួនមកវិញ

ពលរដ្ឋខ្មែរច្រើនរយនាក់បានភៀសខ្លួនទៅសុំសិទ្ធិជ្រកកោននៅប្រទេសអូស្ត្រាលី ។ ប្រទេសអូស្ត្រាលីមិនមានបំណងទទួលជនភៀសខ្លួនខ្មែរថ្មីទៀតទេ កិច្ចចរចាមួយរវាងរដ្ឋាភិបាលខ្មែរនឹងរដ្ឋាភិបាលអូស្ត្រាលីបានធ្វើឡើង ដើម្បីស្វែងរកលទ្ធភាពបញ្ជូនខ្មែរភៀសខ្លួនប្រឡប់មកមាតុភូមិវិញ ។ នាឱកាសដែលលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានជួបជាមួយនាយកកាទូតអូស្ត្រាលីចុងក្រោយបង្អស់នេះ ដំណឹងលេចឮថា "មានការយល់ស្របគ្នាជាគោលការណ៍" ហើយអ្នកសង្កេតការណ៍សង្ស័យថា មានការត្រូវរ៉ូវគ្នាទៅលើប្រាក់ចំនួន៤០លានដុល្លារឱ្យទៅកម្ពុជា ដើម្បីយកជនភៀសខ្លួនខ្មែរ១០០នាក់ត្រឡប់មកវិញ។

នៅលើដំណឹងចុងក្រោយនេះ មានប្រតិកម្មជាច្រើនបានទិទាននឹងថ្កោលទោសកិច្ចចរចាសម្ងាត់នោះ "មិនគោរពគោលការសិទ្ធិមនុស្សដែលអ្នករងគ្រោះបានគេចពីការភ័យខ្លាចដល់ជីវិតនៅកម្ពុជាមកសុំជ្រកកោននៅអូស្ត្រាលី..." ប្រធានអង្គការសិទ្ធិមនុស្សប្រចាំអ.ស.ប.បានបន្តថា កម្ពុជាពុំទាន់មានកេរ្តិ៍ឈ្មោះថា ជាប្រទេសមានការគោរពសិទ្ធមនុស្សខ្ពង់ខ្ពស់នៅឡើយទេ ៕

## ប្រទេសយូក្រែនដល់ណាហើយ?

សប្តាហ៍នេះនៅប្រទេសយូក្រែនកំពុងរៀបចំបោះឆ្នោតជ្រើសរើសប្រធានាធិបតីថ្មីបន្ទាប់ពីបាតុករបានទម្លាក់ប្រធានាធិបតីចាសវិកទ័រ យ៉ានូកូវិក ដែលគាំទ្ររុស្សីនឹងចំពោះប្រទេស


Vladimir Putin vows to respect Ukraine election result


Chocolate tycoon heads for landslide victory in Ukraine presidential election
Presidential hopeful Petro Poroshenko meets supporters in Uma. Photograph: Reuters

រុស្សីបានឈ្លានពានទឹកដីយូក្រែននាតំបន់ខាងត្បូង កាលពីខែកុម្ភៈមក។ **តទៅទំព័រទី ១១**

## ប្រទេសថៃជ្រួលច្របល់ម្តងទៀត

ប្រទេសថៃចាប់តាំងពីលោកស្រី យីនឡាក់ ស៊ីណេវ៉ាត្រា ឡើងកាន់អំណាចជានាយករដ្ឋមន្ត្រីតាំងពីឆ្នាំមុនមកសភាពស្ងប់ស្ងាត់ពីការបះបោរក្រុមអាវខ្មៅ ក្រុមអាវក្រហម ក៏បានធូរស្បើយបានច្រើនបើប្រៀបធៀបទៅនឹងនាយករដ្ឋមន្ត្រីមុនឈ្មោះ អាភីសិទ្ធ។ កាលពីខែវិច្ឆិការមុននេះ លោកស្រី យីនឡាក់ បានត្រូវក្រុមអាវលឿងធ្វើបាតុកម្មទាមទារឱ្យចុះចេញពីដំណែង។ ខែធ្នូ ២០១៣ លោកស្រីបានធ្វើការរំលាយសភាជាន់ទាបតែធ្វើការបោះឆ្នោតសារជាថ្មីមិនបាន ហើយបន្តកាន់ការណ៍ជានាយករដ្ឋមន្ត្រីចាំផ្ទះដែលគ្មានអំណាចទូលំទូលាយ។ ប៉ុន្តែមកដល់ខែឱសភានេះក្រុមប្រឹក្សាធម្មនុញ្ញវិនិច្ឆ័យថា "មានការរំលោភដល់រដ្ឋធម្មនុញ្ញនៃប្រទេសថៃ"លោកស្រីបានត្រូវក្រុមប្រឹក្សាធម្មនុញ្ញដកចេញពីមុខដំណែងនាយករដ្ឋមន្ត្រីជាមួយនឹងរដ្ឋមន្ត្រី៩ក្រសួងទៀត ។ ការដកមុខដំណែងនេះបានត្រូវក្រុមអាវក្រហមនៃអ្នកគាំទ្រលោកស្រីយល់ថា "ជាការសម្រេចយ៉ាងអយុត្តិធម៌របស់ក្រុមអ្នកនយោបាយ" ក៏នាំគ្នាធ្វើបាតុកម្មប្រឆាំងនឹងសេចក្តីសមេច្រនោះ ប៉ុន្តែ



ការគាំទ្រដល់លោកស្រី យីនឡាក់ នេះមានតិចតួចជាងក្រុមប្រឆាំងអាវលឿងដែលនៅតែទាមទារឱ្យដកទាំងនាយករដ្ឋមន្ត្រីចាំផ្ទះថ្មីជំនួសលោកស្រី យីនឡាក់ គឺលោក "និវត្តទំរុង បូនស៊ុងផៃសាន" ទៀត។ បាតុកម្មនៃក្រុមអាវលឿងដែលឈានទៅដល់ការអុកឡុកទីស្តីការនាយករដ្ឋមន្ត្រីមានការប៉ះទង្គិចនឹងកងសន្តិសុខនឹងក្រុមអាវក្រហមទៀតផង មានអ្នករងរបួសនឹងអ្នកស្លាប់ឡើងដល់ចំនួន២៨នាក់ទៅហើយ។

ថ្ងៃច័ន្ទទី១៩កន្លងទៅនេះ លោក និវត្តទំរុង ប៊ុនស៊ុងភៃសានប្រកាសមិនទទួលការចុះចេញពីដំណែងដូចការទាមទាររបស់ក្រុមប្រឆាំងអាវលឿងទេ រីឯលោកអគ្គបញ្ជាការយោធាប្រាយុទ្ធច័ន្ទអូឆា ប្រកាសឱ្យប្រើច្បាប់ក្នុង"ភាពអាសន្ន"បោសសំអាតការអុកឡុកការកាន់កាប់អាគាររដ្ឋាភិបាលដោយមិនប្រាប់ពីគម្រោងប្រើច្បាប់អាជ្ញា សឹកទៅនាយករដ្ឋមន្ត្រីថ្មីនោះទេ ។ ក្រុមបាតុករអាវក្រហមក៏បះបោរចេញមុខមកប្រឆាំងនឹងការប្រើច្បាប់អាជ្ញាសឹកនេះ ផ្ទុយគ្នានឹងបាតុករក្រុមអាវលឿងថា "យោធាចេញមុខមកការពារពួកគេ"ទៅវិញ ។ ក្រុមអាវក្រហមនឹងអ្នកសង្កេតការណ៍បារម្ភណ៍ថា យោធាអាចនឹងឈានទៅដល់ការធ្វើរដ្ឋប្រហារយកអំណាចប្រទេស **តទៅទំព័រទី ១១**

# លទ្ធផលសរុបពីការបោះឆ្នោតក្រុមប្រឹក្សារាជធានី-ខេត្ត-ក្រុង-ស្រុក-ខណ្ឌ

២០ ឧសភា ២០១៤ . 20 May 2014 - Results from the 18 May council elections លទ្ធផលសរុបពីការបោះឆ្នោតក្រុមប្រក្សារាជធានី-ខេត្ត-ក្រុង-ស្រុក-ខណ្ឌ ថ្ងៃអាទិត្យកន្លងទៅនេះ (សម្រាប់អាណត្តិទី២ឆ្នាំ ២០១៤-២០១៩) ប្រៀបធៀបទៅនឹងលទ្ធផលសរុបពីការបោះឆ្នោតដូចគ្នា កាលពីឆ្នាំ ២០០៩ (អាណត្តិទី១ ឆ្នាំ២០០៩-២០១៤)។ Comparison between the 2009 and 2014 council elections:*ថ្នាក់ រាជធានី-ខេត្ត, Municipality and Provinces-គណបក្សប្រជាជនកម្ពុជា, CPP សម្លេងឆ្នោត , votes: ចុះពី ៨៥៤៥មក ៨៤២១ (ថយ១២៤ សម្លេង) (-១២៤ votes)អាសនៈ .seats: ឡើងពី៣០២ ដល់៣០៥ (កើន៣អាសនៈ) (៣seats)- គណបក្ស សម រង្ស៊ី, សង្គ្រោះជាតិ, Sam Rainsy Party / CNRP សម្លេងឆ្នោត, votes: ឡើងពី ២៣១៧ ដល់ ២៩៧៣ (កើន៦៥៦ សម្លេង) (៦៥៦ votes) អាសនៈ, seats: ឡើងពី៦១ដល់៨៧ (កើន២៦អាសនៈ) (២៦ seats)* ថ្នាក់ក្រុង-ស្រុក-ខណ្ឌ, Districts- គណបក្សប្រជាជនកម្ពុជា , CPPសម្លេងឆ្នោត, votes: ចុះពី ៨៤៧៣ មក ៨០២៨ (ថយ ៤៤៥ សម្លេង) (-៤៤៥ votes) អាសនៈ , seats: ចុះពី ២២៤៩ មក ២២៣៧ (ថយ១២អាសនៈ) (-១២ seats)- គណបក្ស សម រង្ស៊ី, សង្គ្រោះជាតិ , Sam Rainsy Party / CNRP សម្លេងឆ្នោត , votes: ឡើងពី២៣៣២ ដល់២៩៥៧ (កើន៦២៥ សម្លេង) (៦២៥ votes) អាសនៈ, seats: ឡើងពី៥១៨ ដល់៦៨៣(កើន១៦៥អាសនៈ) (១៦៥ seats)



## តារាងប្រៀបធៀបចំនួនសម្លេងឆ្នោត និងអាសនៈ
## នៃការបោះឆ្នោតជ្រើសរើសក្រុមប្រឹក្សារាជធានី-ខេត្ត ក្រុង-ស្រុក-ខណ្ឌ ឆ្នាំ២០០៩ និង ២០១៤

| បោះឆ្នោត | លទ្ធផលបោះឆ្នោតក្រុមប្រឹក្សារាជធានី-ខេត្ត | | | | | លទ្ធផលបោះឆ្នោតក្រុមប្រឹក្សាក្រុង-ស្រុក-ខណ្ឌ | | | | |
|---|---|---|---|---|---|---|---|---|---|---|
| ឆ្នាំ២០០៩ | អាសនៈ តាមច្បាប់ | គណបក្ស សម រង្ស៊ី | | គណបក្សប្រជាជនកម្ពុជា | | អាសនៈ តាមច្បាប់ | គណបក្ស សម រង្ស៊ី | | គណបក្សប្រជាជនកម្ពុជា | |
| | 374 | សម្លេងឆ្នោត | អាសនៈ | សម្លេងឆ្នោត | អាសនៈ | 2861 | សម្លេងឆ្នោត | អាសនៈ | សម្លេងឆ្នោត | អាសនៈ |
| | | 2317 | 61 | 8545 | 302 | | 2332 | 518 | 8473 | 2249 |
| ឆ្នាំ២០១៤ (លទ្ធផលបណ្ដោះអាសន្ន) | 393 | គណបក្សសង្គ្រោះជាតិ | | គណបក្សប្រជាជនកម្ពុជា | | 2931 | គណបក្សសង្គ្រោះជាតិ | | គណបក្សប្រជាជនកម្ពុជា | |
| | | សម្លេងឆ្នោត | អាសនៈ | សម្លេងឆ្នោត | អាសនៈ | | សម្លេងឆ្នោត | អាសនៈ | សម្លេងឆ្នោត | អាសនៈ |
| | | 2973 | 87 | 8421 | 305 | | 2957 | 683 | 8028 | 2237 |
| គម្លាតល្អៀង | | 656 | 26 | -124 | 3 | | 625 | 165 | -445 | -12 |
| បរិយាយ | | កើន ៦៥៦សម្លេង | កើន ២៦អាសនៈ | ថយ ១២៤សម្លេង | កើន ៣អាសនៈ | | កើន ៦២៥សម្លេង | កើន ១៦៥អាសនៈ | ថយ ១៤៥សម្លេង | ថយ ១២អាសនៈ |

# Thai army declares martial law

## Commander says military has stepped in to restore order and invites pro- and anti-government protesters to talks

- Bangkok and agencies
- theguardian.com, Tuesday 20 May 2014 03.47 EDT
- Jump to comments (226)

Anti-government protesters stage a rally against martial law in Bangkok. Photograph: Narong Sangnak/EPA

Thailand's army has declared martial law, deploying troops in the heart of Bangkok before dawn in an attempt to end months of political turmoil and violence that has claimed 28 lives to date.

The army's commander, General Prayuth Chan-ocha said the military had stepped in to restore order, and invited both sides of the kingdom's bitter political divide to talks.

"We ask all sides to come and talk to find a way out for the country," Prayuth told reporters after meeting directors of government agencies and other high-ranking officials.

Prayuth warned pro- and anti-government protesters to avoid violence, and said martial law would be revoked after peace and order had been restored. Earlier, the military insisted the intervention was not a coup d'etat and said in a statement: "The public do not need to panic and can continue on with normal life."

The statement - read out in one of a number of televised proclamations - said the military had been compelled to act because (Continued to Page 14)


Anti-government protesters stage a rally against martial law in Bangkok. Photograph: Narong Sangnak/EPA

តមកពីទំព័រទី ១

# បុណ្យរំលឹកគុណវិរជននៅឡូវែល

អ្នកស្លាប់ក្នុងសង្គ្រាមប្រមាណ៧៥០០០នាក់។ បុណ្យនេះ ដើមឡើយមានឈ្មោះថា បុណ្យតុបតែងផ្នូរក្រោយមកនៅឆ្នាំ១៩៦៨បុណ្យនេះ ត្រូវបានប្តូរឈ្មោះថាជាបុណ្យរំឭកគុណវីរជនសម្រេចដោយសភាអាមេរិកធ្វើនៅថ្ងៃទី៣០ខែឧសភារហូតដល់ថ្ងៃច័ន្ទនៃសប្តាហ៍ចុងខែ។ ប៉ុន្មានឆ្នាំចុងក្រោយនេះប្រជាជនយល់ឃើញ និងទាញចេញអំពីបុណ្យនេះជាបុណ្យរំឭកដល់បុព្វការីជនរបស់ពួកគេដែលបានចែកឋានទៅ។

ក្រុមប្រឹក្សាទាហានមាតុភូមិនិវត្តន៍ប្រកាន់ខ្ជាប់ការប្រារព្ធបុណ្យនេះ ដោយធ្វើកម្មវិធីនេះនៅសាលអនុស្សាវរីយ៍ឡូវែល។ ឆ្នាំនេះវាគ្មិនកិត្តិយសក្នុងកម្មវិធី គឺតំណាងរាស្ត្រអាយលីនដូណាហ៊ូ អភិបាលក្រុងរ៉ដនី អេលៀត និងទីប្រឹក្សាក្រុង រីតា មីសឺ។ អ្នកទាំងបីរូបបានលើកទឹកចិត្តដល់អ្នកផង ទាំងឡាយឱ្យដកឃ្លាបន្តិចពីការទិញម្ហូប ឬកំសាន្តក្រៅផ្ទះដោយចំណាយពេលពីរទៅបីនាទីឧទ្ទិសដល់គុណវីរជនដែលបានពលីក្នុងសង្គ្រាម។ តំណាងរាស្ត្រអាយលីនដូណាហ៊ូបានរំឭកតម្លៃនៃការលះបង់ជីវិតរបស់ពលទ័ពទាំងនោះ ទៅនឹងការប្តូរមកវិញនូវសេរីភាពយុត្តិធម៌ សន្តិភាព និងភាពស្មើគ្នា។

ចំនែកអភិបាលក្រុងរ៉ដនី អេលៀត បានលើកទឹកចិត្តនឹងមាននិន្នការគិតទៅដល់ការធ្វើឱ្យប្រសើរឡើងនូវការធានារក្សាសុខភាព និងផ្នែកសុខាភិបាលឱ្យកាន់តែប្រសើរឡើងចំពោះទាហានមាតុភូមិនិវត្តន៍។ រីឯទីប្រឹក្សាក្រុងរីតាមីសឺ បានពង្រឹងអត្ថន័យនៃបុណ្យនេះជាថ្មីម្តងទៀតអំពីតម្លៃធំធេងនៃអ្នកក្លាហានរបស់ប្រទេសនេះ។

ក្រៅពីវត្តមានរបស់អ្នកទាំងបីរូបនៅមានគណកម្មធិការសាលា ដេវ ខុនវ៉េយ ទីប្រឹក្សាក្រុងបៀលសាម៉ារ៉ាសអ្នកតំណាងរដ្ឋ ដេវ ណេងហ្គល អតីតទីប្រឹក្សាក្រុង ចូ មិនដុនកា និងបេក្ខជនតំណាងរដ្ឋខ្មែរមួយរូបលោក រ៉ាឌីម៉ម អញ្ជើញចូលរួមក្នុងពិធីខាងលើ។.

# Memorial Day in Lowell

**by Richard P. Howe Jr.**

Memorial Day is an official Federal Holiday that is observed on the final Monday of May each year. The purpose of Memorial Day is to remember those who have died while serving in the armed forces of the United States. The holiday originated in the years following the American Civil War when people in different parts of the country began decorating the graves of the 725,000 men who died in the war. Originally called Decoration Day, the name gradually was changed to Memorial Day and in 1968 Congress passed a law switching the holiday from May 30 to the last Monday in May. In recent years, people also see Memorial Day as a time to remember relatives and friends who have died.

The Greater Lowell Veterans Council observes Memorial Day each year with a ceremony at the Lowell Memorial Auditorium. The speakers at this year's program included State Senator Eileen Donoghue, Mayor Rodney Elliott, and City Councilor Rita Mercier. All three urged people to step away for a few minutes from the cookouts and shopping trips that are common on Memorial Day weekend to remember those who died while serving in the military. Senator Donoghue said that the best way to honor those who made that ultimate sacrifice was to promote the values they fought for: freedom, justice, liberty and equality.

Mayor Elliott said that everyone should speak out in favor of better medical care for veterans who deserve respect, honor and the best care we can provide to them. Council Mercier commended all who spend time on Memorial Day honoring those who have died in war. She said that it's not a day for celebration but a day for respectful remembrance of the true heroes of our country.

Besides Senator Donoghue, Mayor Elliott and Councilor Mercier, other elected officials in attendance at this year's ceremony were Councilors Bill Martin, Corey Belanger and Bill Samaras; School Committee member Dave Conway; and State Representative Dave Nangle. Also in attendance were former City Councilor (and commander of the Portuguese-American Veterans) Joe Mendonca and State Representative candidate Rady Mom.

ទំព័រធ្វើដំណើរ







# សារព័ត៌មានខ្មែរផុស ក្នុងដំណើរកំសាន្ត នៅហូលីវូដ

**ក្រុងឡូសអាន់ជីលេស,រដ្ឋកាលីហ្វនីញ៉ា:** បន្ទាប់ពីភារកិច្ចមមាញឹកក្នុងការរៀបចំកម្មវិធីភ្លើងដំណែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិក កាលពីថ្ងៃទី២ ខែឧសភា រួចមក បុគ្គលិកនៃសារព័ត៌មានខ្មែរផុស បានធ្វើដំណើរកំសាន្តទៅកាន់រមណីយដ្ឋានក្នុងសហរដ្ឋអាមេរិក ពីរផ្សេងគ្នា។ មួយគឺរដ្ឋហ្វ្លរីដា និងមួយទៀត គឺកាលីហ្វនីញ៉ា។

យើងចេញដំណើរពីអាកាសយានដ្ឋានអន្តរជាតិឡូហ្គែន នៃក្រុងបស្តុន រដ្ឋម៉ាសាឈូសេត តាមជើងហោះហើរអាមេរិកាំង អ៊ែរឡាញក្នុងជើងហោះហើរផ្ទាល់ចំណាយពេល៤ម៉ោង និង ៥០នាទី ទើបទៅដល់អាកាសយានដ្ឋាន ឡូសអាន់ជីឡែសនៃរដ្ឋកាលីហ្វនីញ៉ាក្នុងចំណតលេខ៤ (Terminal 4)។

សម្រាប់ដំណើរកំសាន្តទៅកាន់កាលីហ្វនីញ៉ា សារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិកបានធ្វើដំណើរទៅកាន់ ហូលីវូដ ទីដែលទេសចរជាតិ និងអន្តរជាតិទូទាំងសកលលោកបំណងចង់កំសាន្ត។ នៅហូលីវូដ យើងតម្រង់ទៅកាន់មជ្ឈមណ្ឌលកំសាន្តដែលសង់លើទួលមើលឃើញភ្នំ។ មជ្ឈមណ្ឌលកំសាន្តមួយនេះ មានឈ្មោះថា យូនីសលស្ទុយឌីយោ (Universal Studio) ស្ថិតនៅក្នុងសង្កាត់ យូនីសល ស៊ីតធី (Universal City)។ តាមផ្លូវទៅកាន់មជ្ឈមណ្ឌលនេះ យើងបានធ្វើដំណើរឆ្លងកាត់មហាវិថី ហូលីវូដ ឬហូលីវូដ បូលីវឺដ។ លក្ខណៈពិសេសមួយដែលយើងបានចាប់អារម្មណ៍ពីចិញ្ចើមផ្លូវនៃមហាវិថីនេះ គឺស្នាមជើងតារា (Star) ដែលត្រូវបានបោះពុម្ពរាយបន្តបន្ទាប់គ្នាជាហូហែរ នៅលើចិញ្ចើមផ្លូវនៃអ្នកថ្មើរជើង។ បើតាមមតិអ្នកស្រុកនេះ






ស្នាមជើងតារាដែលនៅលើចិញ្ចើមផ្លូវជាហូហែរនោះ គឺសម្រាប់ដាក់ឈ្មោះដល់តារាហូលីវូដ ដែលបានក្លាយខ្លួនជាតារាក្នុងវិស័យភាពយន្តដ៏ល្បីល្បាញក្នុងសហរដ្ឋអាមេរិកនេះ។

ភ្ជាប់ខ្លឹមសារនេះទៅនឹងមជ្ឈមណ្ឌលកំសាន្តហូលីវូដ ក្នុងហូលីវូដស្ទុយឌីយោនេះវិញ យើងចតឡាននៅចំណតរថយន្តសម្រាប់ភ្ញៀវ (Visitor Parking) រួចហើយបន្តរង់ចាំឡាន(Shuttle)ដែលប្រចាំការក្នុងមជ្ឈមណ្ឌលនេះ ដើម្បីដឹកអ្នកទេសចរទៅកាន់ស្ទុយឌីយោដោយជិះឡើងទួល។

ចំណាយពេលមិនដល់ ៧នាទីយើងបានឡើងមកដល់មជ្ឈមណ្ឌលកំសាន្ត ហើយនៅចំពីមុខក្លោងទ្វារមានភូគោលមូលដ៏ធំមួយមានចលនាវិលជុំវិញ មានទឹកបាញ់ជុំវិញដូចគ្នាដែរ ដាក់អក្សរស្រោបភូគោលនោះថា យូនីសលស៊ីតធី **តទៅទំព័រទី ១៦**






# ព័ត៌មាននៃការប្រណាំងឡានជំនាន់សង្គ្រាមលោកលើកទី២ និងមុនឆ្នាំ១៩៧២ ក្នុងក្រុងឡូវែល ឆ្នាំ២០១៤

**ប្រែសម្រួលសង្ខេបដោយ : សុខា**

ទីក្រុងឡូវែលនឹងក្លាយទៅជាទីឆ្លងកាត់នៃការប្រកួតការប្រណាំងឡានដ៏មានប្រជាប្រិយភាពមួយមានប្រវត្តិតាំងពីឆ្នាំ១៩៨៣ម្ល៉េះ។ ការប្រណាំងឡានពិសេសផ្ដោតទៅលើឡានដែលផលិតនៅមុនឆ្នាំ១៩៧២ ហើយអាចជាឡានផលិតនៅអំឡុងសង្គ្រាមលោកលើកទី២ ។

ការប្រកួតនេះនឹងមានចម្ងាយយ៉ាងវែងអន្លាយចាប់ពីរដ្ឋមេន (Maine) ទៅកាន់រដ្ឋហ្វ្លរីដា (Florida) កាត់តំបន់ឆ្នេរអាត្លង់ទិច ។




ខ្សែប្រណាំងឡាននឹងកាត់តំបន់ឡូវែលនៃ

**តទៅទំព័រទី ១៧**






## តមកទំព័រទី ៧ ប្រទេសថៃជ្រួលច្របល់...

មកកាន់កាប់ដូចជំនាន់ទម្លាក់លោកនាយករដ្ឋមន្ត្រី ថាក់ស៊ីន ស៊ីណេវ៉ាត្រា ដូច្នោះដែរ។ ឧត្តមសេនីយ៍ ប្រាយុទ្ធ ចេញបញ្ជាឱ្យបិទទូរទស្សន៍នយោបាយប្រមាណ១០ស្ថានីយនឹងបិតមិនឱ្យមានការប្រជុំសាធារណៈទៀត ហើយខិតខំពន្យល់ពលរដ្ឋថៃថា "នេះគឺជាការរៀបចំសណ្ដាប់ធ្នាប់មិនមែនជារដ្ឋប្រហារទេ សូមឱ្យពលរដ្ឋរស់នៅជាធម្មតាកុំឱ្យមានការជ្រួលច្របល់ភ្ញាក់ផ្អើលអ្វីឱ្យសោះ" ហើយលោកក៏អញ្ជើញភាគីទាំង២មកពិភាក្សារកភាពចុះសម្រុងគ្នា។

ការប្រកាសភាពអាសន្ន ហើយប្រើច្បាប់អាជ្ញាសឹករបស់យោធាបានត្រូវមេក្រុមអាវក្រហមលោក ជាតុព័ន្ធ ព្រុំផាន និយាយថា"យើងចាំមើលថាតើយោធាចង់បានអ្វី? យើងមិនអត់ឱនទេ បើយោធាធ្វើអ្វីមិនស្របន័យរដ្ឋធម្មនុញ្ញហើយបណ្ដេញរដ្ឋាភិបាលចាំផ្ទះចេញពីតំណែងនោះ" ចំណែកតំណាងអ្នកនាំពាក្យសហរដ្ឋអាមេរិកអ្នកស្រី ជីន សាគី បានបង្ហាញជំហរប្រាប់អ្នកកាសែតថា "យើងចង់ឃើញថា ទាំងអស់គ្នាគោរពគោលការណ៍ប្រជាធិបតេយ្យរាប់ទាំងគោរពសេរីភាពបញ្ចេញមតិ... យើងសង្ឃឹមថា យោធានឹងផ្ដល់កិត្តិយសដល់ការប្ដេជ្ញាចិត្តទប់ស្កាត់កាពារជាបណ្ដោះអាសន្នកុំឱ្យមានអំពើហឹង្សានេះ ដោយមិនឆ្លៀតឱកាសបំផ្លាញស្ថាប័នប្រជាធិបតេយ្យ" ។

ការសន្យារបស់ប្រមុខកងទ័ពថៃ ប្រាយុទ្ធ ចន្ទអូឆា គ្រាន់តែជាពាក្យកុហកតែប៉ុណ្ណោះ ពីព្រោះនៅថ្ងៃព្រហស្បត៍ទី២២រដ្ឋប្រហាររបស់យោធាបានផ្ទុះឡើង ។ វរជនបយោបាយនឹងមេក្រុមបះបោរ១៥០នាក់ បានត្រូវចាប់ខ្លួនក្នុងនោះមាននាយករដ្ឋមន្ត្រីយីនឡាក់ជាមួយក្រុមគ្រួសារស៊ីណេវ៉ាតត្រាទាំងមូលនឹងត្រូវព្រមានដោយនាំខ្លួនទៅប្រឈមមុខ និងក្រុមប្រឹក្សារដ្ឋប្រហារយោធាដែលមានឈ្មោះថា ក្រុមប្រឹក្សាជាតិរៀបចំសណ្ដាប់ធ្នាប់ (NPOMC) គឺនាំទាំងលោកនាយករដ្ឋមន្ត្រីឡើងជំនួស នីវ៉ាតចំរ៉ុងបូនសុងផៃសាន រដ្ឋម្ត្រីក្រសួងយុត្តិធម្ម ឆាលឿមយូបាំរ៉ង មានទាំងក្រុមអ្នកប្រឆាំងនឹងគាំទ្ររដ្ឋាភិបាលទៅជាមួយផង ហើយបង្ខំឱ្យបើកការចរចា។

ក្រុមប្រឹក្សាយោធាបានចូលកាន់កាប់កិច្ចការនយោបាស៊ីវិលគ្រប់ក្រសួងទាំងអស់ដោយគ្មានស្របច្បាប់រដ្ឋធម្មនុញ្ញថៃ ត្រង់ណាមួយទេ ដែលជាហេតុធ្វើឱ្យសហរដ្ឋអាមេរិកតំណាងដោយ ចន ខេរី ធ្វើការកត់សំគាល់ហើយបាននិយាយថា "មិនមានភស្តុតាងអ្វីបង្ហាញថា មានការចាំបាច់ធ្វើរដ្ឋប្រហារទេ ដូច្នេះត្រូវឱ្យមានការដោះលែងមនុស្សនយោបាយដែលបានចាប់ខ្លួនមកវិញ" ។ ប្រទេសដែលចូលរួមថ្កោលទោលភ្លាម១មានបារាំង ជប៉ុន អូស្ត្រាលី សហភាព អឺរ៉ុប អង្គការសហប្រជាជាតិ...។ អ្នកសង្កេតការណ៍ជាទូទៅមើលឃើញថា លោកប្រាយុទ្ធធ្លាប់នៅក្នុងក្រុមយោធាដែលទម្លាក់លោក ថាក់ស៊ិន ស៊ីណេវ៉ាតត្រា កាលពីឆ្នាំ២០០៦ព្រឹត្តិការណ៍អាចនឹងអាប់អួរឈានទៅដល់ហឹង្សាសង្គ្រាមស៊ីវិលរវាងពលរដ្ឋជនបទដ៏ច្រើនដែលគាំទ្រគ្រួសារ ស៊ីណេវ៉ាតត្រា នឹងក្រុមកាន់អំណាចយោធាថ្មីដែលនឹងបន្តកាន់អំណាច២-៣ឆ្នាំ ទៀត ។

មកទល់នឹងថ្ងៃអាទិត្យកន្លងទៅនេះលោកស្រី យីនឡាក់ មិនទាន់បានត្រូវគេឃើញដោះលែងមកវិញនៅឡើយទេ យើងនឹងបន្តរាយការជូនលោកអ្នកអាននៅលេខក្រោយទៀត ៕

## តមកទំព័រទី ៧ ប្រទេសយូក្រែនដល់ណា...

រដ្ឋាភិបាលបណ្ដោះអាសន្នក្រុង ខ្សេវ នៃប្រទេសយូក្រែនដឹកនាំដោយសភាដែលមិនពេញចិត្តនឹងបំណងគ្រប់គ្រងដោយប្រទេសរុស្ស៊ីបានបើកការគាំទ្រពេញទំហឹងដល់ការតស៊ូបណ្ដេញទ័ពរុស្ស៊ីចេញពីទឹកដីខ្លួនរាប់ទាំងតំបន់គ្រីមេអានាភាគខាងត្បូងប្រទេសនោះផង ។

នៅសប្ដាហ៍ក្រោយសហភាពអឺរ៉ុបនឹងបើកការពិភាក្សាដាក់ទណ្ឌកម្មសេដ្ឋកិច្ចចំពោះប្រទេសរុស្ស៊ី ។ ទណ្ឌកម្មនោះនឹងមានពាក់រឹតដែលនឹងមានផលប៉ះពាល់ខ្លាំង ឬតិចទៅតាមការលូកដៃរបស់រុស្ស៊ីទៅលើការបោះឆ្នោតនៅយូក្រែននាសប្ដាហ៍នេះ។

បើនឹងមានការទទួលទណ្ឌកម្មប្រទេសរុស្ស៊ីអាចនឹងខាតប្រាក់ចំណូលនាំចូលពីអឺរ៉ុបជាង១៣០ប៊ីលិយុនអឺរ៉ូ ។

វ្លាឌីមា ពូទីន ប្រធានាធីបតីរុស្ស៊ីបានប្រកាសជាមុននៅសប្ដាហ៍នេះ នៅសាំង ភីទ័របើគ ថា "លទ្ធផលនៃការបោះឆ្នោតនៅ យូក្រែន បើទោះ ជាបានទៅខាងណាក៏ដោយប្រទេសរុស្ស៊ីនឹងចូលរួមសហការណ៍ស្មើភាពទាំងអស់" ។

នៅពេលយើងសរសេរអត្ថបទនេះការបោះឆ្នោតកំពុងតែប្រព្រឹត្តទៅដោយការស្ទង់មតិឱ្យជ័យជំនះទៅ ភិត្រូ ប៉ូរ៉ូឆឹងកូ ជាពាណិជ្ជករសហគ្រាស"ឆកូឡេត"ដ៏ធំដែលបានគាំទ្រក្រុមបាតុករប្រឆាំងនឹងវត្តមានទ័ពរុស្ស៊ីនៅយូក្រែននោះ ។

នៅមានអាថិកំបាំងច្រើនស្រដៀងគ្នានឹងរឿងស្រុកខ្មែរដែលនាំឱ្យយើងងាយស្រួលយល់ដោយសារការបោះឆ្នោតដ៏សំខាន់នោះ ដូច្នេះយើងនឹងបន្តជូនព័ត៌មាននៅពេលក្រោយ ៕

**បន្តពេលក្រោយទៀត**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំនាន់ចម្រែសំរួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បតិ៍ ទី២២ ខែឧសភា ឆ្នាំ២០១៤

# គណបក្សសង្គ្រោះជាតិបំពានបម្រាមគ.ជ.ប.នៅពេលអ្នកគាំទ្ររាប់ពាន់នាក់ហែក្បួនទូទាំង រាជធានីភ្នំពេញ

**ដោយ សេក ឧត្តម and Matt Blomberg | May 17, 2014**

គណបក្សសង្គ្រោះជាតិបានប្រើប្រាស់ថ្ងៃចុងក្រោយនៃយុទ្ធនាការឃោសនាបោះឆ្នោតក្រុមប្រឹក្សាកាលពីថ្ងៃសុក្រ ដើម្បីធ្វើការដង្ហែក្បួននយោបាយធំបំផុត ប្រចាំឆ្នាំដោយមានអ្នកគាំទ្ររហូតដល់ទៅ១៥.០០០នាក់ហែក្បួនពីតំបន់ជាយខាងត្បូងនៃរាជធានីភ្នំពេញមកកាន់វត្តភ្នំនៅភាគខាងជើង។

**តទៅទំព័រទី ២១**



លោក សម រង្ស៊ី និងលោក កឹម សុខា កំពុងដឹកនាំអ្នកគាំទ្ររាប់ពាន់នាក់ក្នុងការដង្ហែក្បួនឃោសនាក្នុងរាជធានីភ្នំពេញកាលពីម្សិលមិញ ។ *ស៊ីវ ចាន់ណា*

# អំពើហិង្សានៅវៀតណាមធ្វើឱ្យជនជាតិចិនភៀសខ្លួនចូលមកកម្ពុជា

*ដោយ អ៊ាង ម៉េងឡេង and សាំង សុផន្ទរិទ្ធ | May 16, 2014*

ជនជាតិចិនរាប់រយនាក់បាននាំគ្នាភៀសខ្លួនចេញពីប្រទេសវៀតណាមចូលមកប្រទេសកម្ពុជាបន្ទាប់ពីមានកុបកម្មតវ៉ាប្រឆាំងនឹងចិនដែលបានដាក់ឧបករណ៍បូមប្រេងនៅតំបន់សមុទ្រចិនខាងត្បូងដោយអះអាងថាជាកម្មសិទ្ធិរបស់ក្រុងហាណូយ ។

អំពើហិង្សានេះបានចាប់ផ្តើមកាលពីថ្ងៃអង្គារនៅភាគខាងត្បូងប្រទេសវៀតណាមដែលជាទីកុបកម្មកើតឡើងមនុស្សរាប់ពាន់នាក់បានសម្រុកចូលទៅក្នុងតំបន់ឧស្សាហកម្មដោយដុតរោងចក្ររបស់តៃវ៉ាន់ជាច្រើន ហើយបានរាលដាលដល់ភាគកណ្តាលប្រទេសនេះកាលពីម្សិលមិញ និងធ្វើឱ្យមានមនុស្សស្លាប់ជាង២០នាក់ព្រមទាំងរងរបួសរាប់សិបនាក់ទៀត ។

លោក ម៉ម យ៉យ អនុប្រធាននគរបាលអន្តោប្រវេសន៍នៅច្រកទ្វារព្រំដែនអន្តរជាតិបាវិតបានមានប្រសាសន៍ថា មានជនជាតិចិនជាង៦៤០នាក់ បានឆ្លងដែនកាលពីថ្ងៃពុធ គឺច្រើនជាងធម្មតាប្រាំមួយដង ។ លោកបានមានប្រសាសន៍ថា "មានជនជាតិចិនជាច្រើនឆ្លងព្រំដែនកាលពីម្សិលមិញ។ ជាធម្មតាមានមិនដល់១០០នាក់ផង ។ ប្រហែលជាពួកគេបារម្ភអំពីសន្តិសុខផ្ទាល់ខ្លួន និងការរាលដាលនៃកុបកម្មប្រឆាំងចិន"។ លោកបានមានប្រសាសន៍ថា ពួកគេភាគច្រើនធ្វើដំណើរតាមរថយន្តក្រុង ឬរថយន្តវ៉ែន ឬដើរឆ្លងកាត់ព្រំដែនតែម្តង ហើយបើយោងតាមឯកសារបញ្ជាក់អត្តសញ្ញាណរបស់ពួកគេ ពួកគេភាគច្រើនជាពាណិជ្ជករ ។

លោក យ៉យ បានមានប្រសាសន៍ថា ចំនួនអ្នកឆ្លងព្រំដែននេះបានត្រឡប់មកធម្មតាវិញ ហើយកាលពីម្សិលមិញ ហើយក្រុមមន្ត្រីនៅច្រកទ្វារព្រំដែនតូចៗចំនួនពីរបាននិយាយថាពួកគេមិនឃើញជនជាតិចិនឆ្លងព្រំដែនច្រើនទៀតទេ។ **តទៅទំព័រទី២០**

# គណបក្សប្រជាជនកម្ពុជាឈ្នះឆ្នោតក្រុមប្រឹក្សាដូចការរំពឹងទុក

*ដោយ : អ៊ាង ម៉េងឡេង និង អួន ភាព | May 19, 2014*

ការគណនាលទ្ធផលបណ្តោះអាសន្នដែល គ.ជ.ប. បានចេញកាលពីយប់មិញបង្ហាញថា



សមាជិកក្រុមប្រឹក្សា[illegible]កំពុងរង់ចាំលទ្ធផលនៃការរាប់សន្លឹកឆ្នោតក្រុមប្រឹក្សាកាលពីម្សិលមិញ ។ Sam Samry/The Cambodia Daily

គណបក្សប្រជាជនកម្ពុជាបានទទួល៨.៣៧៩សំឡេង (៧៣,១២ភាគរយ) និងគណបក្សសង្គ្រោះជាតិទទួលបាន២.៩៥៩សំឡេង (២៥,៨២ភាគរយ) នៅក្នុងស្រុកខណ្ឌទូទាំងប្រទេស ។

នៅក្នុងការបោះឆ្នោតជ្រើសរើសក្រុមប្រឹក្សានេះកាលពីឆ្នាំ២០០៩គណបក្សប្រជាជនកម្ពុជាទទួលបាន៨.៤៧០សំឡេង គណបក្ស សម រង្ស៊ី ទទួលបាន២.៣៣៥ សំឡេងទូទាំងស្រុកខណ្ឌ ប៉ុន្តែ

**តទៅទំព័រទី ១៥**

# CPP Sweeps Council Polls, As Expected

*By Eang Mengleng and Aun Pheap | May 19, 2014*

The ruling CPP coasted to a series of expected victories in Sunday's council elections as all but three of the country's 11,459 commune councilors voted for new administrative councils for the districts, provinces and municipalities they fall under.

Calculations of the provisional results released by the National Election Committee (NEC) last night showed that the CPP secured 8,379 votes (73.12 percent) to the CNRP's 2,959 (25.82 percent) across the country's districts.

In the 2009 council elections, the CPP won 8,470 votes to the Sam Rainsy Party's 2,335 votes across the districts, though the number of commune councilors in the country has risen between elections.

At a press conference in the afternoon, NEC Secretary-General Tep Nytha said the elections had cost a total of $1.7 million. Mao Sophearith, an NEC member, said that voting had taken place without a hitch and only three commune councilors had failed to vote.

"The election situation was smooth and there was not violence," he said.

Mr. Sophearith told reporters that the NEC is now calculating the number of seats the parties won in each district, provincial and municipal council. However, results for some districts and provinces were posted by Information Minister Khieu Kanharith on his Facebook page beginning Sunday afternoon.

Mr. Kanharith noted that his ruling CPP won 12 seats to the CNRP's nine on the Kompong Cham provincial council. In Siem Reap province, the CPP won 140 of the available district council positions to the CNRP's 37 and Funcinpec's two, according to Mr. Kanharith's figures.

Ballots for the vote were given only to the country's commune councilors, who had been elected by popular vote in June 2012. At that election, the CPP won 8,292 council seats, about 72 percent of the total, ensuring the ruling party's easy victories Sunday.

The two constituent parties of the opposition CNRP, which united as a single party in the month after the commune elections, had by contrast picked up only

**Continued to page 13**

ឌី ខែមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌី ខែមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បតិ៍ ទី២២ ខែឧសភា ឆ្នាំ២០១៤

Continued from page 12

## CPP Sweeps Council Polls, As Expected

a cumulative 2,955 councilors (25.79 percent).

Despite the gulf, leaders of the opposition had used the two-week election campaign leading up to the vote to warn the ruling party that its commune councilors were turning against it, and would vote CNRP come election day.

Opposition leader Sam Rainsy had throughout the campaign cited his party's surprise performance in the disputed 2013 national election as a symbol of changing attitudes he said councilors would replicate with their votes.

At a press conference Sunday afternoon at the CNRP's headquarters in Phnom Penh's Meanchey district, Mr. Rainsy claimed some small success.

"At least 30 to 40 people from the CPP voted for our party," he said.

Mr. Rainsy also claimed that the CNRP picked up two district council chief positions-one in Prey Veng province and another in Kompong Cham province-and said the CNRP accepted the results, despite some foul play.

"We have evidence and proof that the ruling party bought the votes from the candidates of the CNRP, paying up to $5,000 at least," he said. "They gave them motorbikes and promised to give cars to the CNRP candidates."

Prior to the 2009 council elections, Mr. Rainsy made a similar accusation, showing a video clip at a press conference of 30 commune councilors claiming to have been offered between $50 and $5,000 to vote for the CPP. After the elections, Mr. Rainsy's opposition party dismissed 200 of its commune councilors for voting for the CPP in the council elections.

Chheang Vun, a senior CPP lawmaker, on Sunday denied Mr. Rainsy's accusations.

"I don't think the CNRP increased their vote by around 30 to 40 from the Cambodian People's Party, and what Mr. Rainsy said is not true," Mr. Vun said.

"If the CNRP really increased its vote, it is probably because they got them from members of Funcinpec and the Nationalism Party," he said.

At voting booths across Phnom Penh in the morning, commune councilors said they were under no illusions about the likely results of the ballot.

One CNRP councilor, Nuoy Chinda, who was elected to the Chey Chumneah commune council in the June 2012 elections-and was voting for the Daun Penh district council and the Phnom Penh municipal council-noted simply that the CPP holds 62 commune councilors in Daun Penh to the CNRP's 27.

"I think these seats won't change and will remain stable because the CNRP will vote for the CNRP and the CPP will vote for the CPP," she said.

The ruling CPP also holds 510 of the 810 commune councilor positions across Phnom Penh, compared to the CNRP's cumulative 240.

Sak Setha, secretary of state at the Interior Ministry in charge of reform and decentralization, said Sunday that the new councils will have the responsibility of developing five-year development plans and creating and passing budgets with the appointed district and provincial governors.

The district, provincial and municipal councils are mandated by law to meet for the first time within two weeks after an election.

Mr. Setha said the Interior Ministry is beginning to specify additional mandates to the country's commune, district and provincial councils-such as the management of health centers and sanitation centers.

"From the last five years until now, the districts and communes have had a general mandate-they have the mandate to do anything according to their available resources," Mr. Setha explained.

"They also have the capacity to develop infrastructure such as roads between the communes within the district. The communes just do small projects like village-to-village roads, and small projects like that," he said.

The country's district councils will share a budget of $16 million, which will be doled out according to their geographical size and population, Mr. Setha explained. The councils of the 24 provinces and the municipality of Phnom Penh will share a budget of $50 million, shared similarly, he said.

(Additional reporting by Alex Willemyns)

mengleng@cambodiadaily.com, pheap@cambodiadaily.com

## Royal Oxen Predict Moderate Harvest in 2014

**By Ouch Sony and George Wright | May 19, 2014**

TAKHMAO CITY, Kandal province - After circling the field inside the sports stadium here three times, a pair of oxen, being watched by King Norodom Sihamoni and about 500 others on Saturday, were led to seven bowls containing rice, corn, sesame seeds, beans, freshly cut grass, water and rice wine.

One ox delved straight into the bowl containing beans, the other briefly sniffed the grass before settling on some corn. Both went on to sample a few mouthfuls of rice.

In the annual tradition of the Royal Plowing Ceremony, held for palace astrologers and Brahmin priests to foretell the outcome of the year's harvest, the oxen's culinary choice predicts a decent harvest of beans, corn and rice in 2014.

"The royal cows ate beans, corn and rice and so there will be a moderate yield this year," Brahmin priest Korng Ken announced over loudspeakers at the stadium, to the relief of spectators and more than 1,000 others gathered outside the stadium.

While still a widely followed cultural event, farmers and other spectators in Takhmao were divided on how much the oxen's taste would determine the agricultural prospects for the season ahead.

"The royal oxen ate beans, corn and rice so I think beans, corns and rice will have a good yield," said Nheuk Ny, 53, a farmer from Kandal province's Sa'ang district.

Chea Tang, 78, who said she has attended some 30 plowing ceremonies since the 1960s, was just relieved that the oxen weren't thirsty.

"If the royal oxen drank wine, the crop yield would not be good," Ms. Tang said. "From my experiences, if the royal oxen drinks water, there will be flooding."

A look to recent ceremonies suggests that the royal oxen have a particular penchant for corn and beans.

Last year, one ox nibbled on corn while the other settled on grass from the Kompong Cham football pitch, where the event was held. Corn and beans were also among the crops of choice in 2012 and 2010.



Two royal oxen eat from bowls during the annual Royal Plowing Ceremony in Takhmao City on Saturday. The animals ate beans, corn and rice, leading palace astrologers to predict a moderate crop yield. (Siv Channa)

Brahmin priest Soeng Piseth, one of three astrologers who was part of the procession, said the predictability of the cow's appetite was simply a reflection of the country's consistent agricultural output.

"Every year our country has no shortage of these crops like corn, bean and rice. We even export to overseas," he said. "So this result is pretty good."

However, Chim Kimhor, 24, a student at Kandal provincial teacher training college and one of the royal servants at Saturday's ceremony, said that farmers had bigger problems to worry about with global warming, and said they should take fate into their own hands.

"For me, I only believe 50 percent [in the plowing ceremony] because right now the weather in Cambodia, and around the world, is changing," Mr. Kimhor said. "It's not the same as the past, when there could be more accuracy.

"I would like to tell the people that this is just the ancient and traditional ceremony.

"We still believe the same as before, but we have to find methods to increase our agricultural yield through modern irrigation systems.

"Even in the past, Khmer kings also focused on the irrigation systems, so we do not have to rely only on the rain."

Continued from page 08

# Thai army declares martial...

"groups with bad intentions" risked escalating a six-month-long political crisis by threatening to overthrow the elected government.

"The royal Thai army intends to bring back peace and order to the beloved country of every Thai as soon as possible," said Prayuth in the statement, adding: "We intend to see the situation resolved quickly."

On Monday, the caretaker prime minister, Niwattumrong Boonsongpaisan, refused protesters' demands to step down. The army did not inform the caretaker government of its plan to declare martial law.

While troops were deployed along a number of roads in Bangkok and soldiers took back Government House and other buildings that had been occupied by anti-government protesters, the situation in the capital remained largely calm, with schools and businesses open and traffic flowing as usual.

The justice minister, Chaikasem Nitisiri, told the Associated Press that although the army had not consulted Niwattumrong about the declaration, the caretaker government was still running the country and the army was in charge of security.

"Security matters will be handled solely by the military, and whether the situation intensifies or is resolved is up to them," he said. "There is no cause to panic."

Thailand has been gripped by off-and-on political turmoil since 2006 when the then prime minister, Thaksin Shinawatra, was toppled by a military coup after being accused of corruption, abuse of power and disrespect for King Bhumibol Adulyadej.

The army, which is seen by many as sympathetic to anti-government protesters, has staged 11 coups since the end of absolute monarchy in 1932.

One anti-government protester, Wichada, who has been on the streets for nearly 200 days, welcomed the intervention. "We're very happy about the army's announcement because it means they are on our side," she told the Guardian from a protest camp next to Democracy Monument in Bangkok's old city.

Thitinan Pongsudhirak, a specialist on Thai affairs and associate professor at Chulalongkorn University in Bangkok, said martial law could break the impasse of the past six months. "The government is unable to govern, and the protesters' goals haven't been realised, so both sides now have to answer to martial law," he said.

Thitinan said the army had placed itself in a precarious position. "It now has to walk a tightrope, not too far in the government's camp, not too far in the protesters' camp. The army had better have a good game plan - the other sides knew what they wanted, but it's not clear if the army does."

The latest round of unrest started last November when anti-government protesters took to the streets to try to oust the then prime minister, Yingluck Shinawatra, Thaksin's sister. She dissolved the lower house of parliament in December in an attempt to ease the crisis, and then led a weakened, caretaker government with limited powers.

This month, the constitutional court ousted Yingluck and nine cabinet ministers for abuse of power, but the move has done little to resolve the political conflict that pits the rural poor majority, who support Yingluck, against her opponents who are largely drawn from the urban middle and upper class.

An overnight attack last week on the main anti-government protest site left three dead and more than 20 injured. It raised the death toll since November to 28 and drew a strong rebuke from the army chief.

Along with the declaration of martial law, the army issued an order suspending a number of television and radio stations, which have provided platforms for both political camps to air often aggressive rhetoric. At least 10 politically affiliated private TV stations from both sides stopped broadcasting - after armed soldiers entered and requested they do so.

The leader of the pro-government Red Shirt movement, Jatuporn Prompan, said his group could accept the imposition of martial law, but said they "won't tolerate a coup or other non-constitutional means" to grab power.

"We will see what the army wants," he said, warning that the undemocratic removal of the country's caretaker government "will never solve the country's crisis and will plunge Thailand deeper into trouble".

The US state department spokeswoman Jen Psaki said Washington was "very concerned about the deepening political crisis in Thailand". She said it urged "all parties to respect democratic principles, including respect for freedom of speech … We expect the army to honour its commitment to make this a temporary action to prevent violence, and to not undermine.

តមកពីទំព័រទី ១២ គណបក្សប្រជាជនកម្ពុជាឈ្នះឆ្នោតក្រុម...

ចំនួនសមាជិកក្រុមប្រឹក្សាឃុំសង្កាត់នៅទូទាំងប្រទេសបានកើនឡើង។

នៅឯសន្និសីទកាសែតនៅពេលរសៀល លោក ទេព នីថា អគ្គលេខាធិការ គ.ជ.ប.បានមានប្រសាសន៍ថា ការបោះឆ្នោតនេះបានចំណាយទឹកប្រាក់អស់១,៧លានដុល្លារ។

លោក ម៉ៅ សុភារិទ្ធ សមាជិក គ.ជ.ប. បាននិយាយថា ការបោះឆ្នោតនេះប្រព្រឹត្តទៅដោយរលូន ហើយមានសមាជិកក្រុមប្រឹក្សាឃុំ-សង្កាត់តែបីនាក់ប៉ុណ្ណោះមិនបានទៅបោះឆ្នោត។ លោកបាននិយាយថា "ស្ថានភាពពេលបោះឆ្នោតមានភាពរលូន និងគ្មានអំពើហិង្សា"។ លោក សុភារិទ្ធ បានប្រាប់អ្នកយកព័ត៌មានថា គ.ជ.ប. កំពុងគណនាចំនួនអាសនៈដែលគណបក្សនីមួយៗទទួលបាននៅក្នុងស្រុក ខណ្ឌរាជធានី ខេត្តក្រុងនីមួយៗ។

ទោះជាយ៉ាងណាលទ្ធផលសម្រាប់ស្រុក ខណ្ឌ និងខេត្តក្រុងមួយចំនួនត្រូវបានលោក ខៀវ កាញារីទ្ធ រដ្ឋមន្ត្រីក្រសួងព័ត៌មានបានសរសេរតាមទំព័រហ្វេសប៊ុករបស់លោកនៅពេលរសៀលម្សិលមិញ។

លោក ខៀវ កាញារីទ្ធ បានបញ្ជាក់ថា នៅក្នុងក្រុមប្រឹក្សាខេត្តកំពង់ចាមគណបក្សប្រជាជនកម្ពុជារបស់លោកទទួលបាន១២អាសនៈ ហើយគណបក្សសង្គ្រោះជាតិទទួលបាន៩អាសនៈ។ យោងតាមតួលេខលោក ខៀវ កាញារីទ្ធ បង្ហាញថា នៅក្នុងខេត្តសៀមរាបគណបក្សប្រជាជនកម្ពុជាទទួលបានតួនាទីក្រុមប្រឹក្សាស្រុក ខណ្ឌចំនួន ១៤០ និងគណបក្សសង្គ្រោះជាតិទទួលបាន៣៧អាសនៈ ហើយគណបក្សហ្វ៊ុនស៊ិនប៉ិចទទួលបាន ២អាសនៈ។

នៅក្នុងការបោះឆ្នោតនេះមានតែក្រុមប្រឹក្សាឃុំ-សង្កាត់ដែលបានជាប់ឆ្នោតនៅក្នុងការបោះឆ្នោតកាលពីខែមិថុនា ឆ្នាំ២០១២ប៉ុណ្ណោះមានសិទ្ធិបោះឆ្នោត។ នៅក្នុងការបោះឆ្នោតឃុំ-សង្កាត់នោះគណបក្សប្រជាជនកម្ពុជាទទួលបាន៨.២៩២អាសនៈ គឺប្រហែល៧២ភាគរយនៃអាសនៈទាំងអស់ ហើយអាសនៈទាំងនេះធ្វើឱ្យគណបក្សកាន់អំណាចទទួលបានជ័យជម្នះយ៉ាងស្រួលនៅក្នុងការបោះឆ្នោតកាលពីម្សិលមិញ។

គណបក្សពីរដែលបានរួមបញ្ចូលគ្នាជាគណបក្សតែមួយ គឺគណបក្សសង្គ្រោះជាតិក្នុងរយៈពេលមួយខែក្រោយការបោះឆ្នោតក្រុមប្រឹក្សាឃុំ-សង្កាត់នោះ បានទទួលតំណែងក្រុមប្រឹក្សាឃុំ-សង្កាត់កើនឡើង គឺចំនួន២.៩៥៥(២៥,៧៩ភាគរយ)។

ថ្វីបើមានភាពខុសគ្នាច្រើនបែបនេះ ក៏ដោយក៏មេដឹកនាំគណបក្សប្រឆាំងបានប្រើប្រាស់យុទ្ធនាការឃោសនាបោះឆ្នោតរយៈពេលពីរសប្តាហ៍នៅមុនការបោះឆ្នោតនេះ ដើម្បីព្រមានគណបក្សកាន់អំណាចថា សមាជិកក្រុមប្រឹក្សាឃុំ-សង្កាត់របស់ខ្លួនកំពុងតែប្រឆាំងនឹងគណបក្សកាន់អំណាចមួយនេះ ហើយនឹងបោះឆ្នោតឱ្យគណបក្សសង្គ្រោះជាតិនៅថ្ងៃបោះឆ្នោត។

នៅពេលធ្វើយុទ្ធនាការឃោសនាបោះឆ្នោតនេះលោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំងបានចាត់ទុកការរីកចម្រើនគួរឱ្យភ្ញាក់ផ្អើលរបស់គណបក្សលោកនៅក្នុងការបោះឆ្នោតជាតិឆ្នាំ ២០១៣ដែលកំពុងមានជម្លោះនេះថា ជានិមិត្តរូបនៃការផ្លាស់ប្តូរឥរិយាបថដែលលោកបានមានប្រសាសន៍ថា ក្រុមប្រឹក្សាឃុំ-សង្កាត់នឹងធ្វើតាមរយៈការបោះឆ្នោតនេះ។

នៅឯសន្និសីទកាសែតកាលពីរសៀលម្សិលមិញនៅទីស្នាក់ការគណបក្សសង្គ្រោះជាតិក្នុងខណ្ឌមានជ័យលោក សម រង្ស៊ី បានអះអាងថា គណបក្សលោកបានទទួលជោគជ័យខ្លះៗ។ លោកបានមានប្រសាសន៍ថា "យ៉ាងហោចណាស់មានមនុស្សមកពីគណបក្សប្រជាជនកម្ពុជាពី ៣០ទៅ៤០នាក់បានបោះឆ្នោតឱ្យគណបក្សរបស់យើង"។

លោក សម រង្ស៊ី ក៏បានអះអាងដែរថា គណបក្សសង្គ្រោះជាតិបានទទួលតំណែងប្រធានក្រុមប្រឹក្សាស្រុកចំនួនពីរ គឺមួយនៅក្នុងខេត្តព្រៃវែង និងមួយទៀតនៅក្នុងខេត្តកំពង់ចាម ហើយលោកបានមានប្រសាសន៍ថា គណបក្សសង្គ្រោះជាតិទទួលយកលទ្ធផលនេះ ថ្វីបើមានបញ្ហាខ្លះៗក៏ដោយ។ លោកបានមានប្រសាសន៍ថា "យើងមានភស្តុតាងបង្ហាញថា គណបក្សកាន់អំណាចបានចំណាយលុយយ៉ាងតិច៥.០០០ដុល្លារ ដើម្បីទិញសន្លឹកឆ្នោតពីបេក្ខជនរបស់គណបក្សសង្គ្រោះជាតិ។ ពួកគេបានឱ្យម៉ូតូ និងសន្យាឱ្យរថយន្តទៅបេក្ខជនគណបក្សសង្គ្រោះជាតិ"។

នៅមុនការបោះឆ្នោតក្រុមប្រឹក្សានេះកាលពីឆ្នាំ២០០៩លោក សម រង្ស៊ី បានធ្វើការចោទប្រកាន់ស្រដៀងគ្នានេះ ដោយបានបង្ហាញវីដេអូឃ្លីបមួយនៅឯសន្និសីទកាសែតអំពីក្រុមប្រឹក្សាឃុំ-សង្កាត់ចំនួន៣០នាក់ដែលអះអាងថា ត្រូវបានគេទិញចន្លោះពី៥០ដុល្លារទៅ៥.០០០ដុល្លារ ដើម្បីបោះឆ្នោតឱ្យគណបក្សប្រជាជនកម្ពុជា។ ក្រោយការបោះឆ្នោតនោះ គណបក្សប្រឆាំងរបស់លោក សម រង្ស៊ី បានបដិសេធថា សមាជិកក្រុមប្រឹក្សាឃុំ-សង្កាត់ចំនួន២០០នាក់ របស់លោកមិនបានបោះឆ្នោតឱ្យគណបក្សប្រជាជនកម្ពុជានៅក្នុងការបោះឆ្នោតក្រុមប្រឹក្សា ស្រុក ខណ្ឌនោះទេ។

លោក ឈាង វុន តំណាងរាស្ត្រ ជាន់ខ្ពស់គណបក្សប្រជាជនកម្ពុជាបានបដិសេធការចោទប្រកាន់របស់លោក សម រង្ស៊ី កាលពីម្សិលមិញ។ លោក ឈាង វុន បាននិយាយថា "ខ្ញុំគិតថា គណបក្សសង្គ្រោះជាតិមិនបានកើនសំឡេងឆ្នោតពី៣០ទៅ៤០ពីគណបក្សប្រជាជនកម្ពុជាទេ ហើយអ្វីដែលលោក សម រង្ស៊ី និយាយ គឺមិនពិតទេ។ ប្រសិនបើគណបក្សសង្គ្រោះជាតិកើនសំឡេងឆ្នោតរបស់ខ្លួនពិតមែននោះ ប្រហែលជាដោយសារពួកគេបានទទួលពីសមាជិកគណបក្សហ្វ៊ុនស៊ិនប៉ិច និងគណបក្សជាតិនិយម"។

នៅឯបន្ទប់បោះឆ្នោតនៅទូទាំងទីក្រុងភ្នំពេញនៅពេលព្រឹកម្សិលមិញក្រុមប្រឹក្សាសង្កាត់បាននិយាយថា ពួកគាត់មិនមានការសង្ស័យអំពីលទ្ធផលនៃការបោះឆ្នោតនេះទេ។

អ្នកស្រីណយ ចិន្តា សមាជិកក្រុមប្រឹក្សាសង្កាត់គណបក្សសង្គ្រោះជាតិដែលបានជាប់ឆ្នោតនៅក្នុងសង្កាត់ជ័យជម្នះ ក្នុងការបោះឆ្នោតកាលពីខែមិថុនា ឆ្នាំ២០១២ និងកំពុងបោះឆ្នោតជ្រើសរើសក្រុមប្រឹក្សាខណ្ឌដូនពេញ និងក្រុមប្រឹក្សារាជធានីភ្នំពេញ គ្រាន់តែបានបញ្ជាក់ថា គណបក្សប្រជាជនកម្ពុជាមានសមាជិកក្រុមប្រឹក្សាសង្កាត់ចំនួន៦២រូបក្នុងខណ្ឌដូនពេញ និងសមាជិកក្រុមប្រឹក្សាសង្កាត់របស់គណបក្សសង្គ្រោះជាតិនៅក្នុងខណ្ឌនេះមាន២៧នាក់។

អ្នកស្រីបាននិយាយថា "ខ្ញុំគិតថា អាសនៈទាំងនេះមិនផ្លាស់ប្តូរទេ ពីព្រោះគណបក្សសង្គ្រោះជាតិនឹងបោះឆ្នោតឱ្យគណបក្សសង្គ្រោះជាតិ ហើយគណបក្សប្រជាជនកម្ពុជានឹងបោះឆ្នោតឱ្យគណបក្សប្រជាជនកម្ពុជា"។

គណបក្សប្រជាជនកម្ពុជាក៏មានតំណែងជាក្រុមប្រឹក្សាសង្កាត់ចំនួន៥១០នាក់ផងដែរ ក្នុងចំណោមសមាជិកក្រុមប្រឹក្សាសង្កាត់ទាំង៨១០នាក់នៅក្នុងទីក្រុងភ្នំពេញ ចំណែកឯគណបក្សសង្គ្រោះជាតិមានចំនួន២៤០។

លោក សក់ សេដ្ឋា រដ្ឋលេខាធិការក្រសួងមហាផ្ទៃ ដែលទទួលបន្ទុកផ្នែកកែទម្រង់ និងវិមជ្ឈការបាននិយាយកាលពីម្សិលមិញថា ក្រុមប្រឹក្សាថ្មីមានការទទួលខុសត្រូវលើការអនុវត្តផែនការអភិវឌ្ឍន៍រយៈពេលប្រាំឆ្នាំ និងលើការបង្កើត និងអនុម័តថវិកាជាមួយក្រុមសមាជិកក្រុមប្រឹក្សាស្រុកខណ្ឌ និងខេត្ត ក្រុង ដែលត្រូវបានតែងតាំង។

បើតាមច្បាប់សមាជិកក្រុមប្រឹក្សារាជធានី ខេត្ត ក្រុង ស្រុក ខណ្ឌ ត្រូវជួបប្រជុំជាលើកដំបូងក្នុងរយៈពេលពីរសប្តាហ៍ក្រោយការបោះឆ្នោត។

លោក សេដ្ឋា បាននិយាយថា ក្រសួងមហាផ្ទៃនឹងបញ្ជាក់ពីអំណាចបន្ថែមទៀតរបស់ក្រុមប្រឹក្សាឃុំ-សង្កាត់ ស្រុក ខណ្ឌ និង ខេត្ត ក្រុងនៅទូទាំងប្រទេស **តទៅទំព័រទី ២២**

តមកពីទំព័រទី ១០ សារព័ត៌មានខ្មែរក្នុងដំណើរកំសាន្ត...

(Universal City) ដែលអ្នកទេសចរជាច្រើនចូលចិត្តថតរូបនៅទីនោះ។

មុនចូលក្នុងមជ្ឈមណ្ឌលអ្នកទេសចរត្រូវទិញសំបុត្រចូលទស្សនា ហើយតម្លៃសំបុត្រធម្មតាសម្រាប់ការមើល ឬចូលលេងក្នុងមួយថ្ងៃគឺ $៩២។ ការទិញសំបុត្រត្រូវបន្តរង់ចាំដោយប្រើពេលគួរសមទោះក្នុងថ្ងៃធម្មតាក៏ដោយ។ លុះទិញសំបុត្ររួចរាល់ហើយ យើងចូលទៅកាន់មជ្ឈមណ្ឌលនឹងចាប់ផ្តើមទទួលអារម្មណ៍រីករាយនៅពេលបានឃើញទស្សនីយភាពស្អាតៗប្លែកៗទាក់ភ្នែក និងបទពិសោធន៍ថ្មីៗ។ ក្នុងមជ្ឈមណ្ឌលកំសាន្តនេះ ផ្តល់ដល់អ្នកធ្វើទស្សនកិច្ចនូវការសម្តែងការចូលទស្សនាភាពយន្តហូរឪផ្ទះខ្មោចសិប្បនិម្មិតដែលរន្ធត់ព្រឺព្រួចការថតរូបជាមួយតុក្កតា និងការទិញវត្ថុអនុស្សាវរីយ៍។ សកម្មភាពនានាក្នុងរយៈពេលមួយថ្ងៃរៀបរាប់ជាសង្ខេបនៃការសម្តែង គឺពិភពទឹក (Water World) ផ្ទះខ្មោចសិប្បនិម្មិត (House of Horror) ការសម្តែងសត្វដែលត្រូវបានគេបង្វឹកសម្រាប់ទៅសម្តែងក្នុងកុនហូលីវូដ (Animal Show) ចម្រៀងសម្តែងដោយក្រុងប្លូប្រាដឺ (Blue Brothers) ការថតរូបជាមួយតុក្កតា មីនៀន (Minion Mayhem) និងការទិញវត្ថុអនុស្សាវរីយ៍ចម្លាក់រូបអស្ការរបស់ហូលីវូដ។



បទពិសោធន៍នៃដំណើរកំសាន្តខាងលើបានធ្វើឱ្យយើងទទួលបាននូវចក្ខុវិស័យថ្មីៗមើលឃើញពីភាពរីកចំរើនខាងវិស័យផ្សព្វផ្សាយព័ត៌មាន និងភាពយន្តនៃប្រទេសនេះ និងមើលឃើញពី









ភាពស៊ីវិល័យនៃជីវភាពរបស់នៅរបស់ប្រជាជននៃប្រទេសនេះ។ សារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិកសង្ឃឹមថា លោកអ្នកអានទទួលបានអារម្មណ៍រីករាយ និងបទពិសោធន៍ល្អៗពីអត្ថបទដំណើរកំសាន្តនេះដូចយើងខ្ញុំដែរ ហើយយើងជឿជាក់ថា លោកអ្នកនឹងអាចលៃលកពេលវេលាផ្តល់ដល់ខ្លួនអ្នក និងក្រុមគ្រួសារ ក៏ដូចជាមនុស្សជាទីស្រឡាញ់របស់អ្នកនូវពេលវេលាកំសាន្តជាមួយគ្នាបន្ទាប់ពីការបំពេញការងារដ៏មមាញឹកក្នុងជីវភាពប្រចាំថ្ងៃ ៕

## មកទំព័រទី ៤ កម្មវិធីប្រលងបវរកញ្ញាអាស៊ី.....

អ្នកនាងសង្ឃឹមថា កម្មវិធីនេះនឹងមានភាព
ច្រើន មានដៃគូស្ថាប័ន និងអង្គការជាតិ និង
ជាតិផ្នែកនេះបានសហការកាន់តែផុសផុលជាង
អាស៊ីអាមេរិកាំងនូវសម្លេងរឹងមាំក្នុងសង្គមអាមេរិក
និងអន្តរជាតិ។

កាលវិភាគកាលបរិច្ឆេទឈប់ទទួលពាក្យ



ហើយរំពឹងថា កម្មវិធីនេះនឹងក្លាយជាកម្មវិធី
មួយក្នុងសហរដ្ឋអាមេរិកក្នុងការផ្តល់ដល់នារី
និងរបៀបវារៈនៃកម្មវិធីមានដូចខាងក្រោម :

# កម្មវិធីប្រឡងបវរកញ្ញាអាស៊ី អាមេរិកាំងប្រចាំឆ្នាំ ២០១៤

## 014 Pacific Miss Asian American Beauty Pageant Schedule

**April 12** Opening Press Conference
am - 1pm

**une 30** Deadline for contestants application

**uly 13** Orientation for all contestants
*pm - 4pm Rockville Hilton Hotel*

**TBD** 2014 Pacific Miss Asian
2pm - 6pm American Beauty pageant first round competition and PCI Pageant EXPO *Rockville Hilton*

**uly** Final 15 contestants Photo
*71pm - 5pm* Taken Day
*Rockville Hilton Hotel*

**August 8 & August 10** Final 15 contestants
*pm - 5pm* image consultant training (Hair, make-up, catwalk, posture and speech training)
*Rock ville Hilton Hotel*

**August 23** Final 15 contestants press
*am - 1pm* conference Rockville
*Hilton Hotel*

**August 30 & August 31** Final 15 contestants pageant activities

**September 6, September 13** Final 15
*1pm - 5pm* Dance RehearsalRockville
*Hilton Hotel*

**October 3** Final Event
*Strathmore Music Center*

**October 12** Celebration Party

រង្វាន់មានជាប្រាក់សុទ្ធវត្ថុមានតម្លៃ និង
អាហារូបករណ៍

Cash, Prizes & Scholarship Awards

ឆ្នាំនេះរង្វាន់នាឡិកាពេជ្រមួយគ្រឿង
តម្លៃ $៧.000 សម្រាប់ជ័យលាភីលេខ១

Winner - $5,000, Chouette Watch, Christian Dior Cosmetic Gift & More... 1st Runner Up - $3,000, Christian Dior Cosmetic Gift2nd Runner Up - $2,000, Christian Dior Cosmetic GiftBest Dress Award - $500Best Posture Award - $500 Best Talent Award - $500Most Popular Award - $500

Winner will participate inMiss Asia Pacific World Pageant

Continued from page 04

## 2014 PACIFIC MISS ASIAN AMERICAN...

www.pciculture.com/asianpageant 2014.

Another key purpose of the pageant is to foster community development, cultural exchange, business and economic opportunity and tourism between the United States and Asian countries.Therefore, various Asian American leaders were honored during the press conference for their commitment, service and dedication to the community. The honorees included:

- Shirley Luu, Executive Field Chairman, First Financial Security, Inc.
- Josephine Jan, President, Total AV
- Ken Lee, Owner, China Garden Restaurant







- Art Ping Lee, Elder of CCBA
- Doan HuuDinh, Leader of the Vietnamese Community
- Grace Valera, Executive Director, Migrant Heritage Commission

About Pacific Culture International (PCI):

PCI organizes, promotes, and supports diverse cultural activities throughout the Washington, DC metropolitan area. Our goal is to promote unity, an exchange of ideas, and improved understanding between people from diverse cultures. PCI works with local and international businesses to create activities that feature a variety of regional and international cultures. Our events support our communities, promote our businesses and shine a spotlight on our wonderful culture. For more information, visit: www.pciculture.com.

## មកទំព័រទី ១១ ព័ត៌មាននៃការប្រណាំងឡានជំនាន់....

រដ្ឋម៉ាសាឈូសេតនៅថ្ងៃសៅរ៍ ទី២១
ថុនា ឆ្នាំ២០១៤ វេលាម៉ោង៤ និង៤៥
រសៀល នៅចំនុចផ្លូវ មុីដដលស្រ្ទីត ក្នុង
រជុំជននៃដោនថោនឡូវែលដែលមាន
កអភិបាលក្រុងឡូវែល រ៉ដនី អេលៀត
dney Elliot, Mayor of City of Lowell) និងនាយកប្រតិបត្តិនៃស៊ីវីប៊ី អ្នកស្រី ដេប ប៊ីលែនជឺ(Deb Belanger, Executive Director of the Greater Merrimack Valley Conventional and Visitors Bureau)។

កម្មវិធីនេះនឹងមានអ្នកចូលរួមប្រមាណ
៧៥០០នាក់ដែលអញ្ជើញមកពីគ្រប់ទិសទី
នៃតំបន់ញូអ៊ីងលែនអាចចូលរួមសប្បាយ
រីករាយថតរូបជាមួយឡានសម័យមុនៗ និង
តារាប្រណាំងឡានផងដែរ។ កម្មវិធីនេះក៏
អាចចាត់ទុកថា ជាបទពិសោធន៍ថ្មីនៃប្រជា
ជនដែលរស់នៅក្នុងសហគមន៍ឡូវែលនេះ
ផងដែរ៕



# រមណីយដ្ឋាន ២កន្លែងនៅខេត្តកំពត មានអ្នកទេសចរ៥៦០១៥នាក់

**ខេត្តកំពត :** អំឡុងពេលនៃពិធីបុណ្យចូលឆ្នាំខ្មែរកន្លងទៅនៅខេត្តកំពតមានរមណីយដ្ឋានធម្មជាតិចំនួន២គឺឋានសួគិភ្នំបូកគោ និងទឹកឈូ មានភ្ញៀវទេសចរជាតិ អន្តរជាតិទៅលេងកម្សាន្តចំនួន៥៦០៥១នាក់ដែលតួលេខនេះមានការកើនឡើងច្រើនគួរឱ្យកត់សម្គាល់។

លោក សយ ស៊ីណុល ប្រធានមន្ទីរទេស-ចរណ៍ខេត្តកំពតមានប្រសាសន៍ថា នៅខេត្តកំពតក្នុងឱកាសឈប់សម្រាកបុណ្យចូលឆ្នាំថ្មីនេះរមណីយដ្ឋានដែលលេចធ្លោ និងទទួលបានកំណើនភ្ញៀវទេសចរច្រើនជាងគេនោះ គឺមានរមណីយដ្ឋានឋានសួគិភ្នំបូកគោ និងទឹកឈូ។ ឋានសួគិភ្នំបូកគោរយៈពេល៣ថ្ងៃមានអ្នកទេសចរជាតិចំនួន៤១១១៨នាក់។ និងបរទេសចំនួន១១៤៣នាក់ ចំណែកឯទឹកឈូវិញមានភ្ញៀវទេសចរជាតិចំនួន១៣៧០០នាក់ និងបរទេស៩០នាក់ ដោយឡែកចំពោះតួលេខភ្ញៀវនៅតាមតំបន់រមណីយដ្ឋានទូទាំងខេត្តរយៈពេល៣ថ្ងៃបុណ្យចូលឆ្នាំថ្មីនេះមានចំនួនសរុប៧១១០៤នាក់ ក្នុងនោះមានភ្ញៀវបរទេសចំនួន១៣៧៦នាក់ បើប្រៀបធៀបនឹងឆ្នាំកន្លងទៅមានការកើនឡើងច្រើន។

ចាប់តាំងពីឋានសួគិភ្នំបូកគោត្រូវបានធ្វើការអភិវឌ្ឍដោយក្រុមហ៊ុនវិនិយោគក្នុងស្រុកសុខាអូតែលមានផ្លូវអ៊ុតកៅស៊ូឡើងទៅកាន់កំពូលភ្នំមានភោជនីយដ្ឋាន និងសណ្ឋាគារសុទ្ធតែលំដាប់ផ្កាយប្រកបទៅដោយការរៀបចំតាមស្តង់ដារក្រោមការបោះទុនប្រមាណ១០០០លានដុល្លារនោះ ពីមួយថ្ងៃទៅមួយថ្ងៃ ពិសេសថ្ងៃឈប់សម្រាក ឬក៏បុណ្យជាតិបុណ្យប្រពៃណីខ្មែរផ្សេងៗគឺតែងតែមានភ្ញៀវទេសចរជាតិ និងអន្តរជាតិរាប់ពាន់នាក់ឡើងទៅទស្សនាភាពអស្ចារ្យនៅលើឋានសួគិភ្នំបូកគោដោយថ្ងៃខ្លះស្ទើរតែរកកន្លែងសម្រាប់ចតយានយន្តរបស់ភ្ញៀវទេសចរមិនបានទៀតផង។

តាមការលើកឡើងរបស់លោក សយ ស៊ីណុល ឱ្យដឹងទៀតថា ឋានសួគិភ្នំបូកគោមានចម្ងាយប្រមាណ១២គីឡូម៉ែត្រនៅភាគខាងលិច



នៃក្រុងកំពតដែលជាតំបន់បុរាណដ៏គួរឱ្យចាប់អារម្មណ៍ ហើយមានទេសភាពស្ងប់ស្ងាត់ និងស្ថិតនៅក្នុងតំបន់ដែលហ៊ុមព័ទ្ធដោយឆ្នេរសមុទ្រយ៉ាងស្រស់ស្អាត។ ភ្នំបូកគោមានរយៈកម្ពស់១០៧៥ម៉ែត្រពីផ្ទៃទឹកសមុទ្រ ហើយមានអាកាសធាតុត្រជាក់ជាពិសេសលើកំពូលភ្នំយើងអាចទស្សនាទិដ្ឋភាពដ៏ស្រស់ស្អាតនៃឈូងសមុទ្រថៃបានថែមទៀតផង ដោយសារតែមានទេសភាពស្អាតលម្អដោយរុក្ខជាតិ និងសត្វបក្សាបក្សីរួមជាមួយនឹងខ្យល់អាកាសត្រជាក់ជាប់ជានិច្ចនោះបានធ្វើឱ្យភ្នំបូកគោក្លាយជាតំបន់កម្សាន្តដ៏សំខាន់នាសម័យអាណានិគមបារាំងក្នុងអំឡុងឆ្នាំ១៩២០ ហើយព្រះមហាក្សត្រព្រះបាទមុនីវង្សព្រះអង្គទ្រង់សព្វព្រះរាជហឫទ័យយ៉ាងខ្លាំងនូវទិដ្ឋភាពដ៏ស្រស់ត្រកាលនៃភ្នំបូកគោព្រះអង្គក៏បានកសាងព្រះរាជដំណាក់សម្រាប់លំហែកាយនាវដូវក្តៅដែលស្ថិតនៅចង្កេះភ្នំបូកគោទៀតផង។

លោក សយ ស៊ីណុល បញ្ជាក់ថា ឋានសួគិបូកគោជាតំបន់រមណីយដ្ឋានខ្មែរទំនើបមួយដែលស្ថិតនៅលើខ្ពង់រាបនៃភ្នំប្រវត្តិសាស្ត្របូកគោព្រមទាំងជាឋានសួគិកម្សាន្តដ៏សំខាន់ដែលធ្លាប់ជាកន្លែងកម្សាន្តសម្រាប់រាជវង្សស្តេច និងត្រកូលអភិជន។

ឋានសួគិភ្នំបូកគោជារមណីយដ្ឋានភ្នំតែមួយគត់ដែលប្រជុំទៅដោយកន្លែងកម្សាន្តដ៏អស្ចារ្យក្នុងភូមិភាគដងទន្លេមេគង្គ។ អ្វីដែលគួរឱ្យចាប់អារម្មណ៍បំផុតនោះ គឺការអភិវឌ្ឍនៃការសាងសង់ និងការបង្កើតនូវទីកម្សាន្តផ្សេងៗជាច្រើននៅលើផ្ទៃដី៦០៣៨៨ម៉ែត្រការ៉េលើកម្ពស់១០៧៥ម៉ែត្រពីផ្ទៃទឹកសមុទ្ររួមមានសណ្ឋាគារមានបន្ទប់សរុប៤១៨បន្ទប់ និងវីឡាដ៏ទំនើបដែលរៀបចំតុបតែងតាមរចនាប័ទ្មបែបខ្មែរសម័យទំនើបដើម្បីធ្វើឱ្យភ្ញៀវទាំងអស់ទទួលបានភាពរីករាយ និងភាពកក់ក្តៅក្នុងការសម្រាកលំហែកាយ និងមានភោជនីយដ្ឋានចំនួន១២ ដែលមានមុខម្ហូបប្លែកៗពីភ្នាម្ហូបខ្មែរ វៀតណាម ជប៉ុន ចិន អ៊ីតាលី ព្រមទាំងមុខម្ហូបផ្សេងៗជាច្រើនទៀតប្រកបដោយការច្នៃប្រឌិតជាមួយនឹងភេសជ្ជៈដ៏ឆ្ងាញ់ពិសាបន្ថែមជាមួយនឹងការកម្សាន្តជាអន្តរ-ជាតិ និងការលេងល្បែងកម្សាន្តផ្សេងៗជាច្រើនទៀត។ មានបន្ទប់ប្រជុំធំទូលាយទទួលរៀបចំកម្មវិធី ជប់លៀង ម្ហូបអាហារ និងកន្លែង ប្រគំតន្ត្រីដែលអាចទទួលអ្នកទស្សនារហូតដល់ទៅ៦០០០នាក់ប្រកបដោយភាពរីករាយបំផុត។

មានកន្លែងកម្សាន្តពេលរាត្រីបន្ទប់ខារ៉ាអូខេបំពាក់ដោយបច្ចេកវិទ្យាទំនើបជាមួយនឹងការរាំលេងសប្បាយ **តទៅទំព័រទី ២៤**

សាគូ សាម៉ុត

# ប្រវត្តិសាស្ត្រកម្ពុជា និង ឥស្សរជន ខ្មែរ

## ប្រវត្តិសាស្ត្រ ប្រទេសកម្ពុជា

១- កម្ពុជា នៅសម័យដើម ៖ ឥទ្ធិពល ឥណ្ឌា និង កម្ពុជា ◆ នគរភ្នំ មន ◆ សៀម ◆ ចាម្ប៉ា ◆ ស៊ូរិយាវរ្ម័នទី២ ◆ ជ័យវរ្ម័នទី៧

២- សៀម និង ការបាត់បង់ អាណាខេត្តខ្មែរ ខាងលិច ◆ កុម្មុយនិស្តឥណ្ឌូចិន កុម្មុយនិស្ត និង កម្ពុជា ◆ ការបាត់បង់ ទឹកដីកម្ពុជាក្រោម

៣- ជំណាន់ រាស្ត្រខ្មែរ ◆ ការគ្រប់គ្រង រដ្ឋបាល ◆ ជំរឿនប្រជាជន លទ្ធផល នៃ ការបោះឆ្នោតជាតិ ◆ កាលប្បវត្តិវិជ្ជា ឆ្នាំ ១៨៣៥-២០១២

## ប្រវត្តិរូប ឥស្សរជន ខ្មែរ (១០៧ នាក់)

អូចឌួង - ប៊ីច ឆាយណាង - ប៊ុន ចន្ទម៉ុល - ចន្ទរាជា - ចាន់ ណាក - ចាន់យូរ៉ាន់ - ចៅ សែនកុសល - ចៅ សេង - ចៅ សេងអួរ - ជា ស៊ីម - ឈាន វ៉ម - ចេង ហេង - ឆេង ផុន - ជួន ណាត - ឌិត ខៀ - ឈូក ម៉េងម៉ៅ - ជាប ឈួន - ឌុក រ៉ាស៊ី - ឌីផុន ប៉ូលីន - ហ៊ែល ស៊ុមផា - ហែម ចៀវ - ហេង សំរិន - ហ៊ូ យន់ - ហ៊ុយ នឹម - ហង្ស ធុនហាក់ - ហ៊ុន សែន - ហូ តុងលិប - ហ៊ុយ កន្ថុល - អ៊ិន តាំ - អៀង សារី - អៀវ កើស - ស្ដេចកន - កាំង ហ្គេកអ៊ាវ ហៅ ឌុច - កឹក ប៊ុនឈួង - គឹម សុខា - កេង វ៉ាន់សាក់ - ខៀវ សំផន - ខៀវ ធីរិទ្ធ - ឃឹង ហុកឌី - ឃឹម ទិត - ឃិន សុខ - តែវៀ ឌុយ - ឡេងង៉ែត - ឡុង សៀម - លន់ នល់ - លន់ ណុន - ឡុង បូរេត - ឡុង ប៊ុនរ៉ត ហៅ នួន ជា - ញ៉ុក ថែម - នរោត្តម - នរោត្តម យុគន្ធរ - នរោត្តម សុរាម្រិត - នរោត្តម សីហនុ - នរោត្តម សីហមុនី - នរោត្តម ចន្ទរង្សី - នរោត្តម រណឫទ្ធិ - នរោត្តម កន្តុល - ញ៉ឹក ជូឡុង - ញ៉ឹក ប៊ុនឆៃ - នូ ហាច - នូ កន - នួន ឃឿន - សុតន្តប្រី ជា តិន្ទ - អ៊ុម ឈាងស៊ុន - ប៉ាង ខាត់ - ប៉ែន សុវណ្ណ - ប៉ែន នុត - ផូ ព្រឿង - ភួង គុន - ប៉ុល ពត (សាឡុតស) - ពៅ សាចរស - រស់ ចន្ត្រាបុត្រ - រឹម គីន - សារិន ឆាក - សាន យុន - សាគូ សាម៉ុត - សម សារី - សម រង្ស៊ី - ស៊ីសុវត្ថិ - ស៊ីសុវត្ថិ មុនីវង្ស - ស៊ីសុវត្ថិ មុនីពង្ស - ស៊ីសុវត្ថិ យុត្តិវង្ស - ស៊ីសុវត្ថិ សិរិមតៈ - ស៊ីសុវត្ថិ មុនីរេត - ស៊ីសុវត្ថិ វត្តាយាវង្ស - ស៊ីសុវត្ថិ ឥស្សរោ - ស៊ិន ស៊ីសាមុត - ស៊ាន ប៉េងសេ - ស៊ុម ម៉ា - ស៊ន សាន - ស៊ឹង ង៉ុកថាញ់ - ស៊ឹង ង៉ុកមិញ - សុន សេន - សុទ្ធ ប៉ូលិន - ស៊ីន ជៀប - ទាំង ជួន - តាន់ គីមហួន - ទេព ផន - ទ្រិញ ហ៊ាញ - ទ្រៀង កាង - ទ្រឹង ងា - ទ្រឹង ងា (អ្នកស្រី) - តាម៉ុក - ឱច អុល - អ៊ុង ក្រពុំផ្កា - វ៉ាន់ឌី កាអុន - យ៉េម សំបូរ

*Editions* ANGKOR
#143Eo Khémarak Phoumin (St.130) Phnom Penh, Cambodge
Dépôt légal : Bibliothèque nationale de France - Janvier 2013
ISBN : 2-9524557-3-2 ISSN : 1162-1680

សាគូ សាម៉ុត
ប្រវត្តិសាស្ត្រកម្ពុជា និង ឥស្សរជន ខ្មែរ
បណ្ណាគារ អង្គរ

HISTOIRE DU CAMBODGE ET ÉLITES KHMÈRES

គ្រឹះស្ថានបោះពុម្ព អង្គរ • ភ្នំពេញ ២០១៣ • រក្សាសិទ្ធិ អ្នកនិពន្ធ

### លន់ នល់
### (១៩១៣ - ១៩៨៥)

*លោក លន់ នល់ កើតនៅថ្ងៃទី ១៣ វិច្ឆិកា ១៩១៣ នៅស្រុកកំពង់លាវ ខេត្តព្រៃវែង ពីគ្រួសារកូនកាត់ ខ្មែរ-ចិន ។ លោកសិក្សាបឋមសិក្សានៅ សាលា DOUDART DE LAGRÉE ក្រុងភ្នំពេញ និង មធ្យមសិក្សានៅវិទ្យាល័យ CHASSELOUP LAUBAT ក្រុងព្រៃនគរ ពីឆ្នាំ ១៩២៨ ដល់ ១៩៣៤ ។ នៅឆ្នាំ ១៩៣៦ គាត់បានបំរើការងារជា តំណែងសាធារណៈ នៃ រដ្ឋបាលអាណានិគមបារាំង ក្នុងឋានៈជាចៅក្រមនៅសាលាក្ដី ខេត្តសៀម-រាប ។ នៅឆ្នាំ ១៩៣៧ គាត់បានចាកចេញពីមុខងារ ចៅក្រម ដើម្បីមកកាន់ការផ្នែករដ្ឋបាល នៅខេត្តកំពង់ចាម ។ នៅខែឧសភា ១៩៤៥ គាត់ជា អភិបាល ខេត្តក្រចេះ និង ជានាយកប៉ូលីស ប្រចាំខេត្ត ។ នៅឆ្នាំ ១៩៤៦ ហ្លួង នរោត្តម សីហនុ បានតែងតាំងគាត់ជាប្រធាន គណៈប្រតិភូខ្មែរ សំរាប់ចូលរួមមើលការចរចារវាង បារាំង-ថៃ ដើម្បីឲ្យថៃបង្វិលខេត្តបាត់ដំបង មកឲ្យកម្ពុជាវិញ ខេត្តនេះ ថៃបានកាន់កាប់តាំងពីឆ្នាំ ១៩៤១ ម្ល៉េះ ។ ពេលដែលថៃដកខ្លួនចេញទៅ លោក លន់ នល់ បានរៀបចំ រដ្ឋបាលកិច្ចខ្មែរ មុននឹងឡើងជាអភិបាលខេត្តនេះ នៅឆ្នាំ ១៩៤៧ ។ នៅឆ្នាំ ១៩៥១ លោក លន់ នល់ បានមកពង្រឹងជំហរ* ***"គណបក្ស ខេមរប៉ុណ្ណការ"*** *កើតនៅឆ្នាំ ១៩៤៧ ដោយ លោក ញ៉ឹក ជូឡុង ដើម្បីចូល-រួមការបោះឆ្នោត សភា និតិបញ្ញត្តិ ខែកញ្ញា ១៩៥១ ។ គណបក្សនេះបានទទួល ២ អាសនៈ, គណបក្ស ប្រជាធិបតេយ្យ បានទទួល ៥៤ អាសនៈ ក្នុងសភា ដែលមាន ៧៨ អាសនៈ ។ ក្នុងឆ្នាំជាមួយគ្នា លោក លន់ នល់ បានត្រូវតែងតាំងជា នាយក ប៉ូលីសជាតិ ។ នៅឆ្នាំ ១៩៥២ បានទទួលឋានន្តរស័ក្ដិជា វរសេនីយ៍ទោ លោក លន់ នល់ បានវិលមក ខេត្តបាត់-ដំបងវិញ ។ ពេលនេះ គាត់មានបេសកកម្ម ៣ គឺ ៖ កំចាត់ពួកខ្មែរឥស្សរៈ, កំចាត់ខ្មែរសេរីពួក សឺង ង៉ុកថាន់, កំចាត់កងកម្លាំងវៀតមិញបានប្រជ្រៀតចូលមកតាំងទី នៅក្នុងខេត្តនេះ ។*

*នៅឆ្នាំ ១៩៥៤ គាត់បានដឹកនាំធ្វើជា ប្រធាន គណៈកម្មការចំរុះ ដែលតែងតាំងដោយកិច្ចព្រមព្រៀងហ្សឺណែវ សំរាប់ត្រួតពិនិត្យការចេញដំណើរពួកវៀតមិញ ពីកម្ពុជា ។*

*ឆ្នាំ ១៩៥៥ គាត់បានឋានៈជា ឧត្តមសេនីយ៍ខ្មែរ ទី២ (ញ៉ឹក ជូឡុង ជា ឧត្តមសេនីយ៍ ទី១ - ១៩៥៤) ត្រូវបានតែងតាំងជា នាយអគ្គបញ្ជាការ កងទ័ពយោធពលខេមរភូមិន្ទ (FARK) ដែលជាប៉ុស្តិ៍មួយដ៏សំខាន់ អនុញ្ញាតឲ្យគាត់បង្កើតចំណងជាមួយនាយទាហានខ្មែរតាំងពីពេលនោះមក ។ នៅឆ្នាំ ១៩៥៥ នេះ ហ្លួង នរោត្តម សីហនុ បានដាក់រាជ្យ ថ្វាយព្រះបិតា នរោត្តម សុរាម្រិត ដើម្បីបង្កើត* ***គណបក្សនយោបាយ "សង្គមរាស្ត្រនិយម"*** *។ ហ្លួង ពេលនេះ មានងារជា* ***"សម្ដេច" សីហនុ*** *។ គណៈបក្ស ខេមរប៉ុណ្ណការ បានរំលាយខ្លួន លោក លន់ នល់ បានចូលជា សមាជិក របស់ សង្គមរាស្ត្រនិយម ។ នៅឆ្នាំ ១៩៥៥ គាត់ជា មេបញ្ជាការ FARK និង បានទទួលតំណែងជា រដ្ឋមន្ត្រី ការពារជាតិ នៃ រដ្ឋាភិបាលសង្គមរាស្ត្រនិយម ៥ លើក ៖ រដ្ឋាភិបាល ន. សីហនុ ឆ្នាំ ១៩៥៥-៥៦, រដ្ឋាភិបាល ប៉ែន នុត ឆ្នាំ ១៩៥៨, រដ្ឋាភិបាល ន. សីហនុ ឆ្នាំ ១៩៥៩-៦០, រដ្ឋាភិបាល ផូ ព្រឿង ឆ្នាំ ១៩៦០-៦១, រដ្ឋាភិបាល ន. កន្តុល ឆ្នាំ ១៩៦២-៦៤ ។ ឧបនាយករដ្ឋមន្ត្រី ១ លើក ៖ រដ្ឋាភិបាល ន. កន្តុល ឆ្នាំ ១៩៦៥-៦៦ ។ នាយករដ្ឋមន្ត្រី ២ លើក ៖ ១៩៦៦-៦៧ និង ថ្ងៃទី ១៤ សីហា ១៩៦៩, ១៨ មីនា ១៩៧០ ជា រដ្ឋាភិបាល "ស្រោចស្រង់ជាតិ" ។ គឺក្នុង រដ្ឋាភិបាល "ស្រោចស្រង់ជាតិ" នេះ ដែលមានការគាំទ្រពី អ្នកអង្គម្ចាស់ ស៊ីសុវត្ថិ សិរិមតៈ ឲ្យបង្កើតឡើង ។*

*ក្នុងឋានៈជា រដ្ឋមន្ត្រី ការពារជាតិ ធ្វើការជាមួយ សម្ដេច សីហនុ លោក លន់ នល់ ធ្វើតាមតែបន្ទាត់នយោបាយ សម្ដេច សីហនុ តែប៉ុណ្ណោះ ។ តាំងពីឆ្នាំ ១៩៦០ មក សម្ដេច សីហនុ ជាមួយ សង្គមរាស្ត្រនិយម ប្រកាន់យកនយោបាយនិន្នាការឆ្វេងនិយម រហូតអនុញ្ញាតឲ្យកងកម្លាំងយួនកុម្មុយនិស្ត តាំងទ័ពប្រើប្រាស់ទឹកដីខ្មែរ ប៉ែកខាងកើត ធ្វើសង្គ្រាមទៅយួនខាងត្បូង ។ លោក លន់ នល់ ថែមទាំងបានចុះហត្ថលេខាជាមួយចិន អនុញ្ញាតឲ្យគ្រឿងសព្វាវុធឆ្លងកាត់កំពង់ផែ កំពង់សោម ដើម្បីផ្ដល់ដល់យួនកុម្មុយនិស្ត ។ ព្រឹត្តិការណ៍ថ្ងៃ ១៨ មីនា ១៩៧០ ដែលបណ្ដាលឲ្យ សភា ដកតំណែង សម្ដេច សីហនុ ពីប្រមុខរដ្ឋ គឺមានបុព្វហេតុទ័ពយួនកុម្មុយនិស្តនេះ ។ នៅឆ្នាំ ១៩៧០ ដល់ ១៩៧១ រដ្ឋាភិបាល លន់ នល់ ប្រឈមមុខទៅបច្ចាមិត្រពីរ ៖ ទ័ពយួនកុម្មុយនិស្ត, ទ័ពខ្មែរក្រហម-សីហនុនិយម ។ ជាអកុសល គាត់មានរោគស្លាប់មួយចំហៀងខ្លួន (HÉMIPLÉGIE) បង្ខំឲ្យគាត់ធ្វើការព្យាបាលនៅ ហូណូលូលូ មួយរយៈ ទើបវិលត្រឡប់មកកម្ពុជាវិញ ថ្ងៃទី ២ ឧសភា ១៩៧១ តែគាត់នៅតែរក្សាប៉ុស្តិ៍ជា នាយករដ្ឋមន្ត្រី ដដែល ។ គាត់បានទទួលយសសក្ដិជា* ***"សេនាប្រមុខ"*** *នៅថ្ងៃទី ២១ មេសា ១៩៧១ ។ នៅថ្ងៃទី ៤ មិថុនា ១៩៧២ មានការបោះឆ្នោតជ្រើសរើសប្រធានាធិបតី មានបេក្ខជន ៣ នាក់ ៖ លន់ នល់, អ៊ិន តាំ, កែវ អន, អ្នកបានមកបោះឆ្នោតមាន ១,១ លាន នាក់ លន់ នល់ បានទទួល ៥៥% ជាប់ជា ប្រធានាធិបតី ។* ***"សាធា-រណរដ្ឋខ្មែរ"*** *ដែលមាន លោក លន់ នល់ ជាប្រមុខ មានអាយុ ៥ ឆ្នាំ ពីឆ្នាំ ១៩៧០ ដល់ ១៩៧៥ ។ លោក លន់ នល់ បានចាកចេញពីភ្នំពេញ ថ្ងៃទី ១ មេសា ១៩៧៥ ទៅរស់នៅ ហាវ៉ៃ រហូតដល់ឆ្នាំ ១៩៧៩ ទើបវិលមក FULLERTON រដ្ឋកាលីហ្វ័រនី និង បានទទួល*

តនៅលេខក្រោយ

តមកពីទំព័រទី ១២ អំពើហិង្សានៅវៀតណាមធ្វើឱ្យ...

លោក ចេង ហុងបូ អ្នកនាំពាក្យស្ថានទូតចិនប្រចាំទីក្រុងភ្នំពេញបានមានប្រសាសន៍ថា ជនជាតិចិនប្រហែលពី៤០០ទៅ៥០០នាក់ ដែលគេចខ្លួនចេញពីអំពើហិង្សានេះបានមកដល់ទីក្រុងភ្នំពេញក្នុងរយៈពេលពីរថ្ងៃមកនេះ ហើយថា ចំនួនអ្នកភៀសខ្លួននៅតែអាចកើនឡើងទៀត។ លោកបានមានប្រសាសន៍ថា "ប្រសិនបើស្ថានភាពនេះកាន់តែធ្ងន់ធ្ងរ ខ្ញុំគិតថា អាចមានអ្នកភៀសខ្លួនកាន់តែច្រើន"។

លោក ហុងបូ បានមានប្រសាសន៍ថា ស្ថានទូតបានទាក់ទងក្រសួងការបរទេសកាលពីម្សិលមិញដើម្បីប្រាប់ថា ស្ថានទូតសង្ឃឹមថា អាជ្ញាធរនៅទីនេះនឹងធានាមិនឱ្យអំពើហិង្សាប្រឆាំងចិននៅក្នុងប្រទេសវៀតណាមរាលដាលដល់កម្ពុជាឡើយ។ លោកបានមានប្រសាសន៍ថា "យើងបានស្នើសុំឱ្យអាជ្ញាធរកម្ពុជាចាត់វិធានការចាំបាច់ដើម្បីការពារសន្តិសុខ។ ខ្ញុំគិតថា អាជ្ញាធរកម្ពុជានឹងចាត់វិធានការសមស្របទៅតាមស្ថានភាពជាក់ស្តែង"។ ទោះជាយ៉ាងណាលោក ហុងបូ បានមានប្រសាសន៍ថា លោកមិនដឹងថា រដ្ឋាភិបាលកម្ពុជាយល់ព្រមចាត់វិធានការបន្ថែមបែបណាទេ ប្រសិនបើមានមែននោះ។

លោក កុយ គួង អ្នកនាំពាក្យក្រសួងការបរទេសបានមានប្រសាសន៍ថា លោកមិនបានដឹងថាមានការទាក់ទងណាមួយជាមួយស្ថានទូតចិនទេ។

អ្នកនាំពាក្យស្ថានទូតវៀតណាមប្រចាំទីក្រុងភ្នំពេញ លោក ត្រាន វ៉ានត្រុង បានទទួលស្គាល់ថា អំពើហិង្សានៅក្នុងប្រទេសវៀតណាមកំពុងធ្វើឱ្យជនជាតិចិនមួយចំនួនរត់ឆ្លងដែនភៀសខ្លួន។ ប៉ុន្តែលោកបានអះអាងថា ពួកគេមិនត្រូវបានបង្ខំឱ្យចាកចេញទេ ហើយថា កំហឹងផ្តោតលើរដ្ឋចិនមិនមែនប្រជាពលរដ្ឋចិនម្នាក់ៗនោះទេ។ លោកបានមានប្រសាសន៍ថា "ជនជាតិចិនកំពុងចូលមកប្រទេសកម្ពុជា ពីព្រោះវៀតណាមកំពុងតវ៉ាប្រឆាំងចិនចំពោះការបញ្ជូនឧបករណ៍បូមប្រេងចូលក្នុងទឹកដីអធិបតេយ្យរបស់វៀតណាម។ ពួកគេបានសម្រេចដោយខ្លួនឯងក្នុងការចូលមកប្រទេសកម្ពុជា។ គ្មាននរណាម្នាក់បង្ខំពួកគេឱ្យមកទេ"។

លោក វ៉ានត្រុង បានបន្ថែមថា "កម្មករវៀតណាម គឺជាអ្នកជាតិនិយម ហើយពួកគេធ្វើការតវ៉ា ពីព្រោះពួកគេចង់ការពារទឹកដីរបស់ពួកគេ។ ពួកគេមិនចង់ឱ្យចិនឈ្លានពានទឹកដីរបស់ពួកគេទេ ។ ពួកគេមិនមែនតវ៉ាប្រឆាំងពាណិជ្ជករចិនទេ"។

សេចក្តីរាយការណ៍ព័ត៌មានក្នុងស្រុកបានអះអាងថា សមាគមខ្មែរវៀតណាមនៅកម្ពុជាកំពុងរៀបចំផែនការតវ៉ាប្រឆាំងការដាក់ឧបករណ៍បូមប្រេងនេះ នៅមុខស្ថានទូតចិនប្រចាំទីក្រុងភ្នំពេញនៅសប្តាហ៍នេះ។

លោក ស៊ឹម ជី ប្រធានសមាគមនេះបានបដិសេធចំពោះសេចក្តីរាយការណ៍នេះកាលពីម្សិលមិញ។ ប៉ុន្តែលោកបាននិយាយថា សមាគមលោកកំពុងរៀបចំលិខិតមួយបញ្ជូនទៅឱ្យស្ថានទូតចិន និងស្ថានទូតវៀតណាមជំរុញឱ្យពួកគេដោះស្រាយជម្លោះនៅសមុទ្រចិនខាងត្បូងដោយសន្តិវិធី ។

ចិនអះអាងសិទ្ធិកាន់កាប់មួយផ្នែកធំនៃសមុទ្រនេះ ដែលជាផ្លូវនាវាចរណ៍ដ៏សំខាន់នៅលើពិភពលោក ហើយគេគិតថា សមុទ្រនេះមានរ៉ែប្រេង និងឧស្ម័នជាច្រើន។ ប្រទេសព្រុយណេ ម៉ាឡេស៊ី ហ្វីលីពីន កោះតៃវ៉ាន់ និងប្រទេសវៀតណាមសុទ្ធតែទាមទារសិទ្ធិកាន់កាប់លើតំបន់ត្រួតស៊ីគ្នានៃសមុទ្រចិននេះ។

ទោះបីជារដ្ឋាភិបាលបដិសេធក៏ដោយក៏គេចាត់ទុកជាទូទៅថា កម្ពុជាគាំទ្រចិននៅក្នុងជម្លោះនេះ ព្រោះចិនជាវិនិយោគិនបរទេសដ៏ធំរបស់ខ្លួន និងជាម្ចាស់បំណុលទ្វេភាគី។

ក្នុងនាមជាប្រធានអាស៊ានកាលពីឆ្នាំ២០១២ កម្ពុជាបានបញ្ចប់កិច្ចប្រជុំរបស់រដ្ឋមន្ត្រីការបរទេសអាស៊ានដោយមិនមានចេញសេចក្តីថ្លែងការណ៍រួម ហើយនេះជាលើកដំបូងហើយនៅក្នុងប្រវត្តិសាស្ត្រអាស៊ាន ពីព្រោះកម្ពុជាបដិសេធសំណើពីប្រទេសជាសមាជិកផ្សេងទៀតដែលសុំឱ្យលើកឡើងពីភាពតានតឹងនាពេលថ្មីៗនេះជាមួយប្រទេសចិនអំពីជម្លោះដែនសមុទ្រនេះ។

នៅឯកិច្ចប្រជុំកំពូលនៃមេដឹកនាំអាស៊ានកាលពីថ្ងៃអាទិត្យ លោក ង្វៀន តាន់យ៉ុងនាយករដ្ឋមន្ត្រីវៀតណាមបានប្រាប់ប្រមុខរដ្ឋក្នុងតំបន់ផ្សេងទៀតថា ចិនកំពុងបង្កើនឥរិយាបថគ្រោះថ្នាក់នៅក្នុងដែនសមុទ្រមានជម្លោះនេះ។ ប៉ុន្តែអាស៊ានមិនបានរិះគន់ក្រុងប៉េកាំងនៅក្នុងសេចក្តីថ្លែងការណ៍រួមរបស់ខ្លួនដែលបានចេញក្រោយកិច្ចប្រជុំកំពូលនេះទេ។ **គីមហឿន**

**(រាយការណ៍បន្ថែមដោយ Zsombor Peter)**

# មូលហេតុដែលបង្កឱ្យកើត ជំងឺមហារីក

ការស្រាវជ្រាវមួយបានបង្ហាញឱ្យដឹងថា មានមូលហេតុជាច្រើនដែលអាចបង្កឱ្យកើតជំងឺមហារីកដោយមិនដឹងខ្លួន ដូចជាការប្រើប្រាស់ថ្នាំពន្យារកំណើត ទឹកខ្ពុរមាត់ អាវទ្រនាប់ ។

**-ថ្នាំពន្យារកំណើត :** ស្ត្រីប្រើប្រាស់ថ្នាំពន្យារកំណើតមានការប្រឈមកើតមហារីកបំពង់.ក ខ្ពស់ ជាងបើប្រៀបធៀបជាមួយនឹងអ្នកមិនប្រើប្រាស់ ។ តែប្រសិនបើឈប់ប្រើថ្នាំហានិភ័យកើតជំងឺនឹងថយចុះ ។ នោះគឺដោយសារថ្នាំពន្យារកំណើតបង្កការបាត់តុល្យភាពអ័រម៉ូន ។

**-ទឹកខ្ពុរមាត់ :** ការស្រាវជ្រាវទាំងឡាយបង្ហាញថា ទឹកខ្ពុរមាត់ផ្ទុក តេហានូល មានពាក់ ព័ន្ធដល់មហារីកបំពង់.ក ។ សារជាតិចម្រុះនេះ អាចបំផ្លាញជាលិកាក្នុងមាត់ធ្វើឱ្យអ្នកងាយក្លាយជាជនរងគ្រោះរបស់សារជាតិបង្កើតមហារីក ដូចជាសារជាតិនៅក្នុងបារី ។

**-អាវទ្រនាប់:** ការស្រាវជ្រាវមួយនៅឆ្នាំ១៩៩៥បង្ហាញឱ្យដឹងថា អាវទ្រនាប់មួយចំនួនអាចបង្កជំងឺមហារីកដោះ ។ ទោះបីលទ្ធផលនៃការស្រាវជ្រាវនេះ ពុំទាន់ត្រូវបានបញ្ជាក់ច្បាស់លាស់តែពួកអ្នកវិទ្យាសាស្ត្របាននិយាយថា ស្ត្រីមិនពាក់អាវទ្រនាប់កម្រជួបបញ្ហាពាក់ព័ន្ធដល់ជាលិកាដោះជាងហេតុនេះហានិភ័យកើតមហារីកក៏ទាបជាងដែរ ៕

**តមកពីទំព័រទី ១២** គណបក្សសង្គ្រោះជាតិបំពានបម្រាម...

ការហែក្បួននេះដឹកនាំដោយមេដឹកនាំគណបក្សប្រឆាំង គឺលោក សម រង្ស៊ី និងលោក កឹម សុខា នេះបានបញ្ចប់ទៅដោយគ្មានផ្ទុះអំពើហិង្សាឡើយ ប៉ុន្តែគណបក្សសង្គ្រោះជាតិ អាចប្រឈមនឹងបណ្តឹងផ្លូវច្បាប់បន្ទាប់ពីក្បួនដង្ហែនេះបានចេញពីតម្រោយផ្លូវដែលសាលារាជធានីបានសម្រេចឱ្យហែ និងឆ្ពោះទៅទីលានប្រជាធិបតេយ្យកន្លែងដែលអ្នកគាំទ្រគណបក្សសង្គ្រោះជាតិបានលើកត្រវែងរបាំងបិទផ្លូវរបស់នគរបាល។

លោក ឡុង ឌីម៉ង់ អ្នកនាំពាក្យសាលារាជធានីភ្នំពេញបានមានប្រសាសន៍ថា "ពួកគាត់បានល្មើសច្បាប់ ពីព្រោះពួកគាត់បានប្រាប់យើងថា ពួកគាត់នឹងមិនហែទៅវត្តភ្នំ ឬទីលានប្រជាធិបតេយ្យឡើយ។ លោក ឃួង ស្រេង ឱ្យអភិបាលរងរាជធានីភ្នំពេញបានចុះហត្ថលេខាលើលិខិតមួយ ច្បាប់រួចហើយ ដើម្បីផ្ញើទៅឱ្យគណៈកម្មការរៀបចំការបោះឆ្នោតរាជធានី ដើម្បីប្តឹងគណបក្សសង្គ្រោះជាតិដែលមិនគោរពតាមការព្រមព្រៀងរបស់យើងនៅក្នុងកិច្ចប្រជុំមួយកាលពីសប្តាហ៍មុន"។

គណបក្សសង្គ្រោះជាតិបានប្រកាសជាសាធារណៈអំពីតម្រោយផ្លូវហែក្បួនឃោសនាដែលសាលារាជធានីបានសម្រេចដែលត្រូវបត់ឆ្វេងចេញពីមហាវិថីព្រះមុនីវង្សឡើងទៅមហាវិថីកម្ពុជាក្រោម។ ប៉ុន្តែនៅពេលអ្នកគាំទ្រជាច្រើនពាន់នាក់បានហែឆ្ពោះទៅភាគខាងជើងតាមបណ្តោយមហាវិថីដ៏សំខាន់នេះ ផែនការក៏បានប្រែប្រួល ហើយក្បួនដង្ហែក៏បានបត់ស្តាំឆ្ពោះទៅទីលានប្រជាធិបតេយ្យដែលគណៈកម្មាធិការជាតិរៀបចំ



ការបោះឆ្នោត (គ.ជ.ប.) ប្រកាសថា ជាតំបន់ហាមធ្វើយុទ្ធនាការឃោសនា។

បន្ទាប់ពីការដង្ហែក្បួននេះ លោក សម រង្ស៊ី បានមានប្រសាសន៍តាមទូរស័ព្ទថា ការសម្រេចហែក្បួនទៅទីលានប្រជាធិបតេយ្យដែលមានកម្លាំងសន្តិសុខយាមកាមយ៉ាងតឹងរ៉ឹង គឺធ្វើឡើងដោយឥតគ្រោងទុក ហើយថា អ្នកគាំទ្រជាអ្នកទាមទារឱ្យហែទៅកាន់ទីនោះ។ លោកបានមានប្រសាសន៍ថា ដោយមានអ្នកគាំទ្រយ៉ាងច្រើនហែតាមពីក្រោយវាជាឱកាសដ៏ល្អដើម្បីបង្ហាញពីកម្លាំងរបស់គណបក្សសង្គ្រោះជាតិ។

លោក សម រង្ស៊ី បានមានប្រសាសន៍ថា "យើងចង់ប្រាប់ឱ្យរដ្ឋាភិបាលថា ប្រសិនបើយើងចង់យើងអាចឡោមព័ទ្ធពួកគេ និងកាន់កាប់ទីលានប្រជាធិបតេយ្យបាន ។ ទាហាននឹងក្លាយជាអ្នកទោសនៅទីលានប្រជាធិបតេយ្យ។ តើទាហានពីរបីរយនាក់អាចទប់ទល់ម៉េចនឹងបានទៅប្រសិនបើយើងពិតជាប៉ុនប៉ងកាន់កាប់ទីលានប្រជាធិបតេយ្យមែននោះ?"។

នៅម៉ោងប្រហែល៥ល្ងាចនៅចុងប៉ែកខាងត្បូងនៃវត្តភ្នំមានសន្តិសុខខណ្ឌដូនពេញប្រហែលជាង២០នាក់ឈរនៅទីលានប្រជាធិបតេយ្យ អ្នកខ្លះពាក់មួកការពារសុវត្ថិភាពអ្នកខ្លះគ្រវីដំបង ហើយអ្នកខ្លះទៀតមើលទៅដូចជាមិនចង់ឱ្យមានការប៉ះទង្គិចគ្នាទេ។

អ្នកគាំទ្រគណបក្សប្រឆាំងមួយចំនួនបានឈប់ ហើយឌឺដងដាក់សន្តិសុខទាំងនោះ ដែលត្រូវបានសាលារាជធានីប្រើប្រាស់ក្នុងរយៈពេលប៉ុន្មានខែថ្មីៗនេះ ដើម្បីបំបែកបាតុកម្មរបស់គណបក្សប្រឆាំង និងបាតុកម្មរបស់កម្មករដោយហិង្សា។

បន្ទាប់មកអ្នករៀបចំការហែក្បួនបាននាំក្បួននេះ ឡើងមកមហាវិថីព្រះនរោត្តមឆ្ពោះទៅកាន់ទីលានប្រជាធិបតេយ្យកន្លែងដែលនគរបាលចរាចរដាក់របាំងបិទផ្លូវមានរថពាសដែក និងនគរបាលបង្ក្រាបបាតុកម្មកាន់គ្រាប់បែកផ្សែងនៅចម្ងាយប្រហែល៥០ម៉ែត្រត្រង់ច្រកចូលស្ថានទូត។ នៅពេលអ្នកហែក្បួនទាំងនេះគ្រវែងរបាំងបិទផ្លូវមន្ត្រីកងកម្លាំងម្នាក់ដែលបញ្ជានគរបាលបង្ក្រាបបាតុកម្មបានស្រែកថា "វ៉ៃពួកវាឱ្យងាប់ វ៉ៃពួកវាឱ្យងាប់!"។

លោក រៀល ខេមរិន តំណាងរាស្ត្រជាប់ឆ្នោតមណ្ឌលស្វាយរៀងរបស់គណបក្សសង្គ្រោះជាតិបានដើរចេញពីក្រុមអ្នកគាំទ្រ ហើយបានហែក្បួនឆ្ពោះទៅចំណុចទំនេរមួយចន្លោះជួរនគរបាល និងបាតុកម្ម ហើយមេបញ្ជាការនគរបាលបង្ក្រាបបាតុកម្មម្នាក់ក៏បានចេញមកជួបលោកនៅពេលនោះ។

ពួកគាត់ទាំងពីរបានជជែកគ្នាយ៉ាងតឹងសរសៃកមុនពេលការហែក្បួនត្រូវបានដឹកនាំឡើងវិញចេញពីទីលានប្រជាធិបតេយ្យឆ្ពោះទៅភាគខាងកើត។ លោក រៀល ខេមរិន បានមានប្រសាសន៍ជាក្រោយអំពីកងកម្លាំងរបស់រដ្ឋាភិបាលថា "ខ្ញុំមិនដឹងថា មនុស្សទាំងនេះចង់បានអ្វីនោះទេ។ យើងគ្រាន់តែហែក្បួនប៉ុណ្ណោះ ប៉ុន្តែពួកគេមកព្យាយាមបំភិតបំភ័យពួកយើង"។

បន្ទាប់មកការហែក្បួននេះបានឆ្ពោះទៅភាគខាងត្បូងតាមបណ្តោយផ្លូវលេខ១៩មុនពេលបត់ទៅមហាវិថីកម្ពុជាក្រោមវិញ ដោយនៅទីនោះលោក សម រង្ស៊ី បានឡើងជិះលើរថយន្ត ហើយបានស្រែកថ្កោលទោសគណបក្សប្រជាជនកម្ពុជាកំពុងកាន់អំណាច។

លោក សម រង្ស៊ី បានមានប្រសាសន៍ថា "ពួកគេធ្វើឱ្យប្រទេសក្រីក្រ។ យុវជនគ្មានការងារធ្វើនិស្សិត៣០០.០០០ទៅ៤០០.០០០នាក់ចេញពីសាលាជារៀងរាល់ឆ្នាំ ហើយទាត់ខ្យល់ ចំណែកឯកូនអ្នកមាន មានអ្វីៗគ្រប់យ៉ាង។ ប្រសិនបើគណបក្សប្រជាជនដឹកនាំមុខជាអត់ការងារធ្វើ ។ មេដឹកនាំនៃសង្គមរបស់យើងគ្មានសមត្ថភាពធ្វើឱ្យប្រទេសរីកចម្រើនទេ គាត់គ្រាន់តែចែកសារុងប៉ុណ្ណោះ"។

លោក ឡុង ឌីម៉ង់ អ្នកនាំពាក្យសាលារាជធានីភ្នំពេញបានមានប្រសាសន៍ថា គណបក្សសង្គ្រោះជាតិសមប្រឈមនឹងវិធានការរបស់ គ.ជ.ប. ចំពោះការហែក្បួននេះ និងចំពោះការគ្រវែងរបាំងបិទផ្លូវរបស់នគរបាលនៅជិតវត្តភ្នំ។ លោកបានលើកឡើងទៀតថា "ពួកគាត់បានធ្វើលើសពីយុទ្ធនាការឃោសនាពួកគាត់បានញុះញង់ឱ្យមានការស្អប់ខ្ពើម"។

ទោះជាយ៉ាងណាលោក សម រង្ស៊ី បានមានប្រសាសន៍ថា គណបក្សសង្គ្រោះជាតិគ្រាន់តែប្រើប្រាស់រយៈពេលនៃការធ្វើយុទ្ធនាការឃោសនាបោះឆ្នោត ដើម្បីបង្ហាញដល់ក្រុមប្រឹក្សាឃុំ-សង្កាត់ចំនួន១១.៤៥៩នាក់នៅទូទាំងប្រទេសដែលក្នុងនោះជាង៨.០០០នាក់មកពីគណបក្សប្រជាជនកម្ពុជាថា ប្រជាពលរដ្ឋយ៉ាងច្រើនបានចេញមកគាំទ្រគណបក្សប្រឆាំងនៅមុនការបោះឆ្នោតនៅថ្ងៃអាទិត្យនេះប៉ុណ្ណោះ។

លោកបានមានប្រសាសន៍ទៀតថា "យើងចង់ឱ្យអ្នកបោះឆ្នោតដឹងថា ប្រជាពលរដ្ឋដែលបានបោះឆ្នោតឱ្យពួកគេបានប្តូរមកគាំទ្រគណបក្សសង្គ្រោះជាតិវិញហើយ ហើយប្រសិនបើពួកគេចង់ផ្លាស់ប្តូរដែរប្រជាពលរដ្ឋគាំទ្រពួកគេ"៕

**សុខុម**

# CLASSIFIED ADS


រឿងរាមកេរ្តិ៍ ដោយសាគុ សាមុត តម្លៃ $10



របាំបុរាណខ្មែរ ដោយសាគុ សាមុត តម្លៃ $10



រឿងរាមកេរ្តិ៍ ដោយសាគុ សាមុត តម្លៃ $10



ក្រុងភ្នំពេញមុនឆ្នាំ១៩៥៤ តម្លៃ $10



CAMBODGE តម្លៃ $5


អង្គការជានរណា? ២ភាគ តម្លៃ $5/1

| | |
|---|---|
| Name | Phone # |
| Shipping Address | Email |
| City, State, Zip | Book Title(s) |

BOOK ORDER FORM

Checks or Money Order Payable to KhmerPost USA, LLC
**អាចទិញនៅអាស័យដ្ឋាន៖** 45 Merrimack St., Suite 218A, Lowell, MA 01852

## Your Bussiness Card is Here for $50/mon

**ពាណិជ្ជកម្មរបស់អ្នកនៅទីនេះចំណាយ ត្រឹមតែ $50 ក្នុង១ខែ**

Golden Video Shop Providence
មានលក់ថាសចម្រៀង និងខ្សែវីដេអូ-ខ្មែរ-ចិន-ថៃ
(401)-808-9336
VM LAPTOPS CENTER
- VANNAK MOEUN (Manager)
មានជួសជុល-ទិញ និង លក់ "ឡាបថប" គ្រប់យ៉ាង
301 Reservoie Ave.
Providence, RI 02907

**ប្រូវីដិនខ្មែរវីដេអូ**
មានជួសជុល និងលក់កុន ចិន-ថៃ-ខ្មែរ-ឥណ្ឌា
គ្រប់ប្រភេទមានចម្រៀងសម័យវីដេអូ
ខារ៉ាអូខេថ្មីៗ
742 Potters Avenue
Providence, RI 02907
ទូរស័ព្ទ : (401) 787 6663

**តមកពីទំព័រទី ១៥** គណបក្សប្រជាជនកម្ពុជាឈ្នះឆ្នោតក្រុម...

ដូចជាការគ្រប់គ្រងមណ្ឌលសុខភាព និងអនាម័យ។ លោក សេដ្ឋា បានពន្យល់ថា "ចាប់តាំងពីប្រាំឆ្នាំមុនរហូតមកទល់សព្វថ្ងៃនេះ ស្រុក ខណ្ឌ និងឃុំ សង្កាត់ មានអំណាចទូទៅ គឺពួកគេមានអំណាចធ្វើអ្វីមួយទៅតាមធនធានដែលមាន"។ លោកបាននិយាយថា "ពួកគេក៏មានសមត្ថភាពអភិវឌ្ឍហេដ្ឋារចនាសម្ព័ន្ធ ដូចជាផ្លូវថ្នល់នៅក្នុងឃុំសង្កាត់ដែលស្ថិតនៅក្នុងរង្វង់ស្រុកខណ្ឌរបស់ខ្លួនផងដែរ។ ឃុំសង្កាត់ធ្វើតែគម្រោងតូចៗដូចជាផ្លូវនៅក្នុងភូមិ និងគម្រោងតូចៗផ្សេងៗទៀត"។

លោកបានពន្យល់ប្រាប់ទៀតថា ក្រុមប្រឹក្សាស្រុកខណ្ឌនៅទូទាំងប្រទេសនឹងប្រើប្រាស់ថវិកាសរុបចំនួន១៦លានដុល្លារដែលនឹងត្រូវប្រគល់ឱ្យអាស្រ័យលើទំហំភូមិសាស្ត្រ និងចំនួនប្រជាជនរបស់ខ្លួន។ ក្រុមប្រឹក្សាទាំង២៤ខេត្តក្រុង និងនៅរាជធានីភ្នំពេញនឹងមានថវិការួមគ្នាចំនួន៥០លានដុល្លារដែលត្រូវបែងចែកស្រដៀងគ្នានេះ។ **គីម ហឿន**

**(រាយការណ៍បន្ថែមដោយ)**

**សំអាងការពិធីតាសួគ៌**
THYDA SOUR CAMBODIA BRIDAL
-មានសំអាងការបុរាណ សម័យ
-កាត់សក់ បួងសក់ ផាត់មុខ ក្នុងកម្មពិធីផ្សេងៗ
-មានអាចារ្យ ភ្លេងខ្មែរ ថតរូប ថតវីដេអូ តែងផ្ទះ ឌិសម៉េក្រូ
2PINE ST.#A
LOWELL MA.018 51
CHENDA: 978-328 9336
PAULA : 978-996 6109
SOVANN: 978-328 9335

## ជាវកាសែតខ្មែរផុស ស.រ.អា

លោកអ្នកនៅទីឆ្ងាយៗ ក៏អាចជាវការសែតខ្មែរផុស យកទៅអានបានដែរដោយបញ្ជាទិញសម្រាប់
៣ខែ = $១៥, ៦ខែ=$៣០, ១ឆ្នាំ=$៦០
សូមអញ្ជើញបញ្ជាទិញកាសែត ដោយភ្ជាប់សែកទៅជាមួយនឹងផ្តល់ អស័យដ្ឋានលោកអ្នក ដើម្បីឱ្យយើងចាត់ចែងផ្ញើរកាសែតទៅជូន ។

# យុវជនគណបក្សសង្គ្រោះជាតិ កំពុងបណ្តុះថ្នាលដឹកនាំ

**ដោយ : សុខា**

**ក្រុងឡូវែល :** គណបក្សសង្គ្រោះជាតិដែលមានដើមកំណើតចេញពីការច្របាច់ចូលគ្នានៃបក្សប្រឆាំងទាំងពីរ គឺគណបក្សសិទ្ធិមនុស្ស និងគណបក្ស សម រង្ស៊ី ដែលមានបុគ្គលសំខាន់ពីរនាក់ជាដឹកនាំចង្កូតមានលោកប្រធានបក្ស សម រង្ស៊ី និងអនុប្រធាន កឹម សុខា ជាមគ្គុទ្ទេសក៍នោះ បានទទួលការគាំទ្រធំធេងពីមហាជនទាំងក្នុង និងក្រៅប្រទេស។ ស្របគ្នានោះកម្លាំងយុវជនបានរួមចំណែកធំក្នុងកម្លាំងគាំទ្រនេះ ដែលជាឥទ្ធិពលរឹងមាំនាំដល់លទ្ធភាពក្នុងការប្តូរដៃនៃការដឹកនាំក្នុងព្រះរាជាណាចក្រកម្ពុជា។ ក្នុងន័យនេះ កម្លាំងចលករដែលកំពុងត្រូវបានចង្អុលនេះ គឺក្រុមយុវជនគណបក្សសង្គ្រោះជាតិនៃគណបក្សនេះ។

ជួបផ្ទាល់ចំនួនបីលើកជាមួយលោក សុខផល ប៉ែន ប្រធានចលនាយុវជននៃគណបក្សសង្គ្រោះជាតិប្រចាំរដ្ឋម៉ាសាឈូសេតលោកបានចែករំលែកខ្លឹមសារនានាដែលមានក្នុងស្ថាប័ននេះ។ ខ្លឹមសារបីសំខាន់ដែលកំពុងដំណើរការ និងជាគោលដៅដែលក្រុមចលនាយុវជនកំពុងបំពេញនៅប្រទេសអាមេរិក ហើយជួយទៅយុវជនក្នុងព្រះរាជាណាចក្រកម្ពុជាមានទី១ ផ្តល់ការឧបត្ថម្ភ គាំទ្រចលនានានារបស់យុវជនក្នុងបព្វហេតុ អភិវឌ្ឍជាតិ ភាពរីកចំរើនរបស់ជាតិ រួមមានការគាំទ្រក្នុងប្រព័ន្ធផ្សព្វផ្សាយ ឬឧបត្ថម្ភ គាំទ្រ ការតស៊ូមតិ របស់យុវជនដែលបង្ហាញនូវជំហរប្រឆាំងដែលមានហេតុផល ចំពោះភាពអយុត្តិធមិ ឬអំពើអបាយមុខដែលប្រព្រឹត្តដោយអ្នកមានអំណាចមួយចំនួនក្នុងព្រះរាជាណាចក្រកម្ពុជា ឬសុឆន្ទៈដែលយុវជនមាន ហើយចង់ផ្សព្វផ្សាយដល់សាធារណៈ។ ខ្លឹមសារទី២គឺកម្មវិធីផ្តល់អាហារូបករណ៍ដល់យុវជនខ្មែរក្នុងប្រទេសដែលមានស្មារតីយកចិត្តទុកដាក់សិក្សារៀនសូត្រ និងមនសិកាស្នេហាជាតិបានទទួលការផ្គត់ផ្គង់ពីក្រុមចលនាយុវជនបក្សសង្គ្រោះជាតិ និងបានទៅរៀនដល់ថ្នាក់ឧត្តមសិក្សា។ ខ្លឹមសារទីបី គឺការផ្តល់វគ្គបណ្តុះបណ្តាលនូវជំនាញនានាដែលយុវជនអាចទទួលបាននូវចំណេះដឹងនឹងអាចយកទៅប្រើប្រាស់ជាអាជីព ដើម្បីចិញ្ចឹមជីវិត។

គួរបញ្ជាក់ផងដែរ លោក សុខផល ប៉ែន ជាជនសកម្មមួយរូបដែលបម្រើការងារក្នុងគណបក្សសង្គ្រោះជាតិ ហើយដែលតែងតែយកចិត្តទុកដាក់ស្វែងយល់ពត៌មាន និងចូលរួមក្នុងកម្មវិធីនានាដែលមានក្នុងសហគមន៍ និងរដ្ឋផ្សេងទៀតដែលមានគណបក្សសង្គ្រោះជាតិជាសមាជិក។ ឆ្លៀតឱកាសក្នុងពេលផ្តល់បទសម្ភាសន៍លោក សុខផល ប៉ែន បានអំពាវនាវឱ្យប្រជាជនទាំងអស់មិនថាតែក្នុងសហគមន៍ឡូវែល ឬតំបន់ផ្សេងទៀត អញ្ជើញចូលរួមឱ្យបានច្រើនកុះករក្នុងកម្មវិធីរាត្រីសមោសរយុវជនសង្រ្គោះជាតិដែលនឹងប្រព្រឹត្តទៅនៅភោជនីយដ្ឋានសំពៅមាស នាថ្ងៃសៅរ៍ ទី៣១ ខែឧសភា ឆ្នាំ២០១៤ ចាប់ពីម៉ោង៦ល្ងាច ដល់ម៉ោង១២អធ្រាត្រ ដើម្បីគាំទ្រចលនាយុវជនសង្រ្គោះជាតិកម្ពុជា៕

## NOTICE OF PUBLIC MEETING AND COMMENT OPPORTUNITY: FFY 2015-2018 TRANSPORTATION IMPROVEMENT PROGRAM FFY 2015 UNIFIED PLANNING WORK PROGRAM

The Northern Middlesex Metropolitan Planning Organization (NMMPO) has released the draft FFY 2015-2018 Transportation Improvement Program (TIP) and the draft FFY 2015 Unified Planning Work Program (UPWP) for public review and comment. The TIP contains all federally funded transportation projects in the Northern Middlesex region over the next four years. The UPWP outlines all transportation planning activities being addressed by the NMMPO in the upcoming Federal fiscal year.

A public meeting will be held on June 3rd, 2014, 5:30 PM at the Northern Middlesex Council of Governments office, 40 Church Street, Suite 200, Lowell, MA, to receive comments on the draft documents. You may also submit comments by phone at (978) 454-8021, ext 121, or by email: jhoward@nmcog.org. If preferred, comments may be mailed to the above address. The public comment period will end at close of business on June 20th, 2014.

Please note that the TIP contains the program of projects for the Lowell Regional Transit Authority (LRTA). The MPO's public participation process satisfies the LRTA's public participation requirements for the program of projects. You may access a copy of these documents online at www.nmcog.org.

Notice: This meeting location is accessible to people with disabilities and is near public transportation. NMCOG offers secure bicycle parking on the second floor. The NMMPO provides reasonable accommodations and/or language assistance free of charge upon request (including but not limited to interpreters in American Sign Language and languages other than English, open or closed captioning for videos, assistive listening devices and alternate material formats), as available. For assistance, please contact Justin Howard at (978) 454-8021, ext 121 or at jhoward@nmcog.org. Requests should be made as soon as possible for services requiring advanced arrangements, including sign-language, CART or language translation or interpretation.

## សេចក្តីជូនដំណឹង កិច្ចប្រជុំជាសាធារណៈ និងឱកាសដល់សាធារណជនផ្តល់យោបល់

លើកម្មវិធីអភិវឌ្ឍគម្រោងសម្រាប់មធ្យោបាយធ្វើដំណើរសាធារណៈសម្រាប់ឆ្នាំ២០១៥-២០១៨ និងគម្រោងបញ្ចូលកម្មវិធីការងាររួមគ្នាសម្រាប់ឆ្នាំ២០១៥ អង្គការរៀបចំគម្រោងនៃក្រុងធំៗក្នុងខ័ណ្ឌមីដដលស៊ិកខាងជើង ហៅកាត់ថា អិន អឹម អឹម ភី អូ (NMMPO) បានប្រកាសផ្សាយនូវសេចក្តីព្រាងសម្រាប់ឆ្នាំ២០១៥-២០១៨ នៃកម្មវិធីអភិវឌ្ឍគម្រោងសម្រាប់មធ្យោបាយធ្វើដំណើរសាធារណៈហៅកាត់ថា (TIP) ឬ (ធី អាយ ភី) និង សេចក្តីព្រាងនៃគម្រោងបញ្ចូលកម្មវិធីការងាររួមគ្នាសម្រាប់ឆ្នាំ២០១៥ ហៅកាត់ថា (UPWP) ឬ (យូ ភី ដាប់បលយូ ភី) ដើម្បីស្តាប់ និងស្វែងយល់យោបល់ពីសាធារណជន។

កម្មវិធីអភិវឌ្ឍគម្រោងសម្រាប់មធ្យោបាយធ្វើដំណើរសាធារណៈហៅកាត់ថា (TIP) មានភ្ជាប់មកជាមួយនូវរាល់គម្រោងទាំងអស់ដែលទាក់ទងនឹងមធ្យោបាយធ្វើដំណើរសាធារណៈដែលឧបត្ថម្ភដោយថវិការបស់សហព័ន្ធមានរយៈពេល៤ឆ្នាំ។

សេចក្តីព្រាងនៃគម្រោងបញ្ចូលកម្មវិធីការងាររួមគ្នាសម្រាប់ឆ្នាំ២០១៥ ហៅកាត់ថា (UPWP) ឬ (យូ ភី ដាប់បលយូ ភី) មានរាយបង្ហាញរាល់គម្រោង និងសកម្មភាពនានាទាក់ទងនឹងការអភិវឌ្ឍមធ្យោបាយធ្វើដំណើរសាធារណៈដែលត្រូវបានយកចិត្តទុកដាក់ដោយអង្គការរៀបចំគម្រោងនៃក្រុងធំៗក្នុងខ័ណ្ឌមីដដលស៊ិកខាងជើងហៅកាត់ថា អិន អឹម អឹម ភី អូ (NMMPO) សម្រាប់ឆ្នាំខាងមុខ។

កិច្ចប្រជុំពិភាក្សាជាសាធារណៈមួយនឹងធ្វើឡើងនៅថ្ងៃទី០៣ ខែមិថុនា ឆ្នាំ២០១៤ វេលាម៉ោង ៥និង៣០នាទី ល្ងាច ដែលនឹងប្រព្រឹត្តទៅនៅការិយាល័យរដ្ឋាភិបាលក្នុងខណ្ឌមីដដលសិកខាងជើង ផ្លូវ ៤០ ឆឺចស្រ្ទីត ស៊ុតលេខ២០០ ក្រុងឡូវែល រដ្ឋម៉ាសាឈូសេត(40 Church Street, Suite 200, Lowell, MA)។

លោកអ្នកក៏អាចផ្ញើនូវយោបល់របស់លោកអ្នកមកកាន់ ចីសស្ទីន ហ្វូវឺដ តាមរយៈទូរស័ព្ទ ៩៧៨-៤៥៤-៨០២១ ភ្ជាប់ខ្សែទូរស័ព្ទទៅលេខ១២១ ឬផ្ញើយោបល់តាមអ៊ីម៉ែល jhoward@nmcog.org។ បើលោកអ្នកចាប់អារម្មណ៍ លោកអ្នកអាចផ្ញើមតិរបស់លោកអ្នកតាមរយៈសំបុត្រទៅកាន់អាស័យដ្ឋានខាងលើ។ មតិសាធារណៈនឹងត្រូវបានបិទនៅចុងបញ្ចប់ម៉ោងធ្វើការត្រឹមថ្ងៃទី២០ខែមិថុនាឆ្នាំ២០១៤។

សូមចំណាំថា កម្មវិធីធីប (TIP) មានគម្រោងដែលទាក់ទៅនឹងសេវាមធ្យោបាយធ្វើដំណើរសាធរណៈនៃមន្ទីរទូរគមនាគមន៍ប្រចាំតំបន់ឡូវែល ហៅកាត់ថា អិល អ័រ ធី អេ (LRTA)។ ការចូលរួមជាសាធារណៈនៃកិច្ចប្រជុំខាងលើជាបច្ច័យជំរុញគម្រោងមធ្យោបាយធ្វើដំណើរសាធារណៈឱ្យបានដល់ការពេញចិត្តពីកម្មវិធីនេះ។ លោកអ្នកអាចស្វែងរកពង្រាងនៃវិសោធនកម្មនេះនៅគេហទំព័រ www.nmcog.org។

**ចំណាំ:** ទីកន្លែងនៃកិច្ចប្រជុំខាងលើផ្តល់ដល់អ្នកចូលរួមដែលមិនចេះភាសាអង់គ្លេស និងជនពិការហើយមានទីតាំងងាយទៅដល់ ព្រោះនៅក្បែរមធ្យោបាយធ្វើដំណើរសាធារណៈ។ អិន អឹម ស៊ី អូ ជី ផ្តល់ជូននូវការចតទោចក្រយាន្តនៅជាន់ទីពីរប្រកបដោយសុវត្ថិភាព។ លោកអ្នកអាចទទួលបានទីកន្លែងស្នាក់នៅ និងការបកប្រែភាសាដោយឥតថ្លៃ(ទាំងភាសាកាយវិកា និងសម្លេង ការថតរូប និងវីដេអូ ប្រដាប់ជំនួយសម្លេងស្តាប់ការប្រជុំ និងឧបករណ៍ជំនួយក្នុងទម្រង់ផ្សេងៗទៀត) តាមរយៈការស្នើរសុំពេលចូលរួមកិច្ចប្រជុំខាងលើ។

សម្រាប់ការស្នើរសុំទីកន្លែងស្នាក់នៅ និងសេវាបកប្រែភាសាពេលចូលរួមកិច្ចប្រជុំ សូមទាក់ទង ចីសស្ទីន ហ្វូវឺដ តាមរយៈលេខទូរស័ព្ទ ៩៧៨-៤៥៤-៨០២១ បន្តចុចលេខ១២១ ឬអាចអ៊ីម៉ែល jhoward@nmcog.org។ ការស្នើរសុំជំនួយបកប្រែភាសាកាយវិកា និងភាសានិយាយ គួរតែធ្វើឡើងឱ្យលឿនបំផុតតាមដែលអាចធ្វើបាន ដើម្បីឱ្យបុគ្គលិកដែលទទួលបន្ទុកអាចរៀបចំឱ្យបានទាន់ពេលវេលា ៕

# ព័ត៌មានក្រៅផ្លូវការណ៍នៅឡូវែល

**១-ពីសមាគមខ្មែរ:** តាំងតែពីលោក វ៉ាស៊ុ អាន នាយកប្រតិបត្តិលាលែងពីដំណែងកាលពីខែមករា ២០១៤ មកសមាគមខ្មែរ CMAA នៅព្រោះគ្មាននាយកតាំងពីប្រមាណ៥ខែមកហើយ ។ ទើបតែឥឡូវនេះ យើងទើបបានទទួលព័ត៌មានដ៏គួរឱ្យរីករាយមួយថា លោក សុវណ្ណ ពៅ ទើបនឹងត្រូវបានទទួលការតែងតាំងក្នុងមុខងារជំនួសលោក វ៉ាស៊ុ អាន តាំងពីពេលនេះទៅហើយ ។ យើងនឹងធ្វើការណែនាំឱ្យស្គាល់ សុវណ្ណ ពៅ ជានរណាជូនលោកអ្នកអាននៅពេលក្រោយ ។




**២-បេក្ខភាពខ្មែរសម្រាប់បោះឆ្នោត"តំណាងរដ្ឋ" State.Rep ។**

កាលពីលេខមុនយើងបានផ្សាយអំពីបេក្ខភាពរបស់ខ្មែរ២រូប គឺ វ៉ាឌី ម៉ម នឹង រដ្ឋា យ៉ែម ក្នុងការប្រជែងជាមួយអ្នកដទៃទៀតដណ្តើមដំណែងតំណាងរដ្ឋរបស់ឡូវែលសង្កាត់ ១៨ កាន់កាប់ប្រមាណ២០ឆ្នាំមុនមកដោយ ខេវិន ម័រហ្វី ឥឡូវនេះ ខេវិន បានប្តូរដំណែងមកជាអ្នកគ្រប់គ្រងសាលាក្រុងឡូវែលវិញហើយ ។ លោក រដ្ឋា យ៉ែម បាននិយាយថា នាថ្ងៃបិទបញ្ជីមិនមានឈ្មោះលោកក្នុងបញ្ជីបេក្ខជនទេ ដោយសារឯកសារលោកគ្មាន ហ្សីបខូដ តែក៏មិនមែនបានន័យថា លោកមិនមានសិទ្ធ




នោះដែរ លោកនឹងរកមេធាវីដើម្បីធ្វើការតវ៉ាករណីរបស់លោកជាបន្តទៅទៀត ។ ចំណែកលោក វ៉ាឌី ម៉ម វិញ យើងបានធ្វើការទាក់ទងតាមទូរស័ព្ទដោយសារចង់បានការបញ្ជាក់ពីបេក្ខភាពរបស់លោកតែមិនមាននរណាឆ្លើយទេ យោងតាមការផ្សាយរបស់កាសែតឡូវែល សាន់ នាថ្ងៃអង្គារស្តីពីបេក្ខជនស្តេតរ៉ិបនេះ ពុំមានឃើញ ឈ្មោះ វ៉ាឌី ម៉ម ជាមួយឈ្មោះអ្នកដែលមិនមានសិទ្ធនោះទេ ។

**៣-វត្តត្រៃរតនារាម :**

ចាប់តាំងពីវត្តត្រៃរតនារាមត្រូវក្រសួងត្រួតពិនិត្យបិទទ្វារកន្លែងអាគារធំសម្រាប់ធ្វើបុណ្យដោយបុព្វហេតុមានការប្រើប្រាស់អាគារដោយគ្មានសុវត្ថិភាពមកព្រះសង្ឃវត្តលើនៅគង់ក្នុងកុដិតូចក្បែរនោះ រីឯព្រះសង្ឃវត្តក្រោមក៏និមន្តទៅគង់នៅផ្ទះឯកជន ។ ការដែលព្រះសង្ឃមិនគង់មូលគ្នានេះ ដោយសារទំនាស់ផ្ទៃក្នុងវត្តបានបន្តប្រមាណជា១៥ឆ្នាំហើយ រវាងគណកម្មការគ្រប់គ្រងវត្តតែមួយដែលបែកជាពីរ ។ បន្ទាប់ក្រោយមកទៅជួលផ្ទះសម្រាប់ជាទីសំណាក់អ្នកបួសនឹងសម្រាប់ធ្វើបុណ្យ ។ ទំនាស់ដែលនៅបន្តយ៉ាងវែងអន្លាយនៅតុលាការនៅតែជាបច្ចុប្បន្នភាពដដែលការបើកវត្តមកវិញ ក៏មិនមានពន្លឺថា បើកបានវិញដែរ ។

បើតាមដំណឹងចុងក្រោយគណកម្មការវត្តក្រោមអាចនឹងទិញបានទីសំណាក់របស់ព្រះសង្ឃមួយកន្លែងស្ថិតនៅ North chemford ដើម្បីកុំឱ្យបង់ចំណាយ២ពាន់ដុល្លាក្នុង១ខែ ដើម្បីទីស្នាក់អាស្រ័យបណ្តោះអាសន្ននឹងធ្វើបុណ្យចោលទទេរៀងរាល់ខែ ។ រីឯពាក្យបណ្តឹងជាមួយនឹងវត្តលើនៅតែមានសុពលភាព ។ពុំមានគម្រោងណាមួយសម្រាប់ជួសជុលហើយបើកវត្តឱ្យពុទ្ធបរិស័ទប្រើប្រាស់ដូចដើមវិញនៅឡើយទេ ៕

## តមកពីទំព័រទី ១៨ រមណីយដ្ឋាន...

ដែលមិនអាចបំភ្លេចបានមានបន្ទប់ស្ប៉ាធំទូលាយដ៏ល្អឥតខ្ចោះដែលតភ្ជាប់គ្នានឹងបន្ទប់ហាត់ប្រាណក្នុងមជ្ឈមណ្ឌលដ៏ទំនើបបំផុតរួមជាមួយអាងហែលទឹកទីធ្លាវាយកូនហ្គោលដែលមានចំនួន១៨រន្ធបានរចនាឡើងដោយអ្នកមានឈ្មោះល្បីល្បាញ គឺលោក Arnold Palmer ព្រមទាំងមជ្ឈ-មណ្ឌលកម្សាន្ត និងអប់រំកុមារដែលបរិវេណទាំងមូលមានទំហំ១៦៨០ម៉ែត្រការ៉េ ។

ដោយឡែកនៅរមណីយដ្ឋានទេសចរណ៍ទឹកឈ្ងូវិញត្រូវបានលោក សយ ស៊ីណុល ប្រាប់ថាទឹកម្សាន្តប្រកបដោយភាពមនោរម្យនេះមានចម្ងាយ៨គីឡូម៉ែត្រស្ថិតនៅភាគខាងជើងទីរួមខេត្តក្នុងទឹកដីភូមិស្នំ ប្រាំពីរ ឃុំម៉ាក់ប្រាង ស្រុកកំពតរមណីយដ្ឋាននេះមានទឹកជ្រោះហូរធ្លាក់មកពីភ្នំដំរីភ្នំកំចាយហូរខួបប្រាំងវស្សាមានទឹកថ្លាឈ្វេងហូរកាត់លើផ្ទាំងថ្មដាធំៗផ្តល់ជាកន្លែងងូតទឹកកម្សាន្តសម្រាប់អ្នកទេសចរយ៉ាងសប្បាយមិនតែប៉ុណ្ណោះនៅទឹកឈ្ងូក៏សម្បូរទៅដោយផ្លែឈើដែលកសិករក្នុងមូលដ្ឋានដាំដុះជាលក្ខណៈធម្មជាតិ ដូចជាទុរេន មង្ឃុត សារម៉ាវ ក្រូចត្លុង ម៉ាក់ប្រាង ជាដើមដែលរាល់បណ្តាផ្លែឈើទាំងនេះហុចផលបណ្តាក់គ្នាជាបន្តបន្ទាប់ឥតដាច់ និងមានដាក់លក់ជូនអ្នកទេសចរផងដែរ ៕

# ពិសារទឹកប៉េងប៉ោះ១ថ្ងៃមួយ កម្ចាត់ជំងឺឆ្អឹង



ក្រុមអ្នកវិទ្យាសាស្ត្រនិយាយថា ការពិសាទឹកប៉េងប៉ោះ២កែវក្នុងមួយថ្ងៃជួយពង្រឹងឆ្អឹង ហើយអាចបញ្ចៀសនូវជំងឺឈឺសន្លាក់ឆ្អឹងបាន ។

គ្រឿងផ្សំសំខាន់ត្រូវគេគិតថា គឺជាសារធាតុ លីកូពីន (Lycopin) ដែលជាសារធាតុប្រឆាំងជាតិពុល ហើយអាចកាត់បន្ថយគ្រោះថ្នាក់នៃជំងឺមហារីកក្រពេញសម្រាប់បុរស និងការពារប្រឆាំងនឹងជំងឺបេះដូង ។

ក្រុមអ្នកស្រាវជ្រាវនៅឯសាកលវិទ្យាល័យ តូរ៉ុនតូ ក្នុងប្រទេសកាណាដាបានស្នើស្ត្រីក្រោយពេលមានរដូវចំនួន៦០នាក់ មានអាយុចាប់ពី ៥០-៦០ឆ្នាំឱ្យកាត់ផ្តាច់ការប្រើប៉េងប៉ោះនៅក្នុងរបបអាហាររបស់ពួកគេសម្រាប់រយៈពេល១ខែ ។

ការកាត់ផ្តាច់នេះ បាននាំឱ្យមានការបង្កើនកម្រិត N-telopetid ដែលជាសារធាតុគីមីមួយនៅក្នុងឈាមដែលបញ្ចេញចូលទៅក្នុងចរន្តឈាមនៅពេលដែលឆ្អឹងត្រូវបាក់ ។

បន្ទាប់ពីរយៈពេល៤ខែក្រោយមកស្ត្រីទាំងនោះត្រូវបានផ្តល់ទឹកជមប៉េងប៉ោះមួយដូសជារៀងរាល់ថ្ងៃដោយមានផ្ទុកសារធាតុលីកូពីន១៥មិល្លីក្រាម ។ ការផឹកទឹកជមប៉េងប៉ោះនេះបាននាំទៅរកការធ្លាក់ចុះយ៉ាងច្រើននូវកម្រិតនៃសារធាតុ N-telopetid ក្នុងខ្លួនស្ត្រីដែលផឹកទឹកប៉េងប៉ោះ ឬក៏លេបឱសថប៉េងប៉ោះ ។

ក្រុមអ្នកស្រាវជ្រាវនិយាយថា ទឹកប៉េងប៉ោះ គឺជាអាហារដ៏ល្អដែលសម្បូរទៅដោយសារធាតុលីកូពីន ។ ផឹកទឹកប៉េងប៉ោះក្នុង១ថ្ងៃដែលមានផ្ទុកសារធាតុលីកូពីន១៥មិល្លីក្រាមអាចមានកម្លាំងគ្រប់គ្រាន់ក្នុងការពង្រឹងឆ្អឹងដែលស្រួយបាន ៕

**KhmerPost USA, LLC**
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម **Advertising**
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ **Editorials**
និពន្ធនាយក ពិន សំឧន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

**អ្នកនិពន្ធកិត្តិយស Contributed Writers:**
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D. James Ostis
**ផ្នែករោគីណាកាពកាសែត Design Artist**
Heng Chhunleng
**ជំនួយការរដ្ឋបាល Administrative Assistant**
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# កម្ចាត់អង្គែ និងជំងឺរបក ស្បែកក្បាល ដោយធម្មជាតិ

អង្គែ គឺជាប្រភេទនៃជំងឺស្បែកក្បាលដែលបណ្តាលមកពីការរីកលូតលាស់នៃបាក់តេរីនៅលើស្បែកក្បាលបង្កឱ្យស្បែកក្បាលកើតមានអង្គែ ។ ដូច្នេះខាងក្រោមនេះ គឺជាវិធីងាយៗមួយចំនួនដើម្បីកម្ចាត់អង្គែ និងធ្វើឱ្យស្បែកក្បាលមានក្លិនក្រអូបបាន ។

**១. ក្រូចឆ្មារ :** វិធីព្យាបាលប្រើទឹកក្រូចឆ្មារសុទ្ធយកមកម៉ាស្សាលើស្បែកក្បាលរបស់អ្នកទុករយៈពេល២ទៅ៣នាទី បន្ទាប់មកលាងសម្អាតសក់ និងស្បែកក្បាលរបស់អ្នកជាមួយនឹងសាប៊ូកក់សក់ជាការស្រេច ។ ធ្វើបែបនេះជារៀងរាល់ថ្ងៃរហូតដល់បាត់អង្គែ ។

វិធីមួយទៀតលាយទឹកក្រូចឆ្មារ១ស្លាបព្រាបាយជាមួយនឹងប្រេងដូង៥ស្លាបព្រាបាយកូរចូលគ្នាឱ្យសព្វរួចលាបនៅលើសក់ និងស្បែកក្បាលរបស់អ្នក បន្ទាប់មកយកកំណាត់ ឬកូនកន្សែងរុំជុំវិញសក់របស់អ្នកទុកមួយយប់ រួចលាងសម្អាតសក់ជាការស្រេច ។

**២. ប្រទាលកន្ទុយក្រពើ :**

ជាឱសថសម្រាប់ផ្សះមុខរបួស ប្រឆាំងនឹងមេរោគ និងប្រឆាំងនឹងការដុះផ្សិត ឧទាហរណ៍ : សក់ទុកឱ្យសើម



យូរពេកនឹងដុះផ្សិតដែលបណ្តាលឱ្យកើតមានអង្គែ ។

**វិធីព្យាបាល :** យកទឹកប្រទាលកន្ទុយក្រពើសុទ្ធ ឬទឹករំអិលប្រទាលកន្ទុយក្រពើលាបនៅលើស្បែកក្បាលរបស់អ្នកទុករយៈពេល២ទៅ៣នាទីមុនងូតទឹក ។ បន្ទាប់មកលាងសម្អាតសក់ជាមួយនឹងសាប៊ូប្រភេទខ្សោយធ្វើបែបនេះពីរដងក្នុងមួយសប្តាហ៍រហូតដល់ស្បែកក្បាលរបស់អ្នកបាត់អង្គែ ៕




# មជ្ឈមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល

**345 Chelmsford St. Lowell, MA 01851/ – www.lowelleldercare.com**

## អ្វីទៅជាមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល?

គឺជាលំនៅដ្ឋានកក់ក្តៅមួយ ដែលផ្តល់សេវាមានកម្មវិធីជាក់លាក់ដល់សហគមន៍បំណង គឺគាំទ្រឲ្យមនុស្សចាស់ជរាអាចរស់នៅដោយឯករាជ្យខ្លួនឯង និងជួយឲ្យមានសុខុមាលភាពផ្នែកផ្លូវកាយ ផ្លូវចិត្ត និងផ្នែកសង្គម ។ កម្មវិធីរបស់យើងធានានូវបរិស្ថានរស់នៅមួយប្រកបដោយសុវត្ថិភាព និងមានបរិយាកាសដូចជាផ្ទះរបស់ពួកគាត់ ។

## ទីតាំងនៃមណ្ឌល

ទីតាំងអាចរកឃើញដោយងាយក្នុងអគារថ្មី ជាមួយនូវការតុបតែងរចនាបែបសិល្បៈខ្មែរយ៉ាងល្អប្រណិត ។ មានបន្ទប់ទទួលទានអាហារស្អាត និងមានពន្លឺគ្រប់គ្រាន់ បន្ទប់អានសៀវភៅ បន្ទប់កុំព្យូទ័រ បន្ទប់សម្រាក បន្ទប់មើលភាពយន្ត និងកន្លែងផ្សេងៗទៀតជាទីពេញចិត្តរបស់លោកអ្នក ។





## មណ្ឌលផ្តល់សេវាដល់មនុស្សចាស់

- មានរថយន្តជូនដំណើរទៅវិញទៅមកពីផ្ទះលោកអ្នក
- ការពិនិត្យ និងថែទាំសុខភាព
- ការព្យាបាលតាមរយៈការហាត់ប្រាណ
- កិច្ចការសង្គម (ផ្តល់ការពិគ្រោះផ្ទាល់ខ្លួន និងក្រុមគ្រួសារ)
- ម្ហូបខ្មែរក្តៅៗ និងចំណីផ្សេងៗ
- ការហាត់ប្រាណសំរាប់សុខភាពរាងកាយ
- កម្មវិធីសិល្បៈ និងតន្ត្រី
- ការអប់រំពីសុខភាព
- ការពិភាក្សាលើព្រឹត្តិការបច្ចុប្បន្ន (និងការសំណេះសំណាលគ្នា)
- សកម្មភាព និងដំណើរកំសាន្តក្រៅមណ្ឌល

## Our Services

- Door-to-Door Transportation
- Medical Care and Support
- Physical Therapy
- Social Worker
- Khmer Meals and Snacks
- Adaptive Physical Exercise
- Music Programs
- Health Educational Seminars
- Discussions on current events, (and times of reminiscing)
- Outdoor Field Trips

**សូមហៅលេខទូរស័ព្ទ (978) 596-1111**




# កម្មវិធីជំនួយផ្នែកថែទាំសុខភាពតាមផ្ទះរដ្ឋ

**Homecare Agency**

Group Adult Foster Care Program (GAFC)
MassHealth

*ជាសេវាមានគុណភាពខ្ពស់ និងទុកចិត្តបាន*
*បុគ្គលិកមានសណ្តានចិត្តល្អ និងធ្វើការតាមវិជ្ជាជីវៈ*
*អ្នកគ្រប់គ្រង និងបុគ្គលិកនិយាយភាសាខ្មែរ*



*Compassionate Care & Reliable*
*Professional & Cultural Sensitive*
*Management & Staffs speak Khmer*

*កម្មវិធី Group Adult Foster Care (GAFC) គឺជាដំណោះស្រាយល្អបំផុតសំរាប់ចាស់ៗ ខ្មែរយើង ដែលមានប ញ្ហារាំរ៉ៃផែកសុខភាព ឬជរាហើយមិនចង់ ចាកចេញពីលំនៅដ្ឋានខ្លួនឯង ឬមិនចង់បែកពីក្រុមគ្រួសារដែលបានរស់នៅជាមួយគ្នាជាយូរមកហើយ ។ យើងអាចជួយអោយជីវិតលោកអ្នកកាន់តែប្រសើរឡើង តាមរយៈការផ្តល់នូវសេវាថែទាំសុខភាពមួយទល់មួយដល់ផ្ទះលោកអ្នកតែម្តង ។*

*Accucare Homecare Agency is the perfect solution for seniors and others who are not ready to leave their home for an institutional setting or live with reltives because of illness or chronic conditions. We improve your life by providing one-on-one compassionate senior care in the comfort of your own home.*

### ដើម្បីអាចចូលរួមក្នុងកម្មវិធីនេះបានលោកអ្នកត្រូវមានលក្ខណៈដូចខាងក្រោម :

*To be eligibled for GAFC you must:*

*-រស់នៅផ្ទះរដ្ឋ (live in subsidized or public housing)*
*-អាយុ ២២ ឆ្នាំឡើងទៅ (age 22 years and older)*
*-មាសហែលស្តង់ដា (eligible for Masshealth Standard)*
*-ត្រូវការជំនួយក្នុងការរស់នៅប្រចាំថ្ងៃយ៉ាងហោចណាស់មួយដូចជា មុជទឹក ស្លៀកពាក់ ពេលប្រើបន្ទប់ទឹក ចំអិនអាហារ ឬ ពេលដើរ (need daily assistance with one or more personal care tasks such as bathing, dressing, toileting, meal preparation and/or moving)*
*-មានការអនុញ្ញាតពីគ្រូពេទ្យផ្ទាល់ខ្លួនអ្នក (have physician statement of your condition)*
*-ត្រូវបានវាយតំលៃផ្នែកសុខភាព និងការអនុម័តយល់ព្រមពីកម្មវិធី (be screened and approved for the program )*

### ផលប្រយោជន៍ទទួលបាន :

*Benefits you will get:*

*-ការថែទាំផ្ទាល់ខ្លួនមួយទល់មួយក្នុងផ្ទះរបស់អ្នករាល់ថ្ងៃមួយថ្ងៃមួយម៉ោងលើការរស់នៅប្រចាំថ្ងៃ (personal care service in your home, up to one hour of service each day)*
*-ជំនួយលើការគ្រប់គ្រងថ្នាំសង្កូវអ្នក (Medication Managemant)*
*-ផែនការថែទាំសុខភាពផ្ទាល់ខ្លួនមួយ ដែលធ្វើឡើងដោយគ្រូពេទ្យ និងខេសម៉ានីជើ (an individual care plan developed by a registered nurse and case manager)*
*-វាយតំលៃលើសេចក្តីត្រូវការជាប្រចាំជាបន្តបន្ទាប់ (ongoing monitoring of needs)*
*-សមាជិកអាចទាក់ទងមក ២៤ម៉ោង (24-hour access to services)*

**ត្រូវការជ្រើសរើសបុគ្គលិកធ្វើការ PCA/ HHA needed for Lowell, Lynn, Revere, and Boston**

**ដើម្បីចុះឈ្មោះសូមទាក់ទងមក**
To register, please contact:

ឱក តុលាយុត្តិ ឡូវែល
Tolayuth Ok: Lowell
Tel: (978)735-4955, Fax: (978) 735-4956
Office: 144 Merrimack St., Suite 404. Lowell, MA 01852



# ជោគជតារាសីលោកអ្នក ទាំង១២ ប្រចាំឆ្នាំអោង



## ឆ្នាំជូត

រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែម ទើបជាការប្រសើរ ៕



## ឆ្នាំឆ្លូវ

លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបាន ដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕



## ឆ្នាំខាល

នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្សងឆ្នោតប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕



## ឆ្នាំថោះ

រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្តល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវករកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕



## ឆ្នាំរោង

លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្អុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕



## ឆ្នាំម្សាញ់

រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញ យ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀប ដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕



## ឆ្នាំមមី

ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕



## ឆ្នាំមមែ

អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តី គួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕



## ឆ្នាំវក

រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នា ជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕



## ឆ្នាំរកា

រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕



## ឆ្នាំច

លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕



## ឆ្នាំកុរ

លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

## វិរបុរសដែលគួរចងចាំ

# នួន ឌួន (១៩១០_១៩៦៦)



១-លោក នួន ឌួន



២-លោកស្រី មុិញ សំយ៉ឺន



៣-លោក នួន ឌួន

តពីលេខមុន

កោះត្រឡាចមានភូមិសាស្ត្រស្ថិតនៅក្នុងមាត់សមុទ្រចិនប៉ែកខាងត្បូងមានផ្ទះរាប់រយខ្ទងសង់តាមមាត់សមុទ្រមានព្រៃប្រឹក្សាគ្របលើភ្នំដីមានដីជាតិ ។ គុកនេះមានដាក់អ្នកទោសនយោបាយកិរិតធ្ងន់ ខ្មែរ-យួន ខាងយួនមានទាំង ផាំ វ៉ាន់ដុង និងពួកឧក្រិដ្ឋជនដទៃទៀត ។ អាចារ្យ ហែម ចៀវបានទទួលមរណភាពក្នុងជន្មាយុ៤៥ឆ្នាំនៅឆ្នាំ១៩៤៣ក្នុងគុកនេះ ។

លោក សឺន ង៉ុកថាញ់ ភ័យបានរត់គេចខ្លួនទៅបាងកកសុំសិទ្ធិជ្រកកោន ហើយអាជ្ញាធរជប៉ុនក៏បានយល់ព្រមផ្តល់សិទ្ធិជ្រកកោណនយោបាយ និងនាំគាត់ទៅនៅប្រទេសជប៉ុន ។ គឺនៅប្រទេសនេះដែលលោក សឺង ង៉ុកថាញ់ ចូលជួរធ្វើនយោបាយ"ពិភពសំបូរសប្បាយជាមួយគ្នានៅមហាអាស៊ីបូពា"(Shére De Co-Prospérite de la Grande Asia Orientail)ជាមួយជប៉ុន ។ នៅឆ្នាំ ១៩៤៥ មានចលនានៅឥណ្ឌូចិនបារាំង ។ នៅថ្ងៃ ៩មីនា ១៩៤៥ ជប៉ុនបានធ្វើពលប្រហារឥណ្ឌូចិនដោយចាត់ទុកសន្ធិសញ្ញាបារាំង-ខ្មែរ-លាវ-យួន ជាមោឃៈ និងបានចាប់អាជ្ញាធរបារាំងដាក់គុកព្រមទាំងប្រកាស "ឯករាជ្យ"នៅឥណ្ឌូចិន ។ អំណោយផលនេះបានជះឥទ្ធិពលនយោបាយមកលើឥណ្ឌូចិន។ នៅចុងខែកុម្ភៈ ១៩៤៥ មានទាហានជប៉ុនមួយក្រុមបាននាំទូរលេខពីភ្នំពេញឱ្យនាំអ្នកទោសបួននាក់ : អាចារ្យ ហែម ចៀវ, លោក នួន ឌួង, លោក ប៉ាច ឈឺន, លោក ប៊ុណ្ណ ច័ន្ទម៉ុល មកភ្នំពេញ ។ មានតែអ្នកទោសបីនាក់ចុងក្រោយនេះទេដែលបានវិលមកវិញ អាចារ្យ ហែម ចៀវ បានទទួលមរណភាពទៅហើយ ។ មកដល់អ្នកលឿងអ្នកទាំងបីនាក់នោះបានជួបលោក ជុំ មួង ភិក្ខុ ប៉ាង ខាត់ និងមិត្តចាស់ដទៃទៀតធ្វើការជាមួយគ្នាពីមុនគេមានការត្រេកអរណាស់ ។

លោក សឺង ង៉ុកថាញ់ បានវិលត្រឡប់ចូលកម្ពុជាវិញបានធ្វើជាទេសរដ្ឋមន្ត្រីកិច្ចការបរទេស និងជានាយករដ្ឋមន្ត្រីបាន ២ខែ ពីថ្ងៃ១៤ សីហា ១៩៤៥ដល់ថ្ងៃ១៦ តុលា ១៩៤៥ ។ លោក ប៉ាច ឈឺន ក៏បានត្រូវតែងតាំងជារដ្ឋមន្ត្រីក្រសួងសេដ្ឋកិច្ចជាតិ និងការផ្គត់ផ្គង់ព័ស្តុភារ ។

លោក នួន ឌួង បានបន្តធ្វើនយោបាយតទៅទៀតដោយបានឈរឈ្មោះជាបេក្ខជនតំណាងរាស្ត្រក្នុងគណបក្សប្រជាធិបតេយ្យមណ្ឌលខេត្តក្រចេះប្រឆាំងទៅគណបក្សសង្គមនៃសម្តេចសីហនុ ។ ក្នុង៩១អាសនៈនៅសភាសង្គមបានទទួលទាំងអស់៧គណបក្សដទៃទៀតគ្មានបានទទួល១អាសនៈសោះនោះ ។ មិនចុះសំរុងនឹងនយោបាយសម្តេចសីហនុ លោក នួន ឌួង បានគេចខ្លួនទៅស្រុកលាវរួចទៅស្រុកសៀមបានចូលធ្វើខ្មែរឥស្សរៈ និងក្រោយមកបានវិលចូលមកភ្នំពេញវិញ ធ្វើការនៅធនាគារសុងសាក់ ។ លោក នួន ឌួង មានកូនប្រុសស្រី៧នាក់គាត់បានទទួលមរណៈភាពនៅឆ្នាំ១៩៦៦ នៅមន្ទីរពេទ្យព្រះកេតុមាលា ៕

តទៅលេខក្រោយ

# ខ្មែរអ្នកជាតិនិយម


និពន្ធដោយ ឡឹក សំរអឿន ហៅ "ផ្កាយព្រឹក"

**តពីលេខមុន**

ជាមួយពួកប្រជាធិបតេយ្យបានព្រមទាំងអាចបញ្ចុះបញ្ចូលពួកឧស្សរៈខ្មែរដែលមិនទាន់ចូលពួកយៀកមិញនោះ ឱ្យមកចូលរួមជាមួយរាជរដ្ឋាភិបាលវិញទៀតផង ។ ដោយសារទ័លច្រកខ្លាំងពេកស្តេចសីហនុក៏សុខចិត្តធ្វើមុខក្រាស់ស្នើសុំរដ្ឋាភិបាលបារាំងឱ្យដោះលែងលោក សឺន ង៉ុកថាន់ ដែលត្រូវគេបំបរបង់ចោលឯប្រទេសបារាំងនោះ ឱ្យត្រឡប់មកកាន់មាតុភូមិវិញ ។

ថ្ងៃទី ២៩ តុលា ១៩៥១ លោក សឺន ង៉ុកថាន់ បានធ្វើដំណើរពីប្រទេសបារាំងមកដល់មាតុភូមិវិញ ។ ពេលនោះបណ្តាជនខ្មែររាប់ម៉ឺននាក់នៅរាជធានីភ្នំពេញ និងមកពីស្រុកស្រែចំការទាំងព្រះសង្ឃទាំងគ្រហស្ថ សិស្សានិសិស្ស អ្នករាជការបាននាំគ្នារង់ចាំទទួលដោយសេចក្តីរីករាយសោមនស្សយ៉ាងក្រៃលែងតាំងពីវាលយន្តហោះពោធិចិនតុងរហូតដល់វត្តឧណ្ណាលោមក្រុងភ្នំពេញជាហេតុនាំឱ្យស្តេចសីហនុកើតសេចក្តីច្រណែនឫស្យាកាន់តែខ្លាំងមួយកម្រិតទៀត ។

ទោះបីលោក សឺន ង៉ុកថាន់ បានសន្យានឹងបារាំងថា លោកឈប់ធ្វើសកម្មភាពនយោបាយប្រឆាំងនឹងបារាំងក៏ដោយ តែបន្ទាប់ពីឃើញប្រជាពលរដ្ឋខ្មែរធ្វើស្វាគមន៍ទទួលលោកយ៉ាងអឺកកធឹកអស្ចារ្យ ព្រោះប្រាថ្នាឱ្យលោកជួយដោះស្រាយបញ្ហាប្រទេសជាតិនោះ លោកក៏សម្រេចចិត្តធ្វើសកម្មភាពស្រោចស្រង់ជាតិតទៅទៀត ។ ដើម្បីសិក្សាឱ្យដល់ច្បាស់មែនទែននូវស្ថានការណ៍ទាំងឡាយរបស់ប្រទេសជាតិក្នុងរយៈកាលដែលលោកបានឃ្លាតចេញពីមាតុភូមិនោះ លោកចាំបាច់ត្រូវជួបជុំជាជួយអតីតអ្នកស្នេហាជាតិនិយម ដូចជាលោក ប៉ាច ឈឺន និងលោក ប៊ុន ចាន់ម៉ុល ព្រមទាំងអតីតក្រុមរាជវាំង ដែលមានសម្តេចព្រះមហាក្សត្រីយានី កុសុមៈ លោក ប៊ូ ហ៊ាន និងលោក ស៊ឹម វ៉ា ជាដើម ។ បន្ទាប់មកទើបលោកបានជួបជុំជាមួយក្រុមបញ្ញវន្តថ្មីរបស់លោកមួយចំនួនដែលបានធ្វើការទាក់ទងរៀបចំគម្រោងការរួចមកហើយនៅពេលលោកបានជួបគ្នានៅឯប្រទេសបារាំង ដូចជាលោក អ៊ា ស៊ីចូវ, ហង់ ធុងហាក់ , អ៊ីវ យ៉ាង . ដួង ចន្ទសារាត ។ល។

ក្រោយពីបានពិគ្រោះជាមួយវរជនទាំងអស់នោះរួចមកហើយ លោក សឺន ង៉ុកថាន់ បានឱ្យយោបល់ថា បញ្ហាចម្បងដែលត្រូវដោះស្រាយភ្លាមៗនោះ ពុំមែនគ្រាន់តែទាមទារយកឯករាជ្យពីបារាំងប៉ុណ្ណោះទេ គឺត្រូវចាត់វិធានការណ៍ទប់ទល់នឹងពួកយៀកមិញ ដែលកំពុងអនុវត្តផែនការរបស់គេនៅលើទឹកដីខ្មែរផងដែរ ។ ខ្មែរយើងគ្រប់និន្នាការនយោបាយ គ្រប់បក្សពួកត្រូវរួបរួមសាមគ្គីគ្នាជាធ្លុងមួយ រួចចែកមុខនាទីគ្នាបំពេញរៀងៗខ្លួន ដូចដែលយើងបានធ្វើកាលពីឆ្នាំ១៩៤៥នោះ ទើបអាចសម្រេចគោលដៅបាន ។ បើពុំនោះសោតទេ យើងច្បាស់ជាធ្លាក់ទៅក្នុងរណ្តៅដែលគេបានជីកជាមុនរួចហើយនោះមិនខានឡើយ ។ យើងត្រូវមានអ្នកតស៊ូតាមផ្លូវនយោបាយនៅក្នុងស្រុកផង មានអ្នកតស៊ូកម្លាំងអាវុធនៅក្នុងព្រៃវែង ។

ក្រោយពីបានចែកមុខនាទីគ្នារួចហើយ លោក សឺន ង៉ុកថាន់ ក៏បាននាំគ្នាបង្កើតសារព័ត៌មានជាភាសាខ្មែរមួយឈ្មោះ **"ខ្មែរក្រោក"** ព្រមទាំងបានធ្វើដំណើរទៅខេត្តនានា ដើម្បីឃោសនាផ្ទាល់ដោយយកលេសថា ដើរទាក់ទងនឹងក្រុមឥស្សរៈដែលមិនទាន់ចូលរួមជាមួយយៀកមិញឱ្យនាំគ្នាចូលមករួបរួមជាមួយរាជរដ្ឋាភិបាលវិញ ។ ប៉ុន្តែតាមការពិតលោកបានឆ្លៀតឱកាសនេះទាក់ទងជាមួយក្រុមឥស្សរៈទាំងនោះឱ្យសម្ងំនៅក្នុងព្រៃដដែល ដើម្បីតស៊ូទាមទារយកឯករាជ្យពេញទីពីបារាំង ព្រោះបើគ្មានឥស្សរៈអ្នកជាតិនិយមតស៊ូនៅក្នុងព្រៃនោះទេ វាជាគ្រោះអន្តរាយមួយយ៉ាងធំដល់ប្រទេសជាតិ ដោយសារស្នាដៃពួកយួនយៀកមិញដែលលើកបន្តុបពួកខ្មែរយៀកមិញថា ជាតំណាងខ្មែរតស៊ូ នៅពេលណាមានការដោះស្រាយរកសន្តិភាពតាមសន្និសីទអន្តរជាតិ ។ ម្យ៉ាងទៀតជាឱកាសមួយដែលលោក សឺន ង៉ុកថាន់ ត្រូវដើររកកន្លែងសម្រាប់គេចខ្លួនចូលព្រៃ ដើម្បីធ្វើការតស៊ូទៅថ្ងៃក្រោយ ។ នៅពេលសន្ទនាជាសាធារណៈមួយ នៅទីរួមខេត្តតាកែវ ដែលមានលោក ប៉ាច ឈឺន ជារដ្ឋមន្ត្រីក្រសួងឃោសនាការ និងលោក ហ៊ុយ កន្ថុល ជានាយករដ្ឋមន្ត្រីជូនដំណើងផង លោក សឺន ង៉ុកថាន់ បានបញ្ចេញនូវគោលគំនិតតស៊ូរបស់លោកថា ប្រទេសកម្ពុជាត្រូវតែទាមទារឱ្យបារាំងដកទ័ពទាំងអស់របស់ខ្លួនចេញពីប្រទេសកម្ពុជាជាបន្ទាន់ ទើបហៅថា ឯករាជ្យបរិបូណ៌ ។

មិនយូរប៉ុន្មានបារាំងបានវិនិច្ឆ័យថា សកម្មភាពរបស់លោក សឺន ង៉ុកថាន់ ជាគ្រោះថ្នាក់ដល់អធិបតេយ្យរបស់បារាំង ម្ល៉ោះ ហើយបារាំងក៏បិទសារព័ត៌មានខ្មែរក្រោកនៅខែ កុម្ភៈ ឆ្នាំ ១៩៥២ ។

### លោក សឺន ង៉ុកថាន់ គេចចូលព្រៃ

ដោយឃើញហេតុការណ៍មិនស្រួលដូចរៀបរាប់ខាងលើ លោក សឺន ង៉ុកថាន់ ក៏បានជ្រើសរើសយកផ្លូវដែលបានរៀបចំទុកជាមុន គឺគេចទៅនៅក្នុងព្រៃដើម្បីបន្តការតស៊ូ ដោយប្រើកម្លាំងអាវុធនៅក្នុងតំបន់សំរោងចុងកាល់ ដែលមានពួកឥស្សរៈមួយក្រុមដឹកនាំដោយលោក កៅ កក់ ព្រមទាំងបានសហការីមួយចំនួនទៅជាមួយផងមានជាអាទិ៍ គឺលោក អ៊ា ស៊ីចូវ , ហង់ ធុងហាក់, អ៊ីវ យ៉ាង, អៀង មាស, សាំង សាវ៉ាត, ប៉េង គិត ដោយបាននាំយកវិទ្យុផ្សាយសម្លេងមួយគ្រឿងពីក្រសួងឃោសនាការទៅជាមួយផង ។ បារាំងបានធ្វើប្រតិបត្តិសឹកដេញចាប់ ក៏ប៉ុន្តែរុករកមិនឃើញ ។

លោក សឺន ង៉ុកថាន់ ព្រមទាំងសហការីបានទៅតាំងទីបញ្ជាការនៅលើភ្នំដងរែក ត្រង់ច្រកអូរស្មាច់ ស្រុកសំរោងចុងកាល់ ខេត្តសៀមរាប ។ នៅថ្ងៃទី ០៩ មីនា ១៩៥២ ដែលជាថ្ងៃឯករាជ្យចំពោះពួកអ្នកបង្កើតកាសែត "នគរវត្ត" និងសារព័ត៌មាន "ខ្មែរក្រោក" នោះ លោក សឺន ង៉ុកថាន់ បានធ្វើសេចក្តីអំពាវនាវតាមវិទ្យុផ្សាយសម្លេងភ្នំដងរែក ទៅកាន់ប្រជាពលរដ្ឋទាំងប្រទេសឱ្យក្រោកឈរឡើងកាន់អាវុធប្រយុទ្ធយកឯករាជ្យពេញបរិបូរណ៍ពីបារាំង ។ បន្ទាប់មកលោកបានទាក់ទងប្រមូលក្រុមឥស្សរៈណាដែលមានឧត្តមគតិជាអ្នកស្នេហាជាតិមាតុប្រទេសឱ្យរួបរួមបង្កើតចលនាតស៊ូមួយឱ្យឈ្មោះថា "ចលនាឥស្សរៈរួមខ្មែរបំរើជាតិ" ដែលមានចលនាសម្ព័ន្ធគ្រប់គ្រងលើកងកម្លាំងរំដោះ និងប្រជាពលរដ្ឋដែលរស់នៅក្នុងតំបន់ដែលរំដោះបាន ។ ក្នុងចំណោមក្រុមឥស្សរៈដែលបានរួមក្នុងចលនានេះ មានក្រុមលោក កៅ កក់ នៅតំបន់សំរោងចុងកាល់ខេត្តសៀមរាប១ . ក្រុមលោក ងួន ហុង នៅតំបន់រំលង តាំងគោក ក្នុងខេត្តកំពង់ធំ ១, ក្រុមទ្រង់ចន្ទរង្សីនៅតំបន់ច្បារមន ក្នុងខេត្តកំពង់ស្ពឺ១ ។ ឯអ្នករាជការ ទាហាន ស៊ីវិល ព្រមទាំងសិស្សានុសិស្សវិទ្យាល័យជាដើមក៏បាននាំគ្នារត់ចូលចលនានេះជាលំដាប់លំដោយនៅតាមភូមិស្រុកដែលបានរំដោះ ។ ខាងទាហានរាជការមានជាអាទិ៍ គឺអនុសេនីយ៍ទោ ដួង ចន្ទសារាត និងអនុសេនីយ៍ ត្រី លាវ ធានស៊ី ក៏បាននាំកងកម្លាំងរបស់ខ្លួនចំនួនមួយកងអនុសេនាធំ ព្រមទាំងសម្ភារៈសឹកទៅចូលរួមផង ។ ចំណែកឯសិស្សវិទ្យាល័យស៊ីសុវត្ថិ មានលោក អ៊ុម ស៊ឹម, ទឹត អួន, ទេព ហុងគ្រី, ស្រី បូទ្ធី, គង់ ឈឺន, អ៊ូ អន, អ៊ឹង ម៉េងគ្រុយ, ថាន់ រចន, ជុំ គាល់, ទឹត ប៊ុន និងខ្លួន ខ្ញុំ ឡឹក សំអឿន ។ សិស្សវិទ្យាល័យកំពង់ចាម គឺលោក ម៉ៅ ថេន , ឃី តាំលឹម, យុន ហ៊ាង, ស្ពាំ សំជឹម ។

ក្រៅពីនេះ នៅដើមឆ្នាំ ១៩៥៣ មានតំណាងពួកយៀកមិញ៣នាក់ បានមកទាក់ទងលួងលោមលោក សឺន ង៉ុកថាន់ សុំឱ្យលោកចូលរួមធ្វើសហប្រតិបត្តិការជាមួយពួកគេ ក្នុងការតស៊ូនឹងអាណានិគមនិយមបារាំង ដើម្បីយកឯករាជ្យពេញទី ។ ប៉ុន្តែលោក សឺន ង៉ុកថាន់ បដិសេធហើយក៏ប្រាប់ទៅអ្នកតំណាងយួនយៀកមិញវិញថា "ជនជាតិខ្មែរមានសេចក្តីត្រេកអរជាខ្លាំងហើយសូមថ្លែងអំណរគុណចំពោះជនជាតិវៀតណាម ដែលបានចាប់អារម្មណ៍ និងយកចិត្តទុកដាក់លើវាសនាអនាគតរបស់ប្រជាជនខ្មែរ និងប្រទេសខ្មែរ ។ សុំឱ្យជនជាតិវៀតណាមខំប្រឹងប្រែងនៅត្រឹមតែរណសិរ្សវៀតណាមបានហើយ ឯប្រជាជនខ្មែរវិញក៏ខំប្រឹងប្រែងខ្លួនឯងនៅរណសិរ្សកម្ពុជាដែរ ។ ដូច្នេះមានន័យថា យើងធ្វើការតស៊ូស្របគ្នាប្រឆាំងនឹងសត្រូវរួមរបស់យើងទៅហើយ មិនចាំបាច់ចូលរួមជាមួយគ្នាទេ ព្រោះអាចនឹងនាំឱ្យមានវិបត្តិទៅថ្ងៃក្រោយ ដោយហេតុថាជាតិយើងទាំងពីរនៅមិនទាន់យល់ចិត្តថ្លើមគ្នានៅឡើយ" ។

### ចលនាសម្ព័ន្ធនៃចលនាឥស្សរៈរួមខ្មែរបំរើជាតិ

នៅថ្នាក់កំពូល មានគណៈកម្មាធិការនាយកដែលមានប្រធានអនុប្រធាន, សមាជិក ៧រូប និងមានអគ្គលេខាធិការម្នាក់ជាអ្នកចាត់ការទូទៅនៅក្នុងចលនានោះ ។ នៅលើទឹកដីដែលរំដោះបាន ចលនានោះចែកជា៤ភាគី :

១-ភាគឧត្តរទិស មានខេត្តសៀមរាប

២-ភាគបស្ចិមទិស មានខេត្តបាត់ដំបង និងពោធិ៍សាត់

៣-ភាគឦសានទិស មានខេត្តកំពង់ធំ និងកំពង់ឆ្នាំង

៤-ភាគទក្សិណទិស មានខេត្តកំពង់ស្ពឺ និងកំពត ។

ក្នុងភាគនីមួយៗ មានមេបញ្ជាការគ្រប់គ្រង និងមេបញ្ជាការយោធាជាអ្នកទទួលខុសត្រូវ ។ ភាគនីមួយៗចែកចេញជាស្រុក, ឃុំ និងភូមិដែលមានកម្មការស្រុក , កម្មការឃុំ និងកម្មការភូមិជាអ្នកទទួលខុសត្រូវ ។ ឯនយោបាយរបស់ចលនា គឺគោលនយោបាយអ្នកជាតិនិយមពឹងពាក់លើខ្លួនឯង ដោយធ្វើការប្រមូលផ្តុំប្រជាពលរដ្ឋខ្មែរគ្រប់ស្រទាប់វណ្ណៈក្នុងសង្គមជាតិ ទាំងព្រះសង្ឃទាំងគ្រហស្ថប្រុសស្រី ឱ្យចូលរួមក្នុងចលនាតស៊ូ ដើម្បីចៀសវាងការបង្ហូរឈាមរវាងខ្មែរ និងខ្មែរគ្នាឯង ។

### សមាសភាពនៃគណៈកម្មាធិការនាយក

ប្រធាន : លោក សឺន ង៉ុកថាន់

អនុប្រធាន : លោក អ៊ា ស៊ីចូវ

សមាជិក : លោកគ្រូអាចារ្យ ខៀវ ជុំ ទទួលបន្ទុកជាអគ្គលេខាធិការ ។

**តទៅលេខក្រោយ**

# វិធីងាយធ្វើឱ្យ សក់ស្រស់ ស្អាតសម្រាប់ ស្ត្រីដែលរវល់



នេះ គឺជាវិធីងាយៗធ្វើឱ្យសក់របស់អ្នកមានភាពរលោងស្រស់ស្អាត និងកាន់តែមានភាពទាក់ទាញសម្រាប់ស្ត្រីដែលធ្វើការនៅក្នុងការិយាល័យ ឬអ្នកដែលមានការរវល់ សូម្បីតែពេលថែរក្សាក៏គ្មាននោះ ។ ដូច្នេះហើយ ទើបលើកយកវិធីសាស្ត្រដែលអាចជួយអ្នកក្នុងការដោះស្រាយនូវបញ្ហាមួយនេះបានដូចខាងក្រោម :

-បាញ់នូវថ្នាំបាញ់សក់ដែលអាចធ្វើឱ្យសក់រលោង គួរជ្រើសរើសមួយក្នុងចំណោមប្រភេទនៃថ្នាំបាញ់សក់ដែលអាចធ្វើឱ្យសក់មានភាពរលោងដែលនឹងបង្កើតឡើង ដើម្បីជួយដល់សក់ ។ អ្នកបាញ់វានៅនឹងគល់សក់ ដោយបរិមាណសមល្មម ព្រោះវាជួយឱ្យសក់របស់អ្នកមានភាពទន់ និងងាយស្រួលក្នុងការតុបតែង ឬអ្នកក៏អាចជ្រើសរើសនូវប្រភេទសាប៊ូកក់សក់ស្ងួត ដើម្បីកាត់បន្ថយជាតិប្រេងនៃសក់ ។

- **សម្ងួតសក់ជាមួយនឹងម៉ាស៊ីនផ្លុំសក់**

ចែកសក់ជាចំណែកតូចៗល្មម ។ ប្រើ ម៉ាស៊ីន ផ្លុំសក់ដោយត្រូវចំណាយរយៈពេល១០វិនាទីពីគល់សក់ដល់ចុងសក់ ។ នៅពេលដែលកំពុងតែផ្លុំសក់ អ្នកត្រូវយកក្រាសដែលមានរាងមូល ហើយយកវាមកចែកសក់នូវ បំណែកសក់ដែលអ្នកបានចែក និងផ្លុំបណ្តើរ ។

- **ប្រើក្រាសដើម្បីមូរសក់**

បន្ទាប់ពីបញ្ចប់នូវការផ្លុំសក់ឱ្យរួញដូចខាងលើរួចអ្នកមូរសក់ដោយប្រើចុងស្និតដោយលើកសក់ប្រមាណជាពីរបីវិនាទី ទើបទម្លាក់ចុះ ។ ជំហាននេះនឹងជួយឱ្យសក់របស់អ្នកមើលទៅរួញបែបធម្មជាតិ ។ ចូរអនុវត្តជំហាននេះម្តងទៀត រហូតគ្រប់ផ្នែកនៃសក់ ។

- **ការសម្ងួតចុងសក់**

ដំណាក់កាលចុងក្រោយអ្នកអាចយកម៉ាស៊ីនផ្លុំមកផ្លុំនៅចុងសក់ ។ សម្រាប់ការបង្កើតនូវម៉ូតនេះហើយ អ្នកគួរតែរកនូវសក់ដែលសេសសល់ដែលមិនទាន់ផ្លុំ ៕

# KHMERPOST USA
# 4th ANNUAL GALA




Congratulations our New Program Director, Tolayuth Ok!



តុលាយុទ្ធ អ៊ុក នាយកកម្មវិធី G.A.F.C

Our main goal is to help senoir adults live , independent and meaningful life by providing comprehensive and compassionate care in their own homes by our professional care takers, registered nurses who speak their own language.Please call to see is you or your loved ones are qualified for this free service from MassHealth Group Adults Foster Care Program today **978-735-4955**.

យើងមានគោលដៅក្នុងការជួយសម្រួលការរស់នៅដល់លោកអ្នកវ័យចំណាស់ឱ្យរស់នៅ មានសុខភាពល្អ ឯករាជ្យភាព និងមានអត្ថន័យក្នុងជីវិត ដោយផ្ដល់នូវតម្លៃតបស្នងនានា និងការថែទាំតាមផ្ទះពីអ្នកជំនាញថែទាំគិលានុបដ្ឋាយិការ មានគរុកោសល្យ ដែលនិយាយភាសាលោកអ្នក ។

សូមទាក់ទងទូរស័ព្ទ : **978-735-4955** សម្រាប់ព័ត៌មានបន្ថែម

**Lowell Office**
144 Merrimack St. Suite 404
Lowell, MA 01852

**Boston Office**
214 Lincoln St. Suite 200
Allston, MA 02134